

ក្រសួងអប់រំ យុវជន និងកីឡា

សម្រាប់លក់

# ភាសាខ្មែរ

# កំណែ អាន-សរសេរ

៣

មេរៀនទី

១ អំណាន

# សាលាកុមារមេត្រី

## សំណួរ

១. តើសាលារៀននេះមានបរិវេណដូចម្ដេច?

២. តើក្នុងទីធ្លាសាលារៀននេះមានអ្វីខ្លះ?

៣. តើនៅខាងក្រោយអគារមានអ្វីខ្លះ?

៤. តើនៅក្នុងបន្ទប់រៀនមានអ្វីខ្លះ?

៥. តើប្អូនចូលចិត្តរៀននៅសាលានេះដែរឬទេ? ពីព្រោះអ្វី?

## ចម្លើយ

១. សាលារៀននេះមានបរិវេណធំទូលាយ និងមានរបងព័ទ្ធជុំវិញ។

២. ក្នុងទីធ្លាសាលារៀននេះមានដងទង់ជាតិ សួនច្បារ សួនកុមារ ទីលានកីឡា និងដើមឈើធំៗ។

៣. នៅខាងក្រោយអគារមានសួនជីវៈចម្រុះ សួនបន្លែ និងបង្គន់អនាម័យសម្រាប់សិស្សប្រុស ស្រីផ្សេងពីគ្នា។

៤. នៅក្នុងបន្ទប់រៀនមានតុ កៅអី ក្ដារខៀន តាមជញ្ជាំងមានរូបភាព ពាក្យស្លោក និងមានតាំងស្នាដៃសិស្ស។ល។

៥. ខ្ញុំចូលចិត្តរៀននៅសាលានេះណាស់ ពីព្រោះសាលានេះមានសោភ័ណភាពស្រស់ស្អាត បរិស្ថានល្អ មានអនាម័យ និងមានសួនបៃតងស្រស់បំព្រង សក្ដិសមជាថ្នាលបណ្ដុះចំណេះដឹងពិត

ប្រាកដ។

## ចម្លើយលំហាត់

១. អានពាក្យ

២. ជ្រើសរើសពាក្យដែលទាក់ទងនឹងទីកន្លែងក្នុងសាលារៀន ដាក់ក្នុងប្រអប់ឱ្យបានត្រឹមត្រូវ។

អគារ សួនជីវៈចម្រុះ សៀវភៅ សួនច្បារ ជ័រលុប គ្រូ បង្គន់អនាម័យ បន្ទាត់

☞ ពាក្យដែលទាក់ទងនឹងទីកន្លែងក្នុងសាលារៀនមាន៖

| |
|---|
| អគារ សួនជីវៈចម្រុះ សួនច្បារ បង្គន់អនាម័យ |

## សំណេរ

ក. សរសេរតាមអាន

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ។

| |
|---|
| សួនច្បារ ទង់ជាតិ អគារ |

១. សាលារៀននេះមាន.....*អគារ*.....បីខ្នង។

២. នៅមុខអគារនីមួយៗមាន....*សួនច្បារ*......។

៣. កណ្ដាលទីធ្លាមាន.....*ទង់ជាតិ*.........។

គ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ។

| |
|---|
| ព័ទ្ធជុំវិញ បរិវេណ មេត្រី |

១. សាលារៀនខ្ញុំ ជាសាលាកុមារ..*មេត្រី*.....។

២. សាលារៀននេះមានបរិវេណធំទូលាយ និងរបង.......*ព័ទ្ធជុំវិញ*......។

៣. ក្នុង...*បរិវេណ*.....សាលារៀន មានអគារបីខ្នង ដប់ប្រាំបីបន្ទប់។

ឃ. តែងកថាខណ្ឌ ៖

សាលារៀនជាកន្លែងផ្ដល់ចំណេះដឹង។ វាជាកន្លែងបណ្ដុះបណ្ដាលឱ្យសិស្សានុសិស្សគ្រប់រូបមានចំណេះដឹងពិតប្រាកដ ព្រមទាំងផ្ដល់ភាពសប្បាយរីករាយផងដែរតាមរយៈការរាប់អានមិត្តភក្តិ។ ជាពិសេស សាលារៀនមានអនាម័យល្អ បរិស្ថានស្អាតគួរជាទីរីករាយ។ យើងត្រូវចូលរួមថែរក្សាសាលារៀនយើងឱ្យបានស្អាតជានិច្ច។

# វេវចនសព្ទ

## ចម្លើយលំហាត់

១. ចូររកវេវចនសព្ទនឹងពាក្យ "រៀន ឪពុក"។

-វេវចនសព្ទនឹងពាក្យ "រៀន" គឺសិក្សា។

-វេវចនសព្ទនឹងពាក្យ "ឪពុក" គឺៈ ប៉ា ពុក ឪ បិតា។

២. ចូរអានពាក្យខាងក្រោម រួចស្រង់ពាក្យដែលជាវេវចនសព្ទនឹងពាក្យ "ប្រញាប់"។

ថ្ងៃនេះ ជាថ្ងៃចូលរៀនដំបូង។ កុមារាកុមារីទាំងឡាយធ្វើដំណើរយ៉ាងប្រញាប់ប្រញាល់សំដៅទៅសាលារៀន។ លោកគ្រូ អ្នកគ្រូរួតរះទៅសាលារៀន រង់ចាំទទួលសិស្សទាំងឡាយដោយក្ដីរីករាយ។ គេឃើញឪពុកម្ដាយម៉ីម្ចាដឹកដៃកូនចូលក្នុងបរិវេណសាលារៀន។

☞ ពាក្យដែលជាវេវចនសព្ទនឹងពាក្យ "ប្រញាប់" គឺៈ រួតរះ ម៉ីម្ចា។

៣. ចូរតែងល្បះដោយប្រើវេវចនសព្ទនឹងពាក្យ "រៀន"។

- ខ្ញុំប្ដេជ្ញាខំរៀនដើម្បីអនាគតខ្ញុំ។
- យើងសិក្សាអំពីមេរៀនជីវិត។

មេរៀនទី ៣ អំណាន

# សិស្សឧស្សាហ៍

## សំណួរ

១. តើសុខាជាមនុស្សដូចម្ដេច?

២. តើនៅសាលារៀន សុខាបានធ្វើអ្វីខ្លះ?

៣. តើនៅផ្ទះ សុខាបានធ្វើអ្វីខ្លះ?

៤. ហេតុអ្វីបានជាឪពុកម្ដាយសុខាសប្បាយចិត្ត?

៥. តើអ្នកត្រូវធ្វើដូចម្ដេចខ្លះ ដើម្បីឱ្យឪពុកម្ដាយអ្នកសប្បាយចិត្ត?

## ចម្លើយ

១. សុខាជាសិស្សឧស្សាហ៍។

២. នៅសាលារៀន សុខាយកចិត្តទុកដាក់ស្ដាប់គ្រូពន្យល់ និងហ៊ានជម្រាបសួរគ្រូនៅពេលមិនយល់។ ពេលខ្លះនាងជួយពន្យល់មិត្តរួមថ្នាក់ដែលរៀនយឺតទៀតផង។

៣. នៅផ្ទះ សុខាខំធ្វើលំហាត់ អានសៀវភៅ សិក្សាស្រាវជ្រាវនិងជួយធ្វើកិច្ចការផ្ទះ។

៤. បានជាឪពុកម្ដាយសុខាសប្បាយចិត្តព្រោះគាត់ឃើញកូនខិតខំរៀនសូត្រ និងទទួលបានលទ្ធផលល្អទីគាប់ចិត្ត។

៥. ដើម្បីឱ្យឪពុកម្ដាយខ្ញុំសប្បាយចិត្ត ខ្ញុំត្រូវខិតខំរៀនសូត្រឱ្យក្លាយជាសិស្សពូកែ និងជួយធ្វើកិច្ចការងារផ្ទះនៅពេលទំនេរពីការ

សិក្សា។

## ចម្លើយលំហាត់

១. អានពាក្យ

២. ចូរអានល្បះក្នុងប្រអប់ ហើយសរសេរអក្សរ "ខុស" ពីមុខល្បះមិនត្រឹមត្រូវ និងសរសេរអក្សរ "ត្រូវ" ពីមុខល្បះតាមអត្ថបទ។

"...*ខុស*..." ពេលខ្លះនាងជជែកជាមួយមិត្តរួមថ្នាក់ ដែលរៀនយឺតក្នុងពេលរៀន។

"...*ត្រូវ*..." រាល់ថ្ងៃនាងទៅសាលារៀនទៀងទាត់ពេលជានិច្ច។

"...*ត្រូវ*..." នៅផ្ទះ សុខាខំធ្វើលំហាត់ អានសៀវភៅ និងជួយធ្វើកិច្ចការផ្ទះ។

"...*ខុស*." ឪពុកម្តាយសុខាមិនសប្បាយចិត្ត ព្រោះឃើញកូនមិនខិតខំរៀនសូត្រ។

៣. រកបដិសព្ទនឹងពាក្យ "យឺត"

យឺត ≠ លឿន

៤. រកវេវចនសព្ទនឹងពាក្យ "ឧស្សាហ៍" គឺ៖ សង្វាត សម្ដី ឧិហាត ខិតខំ ប្រឹងប្រែង ឃ្មាតខ្មី ស្រវាស្រទេញ។

៥. រកសទិសសព្ទនឹងពាក្យ "រៀន"។

- រៀន (កិ.) សិក្សា ខំសង្កេតឱ្យចេះ ទទួលយកចំណេះ ហ្វឹកហាត់។

- រាន (ន.) គ្រែវាលឬមានដំបូល មានសសរដាំក្នុងដី សម្រាប់អង្គុយលំហើយឬសម្រាប់ដាក់អីវ៉ាន់លក់ជាដើម។

- រាន (កិ.) កាប់គាស់រម្លើងទីដី ព្រៃឱ្យកើតបានជាស្រែ ចម្ការ, ភូមិលំនៅ។

- រាន (កិ.) រវះរវាម មិនរើសអើង។

៦. តើសុខាជាសិស្សដូចម្ដេច? ចូរគូសសញ្ញា "✓"ក្នុងប្រអប់ នូវចម្លើយត្រឹមត្រូវ។

☐ ឧស្សាហ៍ដើរលេងច្រើន។

☐ ឧស្សាហ៍តវ៉ាជាមួយឪពុកម្ដាយ។

☑ *ឧស្សាហ៍រៀនសូត្រ។*

☐ ឧស្សាហ៍បង្កជម្លោះក្នុងថ្នាក់រៀន។

## សំណេរ

ក. សរសេរតាមអាន

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោមរូបភាពឱ្យបានត្រឹមត្រូវ។

| |
|---|
| រៀនយឺត ខំរៀន កិច្ចការ |



១. សុខា....*ខំរៀន*.....នៅផ្ទះ។

២. សុខាជួយធ្វើ....*កិច្ចការ*.....ផ្ទះ។

៣. សុខាជួយមិត្តភក្តិ....*រៀនយឺត*....។

គ. ចូរជ្រើសរើសពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ។

| | | | | | | |
|---|---|---|---|---|---|---|
| ១ | រៀនសូត្រ | សុខា | ឧស្សាហ៍ | ជាសិស្ស។ | | |
| ២ | យកចិត្ត | ស្ដាប់គ្រូ | ទុកដាក់ | ក្នុងថ្នាក់រៀន | សុខា | ពន្យល់។ |

☞ **ចម្លើយ**

| | | | | | | |
|---|---|---|---|---|---|---|
| ១ | សុខា | ជាសិស្ស | ឧស្សាហ៍ | រៀនសូត្រ។ | | |
| ២ | សុខា | យកចិត្ត | ទុកដាក់ | ស្ដាប់គ្រូ | ពន្យល់ | ក្នុងថ្នាក់រៀន។ |

**មេរៀនទី**
**៤ អំណាន**

# ការសម្អាតថ្នាក់រៀន

## សំណួរ

១. តើការសម្អាតថ្នាក់រៀនជាភារកិច្ចរបស់អ្នកណាខ្លះ?

២. តើប្អូនត្រូវមានសម្ភារៈអ្វីខ្លះសម្រាប់យកទៅសម្អាតថ្នាក់រៀន?

៣. តើប្អូនត្រូវសម្អាតនៅកន្លែងណាខ្លះ?

៤. ហេតុអ្វីបានជាត្រូវយកសំរាមទៅដាក់នៅក្នុងធុងសំរាម?

៥. តើថ្នាក់រៀនស្អាតផ្តល់ប្រយោជន៍អ្វីខ្លះដល់ប្អូន?

## ចម្លើយ

១. ការសម្អាតថ្នាក់រៀនជាភារកិច្ចរបស់សិស្សានុសិស្សទាំងអស់គ្នា។

២. ដើម្បីសម្អាតថ្នាក់រៀន ខ្ញុំត្រូវមានអំបោស កន្ទប និងធុងទឹក ។

៣. ខ្ញុំត្រូវសម្អាតនៅក្នុងបន្ទប់រៀន ជូតតុ កៅអី ទ្វារ និងបង្អួច។

៤. បានជាត្រូវយកសំរាមទៅដាក់នៅក្នុងធុងសំរាមពីព្រោះ ដើម្បីថែរក្សាអនាម័យនៅក្នុងបន្ទប់រៀន។

៥. ថ្នាក់រៀនស្អាតផ្តល់ប្រយោជន៍ធ្វើឱ្យយើងមានអារម្មណ៍សប្បាយរីករាយក្នុងការសិក្សា មានអនាម័យល្អចៀសផុតពីការឆ្លងជំងឺផ្សេងៗ។

## ចម្លើយលំហាត់

២. តើល្បះណាខ្លះដែលទាក់ទងនឹងខ្លឹមសារអត្ថបទ? ចូរគូសសញ្ញា

"✓" ក្នុងប្រអប់ដែលជាចម្លើយត្រឹមត្រូវ។

☐ ថ្ងៃនេះយើងត្រូវសម្អាតផ្ទះ។

☑ *ថ្ងៃនេះយើងត្រូវវេនសម្អាតបន្ទប់រៀន។*

☐ ថ្នាក់រៀនខ្ញុំស្អាតជានិច្ច។

☐ ថ្ងៃនេះយើងត្រូវទៅស្រែ។

៣. ចូររៀបព្រឹត្តិការណ៍តាមលំដាប់អត្ថបទឡើងវិញ ដោយបង់លេខក្នុងប្រអប់ឱ្យបានត្រឹមត្រូវ។

③ អ្នកខ្លះប្រមូលសំរាម កម្ទេចកម្ទី កើបធូលីយកទៅចោលក្នុងធុងសំរាម។

④ គ្រូបានសរសើរពួកយើងគ្រប់ៗគ្នា។

② ពួកយើងនាំគ្នាបោសបន្ទប់រៀន ជូតតុ កៅអី ទ្វារ និងបង្អួច។

① មិត្តភក្តិដែលជាសមាជិកក្រុមទាំងអស់នាំគ្នាទៅសាលារៀនមុនម៉ោងសិក្សា។

## សំណេរ

ក. សរសេរតាមអាន

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ។

| ភារកិច្ច | ព្រឹកនេះ | ប្រមូល | ធូលី |
|---|---|---|---|

១. ការសម្អាតថ្នាក់រៀនជា...*ភារកិច្ច*...របស់យើងទាំងអស់គ្នា។

២. ...*ព្រឹកនេះ*...ដល់វេនក្រុមខ្ញុំសម្អាតបន្ទប់រៀន។

៣. អ្នកខ្លះ...*ប្រមូល*...យកសំរាម កម្ទេចកម្ទី កើប...*ធូលី*...

យកទៅដាក់ក្នុងធុងសំរាម។

គ. ចូររៀបពាក្យនិងកន្សោមពាក្យខាងក្រោមជាល្បះត្រឹមត្រូវ។

| | | | | | | |
|---|---|---|---|---|---|---|
| ១ | ថ្នាក់រៀន | ជា | របស់យើង | ភារកិច្ច | ទាំងអស់គ្នា។ | ការសម្អាត |

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ២ | នេះ | ដល់ | ក្រុម | ខ្ញុំ | បន្ទប់រៀន។ | សម្អាត | ព្រឹក | វេន |

| | | | | |
|---|---|---|---|---|
| ៣ | ពួកយើង | តែងសរសើរ | គ្រប់ៗគ្នា។ | គ្រូ |

**ចម្លើយ**

| | | | | | | |
|---|---|---|---|---|---|---|
| ១ | ការសម្អាត | ថ្នាក់រៀន | ជា | ភារកិច្ច | របស់យើង | ទាំងអស់គ្នា។ |

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ២ | ព្រឹក | នេះ | ដល់ | វេន | ក្រុម | ខ្ញុំ | សម្អាត | បន្ទប់រៀន។ |

| | | | | |
|---|---|---|---|---|
| ៣ | គ្រូ | តែងសរសើរ | ពួកយើង | គ្រប់ៗគ្នា។ |

ឃ. ចូរតែងល្បះតាមរូបភាព ដោយប្រើពាក្យបង្ហាញសកម្មភាព។



១. សិស្សបោស *សម្អាត* ទីធ្លា ។



២. សិស្ស *ជូត* តុគ្រូ ។

## មេរៀនទី ៥ បំណិន

# ពាក្យចួន

### លំហាត់

ចូរសូត្រមេសូត្រខាងក្រោម រួចប្រាប់ពាក្យចួន។

ប្រដាប់ប្រដា យកមកសិក្សា ប្រើប្រាស់ក្នុងថ្នាក់
បន្ទាត់ជ័រលុប ខ្មៅដៃគួរឆ្ពាក់ គួសវាសបណ្ដាក់
សរសេរអក្សរ។
សំពៀតក្ដារឆ្នួន យើងប្រើថែធួន សំចៃបានល្អ
កូនខំរៀនសូត្រ ពុកម៉ែត្រេកអរ កូនពៅបវរ
គួរឱ្យស្រឡាញ់។

### ចម្លើយ

ពាក្យចួនក្នុងកំណាព្យខាងលើ៖

វគ្គទី១៖ ប្រដា ⟷ សិក្សា

ថ្នាក់ ⟷ ឆ្ពាក់ ⟷ បណ្ដាក់

វគ្គទី២៖ ឆ្នួន ⟷ ធួន

ល្អ ⟷ អរ ⟷ បវរ

ចួនឆ្លងវគ្គ៖ អក្សរ ⟷ ល្អ

**មេរៀនទី** # ពេលគោរពទង់ជាតិ

## ៦ អំណាន

### សំណួរ

១. តើសិស្សទាំងអស់ត្រូវគោរពទង់ជាតិនៅពេលណា?

២. នៅពេលគោរពទង់ជាតិ តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះ?

៣. តើទង់ជាតិជាសញ្ញាណតំណាងឱ្យអ្វី?

៤. ហេតុអ្វីបានជាយើងត្រូវគោរពទង់ជាតិ?

### ចម្លើយ

១. សិស្សទាំងអស់ត្រូវគោរពទង់ជាតិនៅមុនពេលចូលសិក្សា។

២. នៅពេលគោរពទង់ជាតិ ខ្ញុំត្រូវឈរឱ្យត្រង់ខ្លួន ច្រៀងចម្រៀងតាមបទ ហើយភ្នែកសម្លឹងមើលទៅទង់ជាតិ ដោយសេចក្ដីសញ្ជប់សញ្ជឹង។

៣. ទង់ជាតិជាសញ្ញាណតំណាងឱ្យព្រលឹងវិញ្ញាណក្ខន្ធបុព្វបុរសជាតិ។

៤. បានជាយើងត្រូវគោរពទង់ជាតិ ព្រោះដើម្បីរំលឹកគុណព្រលឹងវិញ្ញាណក្ខន្ធបុព្វបុរសដែលបានពលីជីវិតដើម្បីជាតិ។

### ចម្លើយលំហាត់

១. អានពាក្យ

២. ស្វ្រគមេស្វ្រ

៣. ចូររកពាក្យចួនក្នុងវគ្គមេសូត្រខាងក្រោម។

យើងបុត្រខេមរា មុនចូលសិក្សា គោរពទង់ជាតិ
ឈរតម្រង់ជួរ រូតរះខ្មីឃ្មាត កុំគេចកុំឆ្អៀត
មកទាន់វេលា។

ពាក្យចួនក្នុងវគ្គខាងលើ៖

ខេមរា ⟝⟞ សិក្សា

ជាតិ ⟝⟞ ឃ្មាត ⟝⟞ ឆ្អៀត

៤. ចូរគូសសញ្ញា "✓" នៅក្នុងប្រអប់ដែលជាចម្លើយត្រឹមត្រូវ។ តើល្បះមួយណាទាក់ទងនឹងខ្លឹមសារមេសូត្រ?

☐ យើងត្រូវគោរពឪពុកម្ដាយ មុនពេលចេញមកសាលារៀន។

☐ យើងត្រូវគោរពចាស់ទុំ នៅពេលជួបគាត់តាមផ្លូវ។

☑ *យើងត្រូវគោរពទង់ជាតិមុនចូលរៀន។*

☐ យើងត្រូវគោរពគ្រូមុនពេលចូលរៀន។

## សំណេរ

ក. សរសេរតាមអាន

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងចន្លោះនៃវគ្គមេសូត្រខាងក្រោមឱ្យបានត្រឹមត្រូវ។

| ចចើង បង្ហួត ច្រៀង ជាតិខ្មែរ ផ្កាលា ជជែក |
|---|

ទង់...*បង្ហូត*...ឡើង មិននៅ...*ចចើង*...

បែរ...*ជជែក*...គ្នា មាត់...*ច្រៀង*...តាមបទ

ភ្នែកមើល...*ផ្កាឈា*... ទង់ជាតិប្រជា

សញ្ញាណ...*ជាតិខ្មែរ*...។

គ. ចូរបំពេញល្បះខាងក្រោមឱ្យបានសមស្រប។

១. ....*យើងនាំគ្នាគោរព*...ទង់ជាតិ។

២. យើងគោរព...*ទង់ជាតិ*...។

៣. ...*សិស្សានុសិស្ស*...រូតរះ...*ទៅសាលារៀន*...។

ឃ. ចូរតែងល្បះតាមរូបភាពខាងក្រោម។



*សុខា និងធីតាឡើង បង្ហូតទង់ជាតិ។*



*យើងទាំងអស់គ្នា គោរពទង់ជាតិ។*

**មេរៀនទី**
# ការប្រាប់ព័ត៌មានផ្ទាល់ខ្លួន
## ៧ ការនិយាយ

### សំណួរ

១. ពេលជួបណារី តើសុភាពប្រើពាក្យស្វាគមន៍ និងរៀបរាប់ដូចម្ដេចខ្លះ?

២. តើណារីប្រើពាក្យស្វាគមន៍ និងឆ្លើយដូចម្ដេចខ្លះ?

៣. ចូររៀបរាប់ពីព័ត៌មានផ្ទាល់ខ្លួនរបស់សុភាព។

៤. ចូររៀបរាប់ពីព័ត៌មានផ្ទាល់ខ្លួនរបស់ណារី។

៥. ដើម្បីប្រាប់ព័ត៌មានផ្ទាល់ខ្លួន តើគេនិយាយផ្ដោតទៅលើចំណុចអ្វីខ្លះ?

### ចម្លើយ

១. ពេលជួបណារី សុភាពប្រើពាក្យស្វាគមន៍ថា "សួស្ដី" និងរៀបរាប់ប្រាប់អំពីឈ្មោះ អាយុ កម្រិតថ្នាក់ និងឈ្មោះសាលា។

២. ណារីក៏ប្រើពាក្យស្វាគមន៍ថា "សួស្ដី" និងឆ្លើយរៀបរាប់ប្រាប់អំពីឈ្មោះ អាយុ កម្រិតថ្នាក់ និងឈ្មោះសាលាដែរ។

៣. ព័ត៌មានផ្ទាល់ខ្លួនរបស់សុភាព៖

- មានអាយុ៩ឆ្នាំ
- រៀនថ្នាក់ទី៣ "ក" នៃសាលាបឋមសិក្សាសម្ដេចព្រះរាជអគ្គមហេសី។

៤. ព័ត៌មានផ្ទាល់ខ្លួនរបស់ណារី៖

- មានអាយុ៩ឆ្នាំ

- រៀនថ្នាក់ទី៣ "ខ" នៃសាលាបឋមសិក្សាវិហារហ្លួង។

៥. ដើម្បីប្រាប់ព័ត៌មានផ្ទាល់ខ្លួន គេនិយាយផ្ដោតទៅលើ៖ ឈ្មោះ អាយុ កម្រិតថ្នាក់រៀន ឈ្មោះសាលារៀន ទីលំនៅ ឈ្មោះឪពុក និងឈ្មោះម្ដាយ។

**មេរៀនទី**

# រឿងទឹកចិត្តដ៏ប្រពៃ

៨ អំណាន

## សំណួរ

១. តើតួអង្គក្នុងរឿងខាងលើមានប៉ុន្មាននាក់?

២. តើស្រីនាថនិងម្ដាយនាំគ្នាទៅណា?

៣. តើស្រីនាថមានទឹកចិត្តដូចម្ដេចចំពោះអ្នកគ្រូ?

៤. បើជាអ្នកគ្រូប្អូនវិញ តើប្អូនមានអារម្មណ៍ដូចម្ដេចដែរ?

## ចម្លើយ

១. តួអង្គក្នុងរឿងខាងលើមានបីនាក់គឺ ស្រីនាថ មីងណាន(ម្ដាយស្រីនាថ) និងអ្នកគ្រូ។

២. ស្រីនាថនិងម្ដាយនាំគ្នាទៅសួរសុខទុក្ខអ្នកគ្រូនៅឯមណ្ឌលសុខភាព។

៣. ស្រីនាថមានទឹកចិត្តស្រឡាញ់និងព្រួយបារម្ភចំពោះអ្នកគ្រូណាស់។

៤. បើខ្ញុំជាអ្នកគ្រូវិញ ខ្ញុំមានអារម្មណ៍សប្បាយរីករាយណាស់ ពេលដែលបានសិស្សមកសួរសុខទុក្ខដូច្នេះ។

## ចម្លើយលំហាត់

៣. វេវចនសព្ទនឹងពាក្យ "ម៉ាក់" ដែលមានក្នុងអត្ថបទគឺ៖ ម្ដាយ ម៉ែ។

៤. រៀបព្រឹត្តិការណ៍តាមលំដាប់សាច់រឿង៖

⑤ មីងណានតប "មិនអីទេ! សូមជូនពរអ្នកគ្រូឱ្យឆាប់ជាសះស្បើយ"។

① ថ្ងៃមួយស្រីនាថបានត្រឡប់មកពីសាលារៀនមុនម៉ោង។

③ ស្រីនាថឆ្លើយ៖ "ចាសម៉ាក់! ថ្ងៃនេះអ្នកគ្រូខ្ញុំឈឺ"។

② មីងណានឆ្ងល់ ក៏សួរ៖ "យី! ថ្ងៃនេះកូនម្តេចចេញពីរៀនមុនម៉ោងដូច្នេះ?"

④ គាត់និយាយ៖ "អ្នកគ្រូសូមអរគុណកូនស្រីនាថ និងអ្នកមីងហើយ ដែលបានមកសួរសុខទុក្ខខ្ញុំ។

**សំណេរ**

ក. សរសេរតាមអាន

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោមរូបភាពឱ្យបានត្រឹមត្រូវ។

| | | |
|---|---|---|
| សួរសុខទុក្ខ | មណ្ឌលសុខភាព | លើកដៃសំពះ |



១. នេះជា...*មណ្ឌលសុខភាព*...ក្នុងភូមិយើង។



២. ស្រីនាថនិងម្ដាយ

ទៅ...*សួរសុខទុក្ខ*.. អ្នកជំងឺ។



៣. កុមារី...*លើកដៃសំពះ*...

ពេលជួបអ្នកគ្រូ។

ខ. ចូររៀបពាក្យនិងកន្សោមពាក្យខាងក្រោមជាល្បះ ឱ្យបានត្រឹមត្រូវ។

| | | | | | | | |
|---|---|---|---|---|---|---|---|
| ១ | សិស្ស | មណ្ឌលសុខភាព | ដើម្បី | ទៅ | អ្នកគ្រូ។ | សុខទុក្ខ | សួរ |

| | | | | | | |
|---|---|---|---|---|---|---|
| ២ | មណ្ឌលសុខភាព។ | មានជំងឺ | ទៅ | ពេល | យើង | ត្រូវ |

| | | | | |
|---|---|---|---|---|
| ៣ | និយាយថា | អ្នកទាំងអស់គ្នា។ | គាត់សូមអរគុណ | អ្នកគ្រូ |

☞ **ចម្លើយ**

| | | | | | | | |
|---|---|---|---|---|---|---|---|
| ១ | សិស្ស | ទៅ | មណ្ឌលសុខភាព | ដើម្បី | សួរ | សុខទុក្ខ | អ្នកគ្រូ។ |

| | | | | | | |
|---|---|---|---|---|---|---|
| ២ | ពេល | យើង | មានជំងឺ | ត្រូវ | ទៅ | មណ្ឌលសុខភាព។ |

| | | | | |
|---|---|---|---|---|
| ៣ | អ្នកគ្រូ | និយាយថា | គាត់សូមអរគុណ | អ្នកទាំងអស់គ្នា។ |

មេរៀនទី ៩ អំណាន

# សិស្សគំរូ

## សំណួរ

១. តើសុធារៀនបានជាប់ចំណាត់ថ្នាក់ដូចម្ដេច?

២. ក្រៅពីការរៀនសូត្រ តើសុធាជាសិស្សយ៉ាងដូចម្ដេច?

៣. តើនៅក្នុងសាលារៀននិងនៅតាមទីសាធារណៈ សុធាធ្វើដូចម្ដេចខ្លះ?

៤. ហេតុអ្វីគេជ្រើសរើសសុធាជាសិស្សឆ្នើម និងជាប្រធានក្រុមប្រឹក្សាកុមារ?

៥. តើអ្នកគួរយកតម្រាប់តាមសុធាឬទេ? ព្រោះអ្វី?

## ចម្លើយ

១. សុធារៀនបានជាប់ចំណាត់ថ្នាក់ល្អជារៀងរាល់ខែ។

២. ក្រៅពីការរៀនសូត្រ សុធាជាសិស្សគោរពវិន័យសាលាយ៉ាងខ្ជាប់ខ្ជួន ចេះស្ដាប់ការទូន្មានរបស់គ្រូ និងចេះគោរពចាស់ទុំ។

៣. នៅក្នុងសាលារៀននិងនៅតាមទីសាធារណៈ សុធាតែងស្ដាប់ពាក្យទូន្មានប្រៀនប្រដៅរបស់អ្នកគ្រូ លោកគ្រូ និងចេះគោរពចាស់ទុំ។

៤. បានជាគេជ្រើសរើសសុធាជាសិស្សឆ្នើម និងជាប្រធានក្រុមប្រឹក្សាកុមារ ព្រោះសុធាជាសិស្សមានចរិយាមារយាទល្អ។

៥. ខ្ញុំគួរតែយកតម្រាប់តាមសុធាដែរ។

## លំហាត់

១. អានពាក្យ

២. បដិសព្ទនឹងពាក្យ "ថ្លៃថ្នូរ"

ថ្លៃថ្នូរ ≠ ថោកទាប

៣. វេវចនសព្ទនឹងពាក្យ "ស្រឡាញ់" គឺ៖ ពេញចិត្ត គាប់ចិត្ត ចូលចិត្ត។

៤. សទិសសព្ទនឹងពាក្យ "រៀង"

-រៀង(កិ ឬ កិ.វិ) +ដាក់តាមលំដាប់, ធ្វើឱ្យត្រូវលំដាប់, ឱ្យត្រូវជួរ, ឱ្យត្រូវរបៀប : *រៀងលេខ, ដាក់រៀងគ្នា។*

+ដែលមានត១គ្នាតាមលំដាប់, *ដរាបរៀងតាមផ្លូវ, តែងមានរៀងមក។*

+រាល់, សព្វ, គ្រប់ : *រៀងខ្លួន, រៀងរាល់ថ្ងៃ។*

-រាង(កិ ឬ គុ) ចាល, រអា, លែងចង់, លែងត្រូវការទៀត។

*ឧ. ផ្លូវនោះពិបាកណាស់ ខ្ញុំរាងហើយ មិនទៅទៀតទេ។*

-រាង(ន) សណ្ឋាន,ទ្រង់ទ្រាយ : *រាងក្រអាញូ, រាងស្តើង...។*

-រាង(ន) ផ្ទាំងរនាបឬស្សីពាសស្រទបចេកដាក់លើគៃមទូកម្ខាងបន្ទេរឱ្យផ្អៀងមកខាងក្នុងទូកប៉ែកខាងក្រោមឱ្យរះនឹងទឹកដើម្បីចែវ ឬអុំទូកទៅឱ្យត្រីរ័ន្តស្លន់លោតចូលក្នុងទូក, គេធ្វើតែក្នុងវេលាមានយប់ខែភ្លឺហៅថា *ដេញរាង។*

៥. គូសសញ្ញាព្រួញភ្ជាប់ល្បះដែលត្រូវនឹងរូបភាព។

សុធាជាក្មេងខ្ជិលរៀលសូត្រ។
សុធាជាសិស្សជួយទុក្ខធុរៈអ្នកដទៃ។
ពេលទំនេរសុធាចូលចិត្តអានសៀវភៅ។



## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "កិច្ចការ ជានិច្ច"

- កិច្ចការ (ន) ការដែលត្រូវធ្វើ។
- ជានិច្ច (កិ.វិ.) ជារៀងរហូត ជាដរាប។

២. បដិសព្ទនឹងពាក្យ "ឧស្សាហ៍ ទំនេរ"

- ឧស្សាហ៍ ≠ ខ្ជិល
- ទំនេរ ≠ រវល់

៣. វេវចនសព្ទនឹងពាក្យ "ឆ្នើម"៖ ឆើត សម្បើម អស្ចារ្យ។

៤. សទិសសព្ទនឹងពាក្យ "ជា"៖

-ជា(ន) ឈ្មោះពស់មួយប្រភេទ មានពិសខ្លាំង, កាលនៅតូចហៅពស់ជា, លុះទ្រើសបន្តិចហៅពស់

ក្រោយ, ដល់ធំអស់ទំហំហៅពស់រំចេក។

-ជា(គុ) ស្រួល, ល្អ, សុខ, សប្បាយ, រួចពីឈឺ។

-ជា(កិ.វិ.) ពាក្យសម្រាប់និយាយចង្អុរនាមសព្ទឱ្យដាច់សេចក្ដីដោយឡែក។ ឧ. *វិជ្ជាជាសម្បត្តិដ៏ប្រសើរក្នុងលោក។*

-ជា(ន ឬ គុ) ដែលទីទៃពីនៅកំដរទ្រព្យគេ។ *ឧ. មនុស្សអ្នកជា។*

-ចៀរ(កិ) ចិតឬកាត់ឱ្យជាចំនៀរ។ *ឧ. ចៀរស្លឹកចេក។*

-ជាល(ន) ប្រដាប់ត្បាញដោយបន្ទោះមានក្រឡា ប្រហោងសណ្ឋានក្រឡាសំណាញ់។ *ឧ.ពោតមួយជាល។*

-ជាល(ន) ឈ្មោះនំមួយប្រភេទ។ *ឧ. នំជាល។*

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោមរូបភាពឱ្យបានត្រឹមត្រូវ។

| រៀនសូត្រ បោសសម្អាត |
|---|





១. នារីកំពុង*បោសសម្អាត* មុខផ្ទះ។ ២. សិស្សខិតខំ*រៀនសូត្រ*នៅក្នុងបន្ទប់។

**មេរៀនទី**

# សមាជិកគ្រួសារខ្ញុំ

១០ អំណាន

## សំណួរ

១. តើជីដូនជីតានៅផ្ទះមានភារកិច្ចអ្វីខ្លះ?

២. តើពុកម៉ែមានភារកិច្ចធ្វើអ្វី?

៣. តើអ្នកណាមានភារកិច្ចសំខាន់ជាងគេ? ធ្វើអ្វី?

៤. តើសមាជិកគ្រួសារនេះជាមនុស្សដូចម្ដេច?

៥. ដើម្បីឱ្យគ្រួសារមានសុភមង្គល តើប្អូនត្រូវធ្វើដូចម្ដេចខ្លះ?

## ចម្លើយ

១. ជីដូនជីតានៅផ្ទះមានភារកិច្ចមើលថែទាំចៅ។

២. ពុកម៉ែមានភារកិច្ចប្រកបរបររកស៊ីដើម្បីផ្គត់ផ្គង់ជីវភាពគ្រួសារ និងតាមដានការសិក្សារបស់កូន។

៣. បងប្រុស បងស្រី និងខ្ញុំមានភារកិច្ចសំខាន់ជាងគេ គឺខិតខំរៀនសូត្រដើម្បីមានអនាគតល្អ។

៤. សមាជិកគ្រួសារនេះជាមនុស្សចេះគោរពស្រឡាញ់គ្នា យោគយល់គ្នា និងជួយទុក្ខធុរៈគ្នាទៅវិញទៅមក។

៥. ដើម្បីឱ្យគ្រួសារមានសុភមង្គល ខ្ញុំត្រូវចេះស្ដាប់បង្គាប់ដំបូន្មានពុកម៉ែ ចេះស្រឡាញ់បងប្អូន និងចេះជួយទុក្ខធុរៈ គ្នាទៅវិញទៅមក។

## ចម្លើយលំហាត់

៣. តើសមាជិកគ្រួសារមានភារកិច្ចធ្វើអ្វីខ្លះ?

☞សមាជិកគ្រួសារមានភារកិច្ចធ្វើកិច្ចការទៅតាមជំនាញរៀងៗខ្លួន។

៤. គូសសញ្ញា ✓ ក្នុងប្រអប់ដែលជាខ្លឹមសារទាក់ទងនឹងអត្ថបទ។

☑ ពុកម៉ែខ្ញុំជាមេគ្រួសារ គាត់រកស៊ីដើម្បីផ្គត់ផ្គង់គ្រួសារ។

☐ គ្រួសារខ្ញុំទៅចូលរួមក្នុងពិធីបុណ្យ។

☑ ជីដូនជីតាចាស់ជរានៅផ្ទះមើលថែចៅ។

☐ កូនៗតំពុងរត់លេងមុខផ្ទះ។

### សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ភារកិច្ច ជីវភាព"

- ភារកិច្ច (ន) កិច្ចការដែលត្រូវធ្វើ, កិច្ចការជាបន្ទុក។
- ជីវភាព (ន) ភាពនៃការរស់នៅ, ការចិញ្ចឹមជីវិត។

២. បដិសព្ទ "ខិតខំ ច្រើន"

- ខិតខំ ≠ ខ្ជិលច្រអូស
- ច្រើន ≠ តិច

៣. វេវចនសព្ទនឹងពាក្យ "របរ"៖ អាជីព មុខជំនួញ ការងារ។

៤. សទិសសព្ទនឹងពាក្យ "សូត្រ"

-សូត្រ(ន) ចេស, ខ្សែឆ្មារ, សរសៃឆ្មារល្អិត(មានសរសៃពីងពាងសរសៃឈូកជាដើម) សរសៃដែលស្រាវយកពីសំបុកដង្កូវនាង : *ស្រាវសូត្រ សំពត់សូត្រ ។*

-សូត្រ(កិ) ថាតាមរបៀបពាក្យដែលទន្ទេញចាំមាត់ : *សូត្រធម៌ ។*

-សូត(ន) សារថី, អ្នកបររថ, សម្ដីសម្ដែងអំណរ ។

-សូទ ឬ សូទៈ (ន) អ្នកចំអិនអាហារ, អ្នកដាំស្ល។

-សូទ្រ ឬ សូទ្រៈ (ន) មនុស្សកើតក្នុងវណ្ណៈទី៤ (ក្នុងប្រទេសឥណ្ឌា): *ពូជសូទ្រៈ* (អ្នកងារ)

-សូធ្យ(កិ) ទន្ទេញ,ថាតាមរបៀបពាក្យដែលទន្ទេញចាំមាត់, អានតាមពាក្យដែលសរសេរស្រាប់។ *ឧ. សូធ្យធម៌... ។*

ខ. ចូរជ្រើសរើសពាក្យប្រអប់ទៅបំពេញកថាខណ្ឌខាងក្រោម ឱ្យបានត្រឹមត្រូវ។

| |
|---|
| ទៅមក យើង ខ្ញុំ រួម រស់នៅ យោគយល់ ជជែក សុភមង្គល |

សមាជិកគ្រួសារ...*ខ្ញុំ*...ចេះគោរពស្រឡាញ់គ្នា...*យោគយល់*... គ្នា និងជួយទុក្ខធុរៈគ្នាទៅវិញ...*ទៅមក*...។ ពួក ...*យើង*...តែង

ជួបជុំទទួលទានអាហារ...*រួម*...គ្នា និង ... *ជជែក*...លេងយ៉ាងសប្បាយរីករាយ។ គ្រួសារខ្ញុំ...*រស់នៅ*... ប្រកបដោយ... *សុភមង្គល*...។

គ. ចូររៀបពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ។

| | | | | | | | | | |
|---|---|---|---|---|---|---|---|---|---|
| ១ | ជីដូន | នៅ | ជវា | ជីតា | ចាស់ | ថែ | ចៅ។ | ផ្ទះ | មើល |

| | | | | | | |
|---|---|---|---|---|---|---|
| ២ | សុភមង្គល | ខ្ញុំ | រស់នៅ | គ្រួសារ | ដោយ | ប្រកប |

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ៣ | ដែរ។ | មាមីង | បន្ទុក | នៅក្នុង | ធ្វើការ | ដូច | ពុកម៉ែ | ក៏ទៅ |

**ចម្លើយ**

| | | | | | | | | | |
|---|---|---|---|---|---|---|---|---|---|
| ១ | ជីដូន | ជីតា | ចាស់ | ជរា | នៅ | ផ្ទះ | មើល | ថែ | ចៅ។ |

| | | | | | | |
|---|---|---|---|---|---|---|
| ២ | គ្រួសារ | ខ្ញុំ | រស់នៅ | ប្រកប | ដោយ | សុភមង្គល។ |

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ៣ | មាមីង | នៅក្នុង | បន្ទុក | ក៏ទៅ | ធ្វើការ | ដូច | ពុកម៉ែ | ដែរ។ |

ឃ. ចូរតែងល្បះនឹងពាក្យខាងក្រោមឱ្យបានក្នុងមួយពាក្យមួយល្បះ។

១. ទស្សនា : ................

☞ ថ្ងៃនេះគ្រួសារខ្ញុំបានទៅ *ទស្សនា* ប្រាសាទអង្គរវត្ត។

១. កម្សាន្ត : ................

☞ ពួកយើងនាំគ្នាដើរ *កម្សាន្ត* តាមមាត់ទន្លេ។

មេរៀនទី
១១ បំណិន

# បដិសព្ទ

## លំហាត់

១. ចូរជ្រើសរើសពាក្យដែលជាបដិសព្ទនឹងគ្នា(ន័យផ្ទុយគ្នា)ពីក្នុងប្រអប់។

| |
|---|
| ល្អ យឺត សុខ ហ៊ាន ខ្លាច លឿន ទុក្ខ អាក្រក់ ជិត ឆ្ងាយ |

២. ចូរគូសសញ្ញាព្រួញភ្ជាប់ពាក្យដែលជាបដិសព្ទនឹងគ្នា។

- ចំណេញ　　　កើតទុក្ខ
- ច្រើន　　　ខាត
- បន្ថែម　　　តិច
- សប្បាយ　　　បន្ថយ

៣. ចូររកបដិសព្ទនឹងពាក្យ "ខ្ពស់ ធ្ងន់ រាក់"។

## ចម្លើយ

១. ពាក្យដែលជាបដិសព្ទនឹងគ្នា(ន័យផ្ទុយគ្នា)៖

- ល្អ ≠ អាក្រក់
- យឺត ≠ លឿន
- សុខ ≠ ទុក្ខ

- ហ៊ាន ≠ ខ្លាច

- ជិត ≠ ឆ្ងាយ

២. គូសសញ្ញាព្រួញភ្ជាប់ពាក្យដែលជាបដិសព្ទនឹងគ្នា៖




៣. បដិសព្ទនឹងពាក្យ៖

- ខ្ពស់ ≠ ទាប

- ធ្ងន់ ≠ ស្រាល

- រាក់ ≠ ជ្រៅ

**មេរៀនទី**
**១២ អំណាន**

# គុណម្ដាយឪពុក

## សំណួរ

១. តើពុកម៉ែបានធ្វើអ្វីខ្លះដើម្បីចិញ្ចឹមគ្រួសារ?
២. តើឪពុកម្ដាយមានគុណចំពោះកូនដូចម្ដេច?
៣. តើកូនត្រូវធ្វើអ្វីខ្លះដើម្បីតបស្នងសងគុណចំពោះឪពុកម្ដាយ?
៤. តើប្អូនស្រឡាញ់ឪពុកម្ដាយប្អូនដែរឬទេ? ព្រោះអ្វី?

## ចម្លើយ

១. ដើម្បីចិញ្ចឹមគ្រួសារ ពុកម៉ែខិតខំធ្វើការដោយឥតមាននឿយហត់ ដូចជាធ្វើស្រែចម្ការ ធ្វើការងាររាជការ ចម្អិនម្ហូបអាហារ ដេរប៉ះ ជាដើម។

២. ឪពុកម្ដាយមានគុណយ៉ាងធំធេងចំពោះកូន ពុំអាចកាត់ថ្លៃបានឡើយ។

៣. ដើម្បីតបស្នងសងគុណចំពោះឪពុកម្ដាយ កូនត្រូវធ្វើជាកូនល្អ ដោយស្ដាប់បង្គាប់លោកទាំងពីរ ខិតខំរៀនសូត្រឲ្យបានពូកែ និងជួយធ្វើកិច្ចការផ្ទះ។

៤. ខ្ញុំស្រឡាញ់ឪពុកម្ដាយណាស់ ព្រោះគាត់ជាអ្នកមានគុណ ដែលបានបង្កើត និងចិញ្ចឹមរូបខ្ញុំយ៉ាងលំបាកវេទនា។

## ចម្លើយលំហាត់

១. ច្រៀងចម្រៀងឡើងវិញ

២. បដិសព្ទនឹងពាក្យ "អត់ ធំធេង"៖

- អត់ ≠ មាន
- ធំធេង ≠ តូចតាច

៣. វេវចនសព្ទនឹងពាក្យ "សមរម្យ"គឺ៖ ត្រឹមត្រូវ ថ្លៃថ្នូរ។

៤. សទិសសព្ទនឹងពាក្យ "ពុន"

- ពុន(កិ) រែកតែម្ខាងចុងដងរែក ឬដំបង គឺពាក់ ឬព្យួរអ្វីៗនឹងចុងដងរែក ឬចុងដំបងជាដើមតែម្ខាង លីយកដៃទប់ម្ខាង។ *ឧទា. ពុនល្អី។*
- ពន់(គុ) ហួស, ក្រៃ, លើសលន់, ពាក្យសម្រាប់ផ្សំនឹងពាក្យ *ប្រមាណ, ពេក* : *ពន់ប្រមាណ, ពន់ពេក។*
- ពន្ធ(ន) សួយ, អាករដែលប្រជានិករត្រូវបង់តាមកំណត់ *ឧទា. ពន្ធស្រូវ, បង់ពន្ធ។*

៥. គូសសញ្ញាព្រួញភ្ជាប់ឃ្លាខាងក្រោមឲ្យបានជាវគ្គចម្រៀងត្រឹមត្រូវ៖




៦. ពាក្យចួននឹងពាក្យ "ធ្វើការ" គឺ "ទ្វេហារ"។

# សំណេរ

ក. សរសេរតាមអាន

ខ. ជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញវគ្គចម្រៀង៖

| |
|---|
| ខិតខំ រាជការ ទ្វេហារ នឿយហត់ ទ្រាំអត់ គោរព គុណ សមុទ្រ |

ពុកម៉ែខ្ញុំ...*ខិតខំ*...ធ្វើការ ទាំង...*ទ្វេហារ*...ពុំដែលត្អូញត្អែរ

ការងារ...*រាជការ*...ចម្ការស្រែ ធ្វើហូរហែពុំខ្លាច...*នឿយហត់*...

បន្ទរៈ ម៉ែនហើយពុំខ្លាចនឿយហត់។

ខ្ញុំស្រឡាញ់...*គោរព*...លោកណាស់ ព្រោះលោកចាស់ពូកែ...*ទ្រាំអត់*...

...*គុណ*...ធំធេងគ្មានដែនកំណត់ ទោះ...*សមុទ្រ*...ក៏ប្រៀបពុំបាន

បន្ទរៈ ម៉ែនហើយក៏ប្រៀបពុំបាន។

គ. ចូររៀបពាក្យក្នុងប្រអប់ឱ្យបានជាល្បះត្រឹមត្រូវ។

| | | | | | |
|---|---|---|---|---|---|
| ១ | ខ្ញុំ | ណាស់។ | អ្នកមានគុណ | ស្រឡាញ់ | គោរព |

☞ ខ្ញុំគោរពស្រឡាញ់អ្នកមានគុណណាស់។

| | | | | | |
|---|---|---|---|---|---|
| ២ | គុណ | ដែន | គ្មាន | កំណត់។ | ធំធេង |

☞ គុណធំធេងគ្មានដែនកំណត់។

**មេរៀនទី ១៣** តែងសេចក្តី

# ការពណ៌នាអំពីមនុស្ស

## សំណួរ

១. តើអត្ថបទនេះពណ៌នាពីនរណា?

២. តើម្តាយរបស់គេឈ្មោះអ្វី? អាយុប៉ុន្មាន? រស់នៅឯណា?

៣. តើម្តាយរបស់គេមានមាឌ កម្ពស់ សម្បុរ សក់ មុខមាត់ ដៃជើង និយាយដូចម្តេច?

៤. តើគាត់មានទំនាក់ទំនងចំពោះមនុស្សទូទៅយ៉ាងដូចម្តេច?

៥. តើគេមានទឹកចិត្តដូចម្តេចចំពោះម្តាយ និងក្រុមគ្រួសាររបស់គេ?

## ចម្លើយ

១. អត្ថបទនេះពណ៌នាពីម្តាយរបស់កុមារីម្នាក់។

២. ម្តាយរបស់គេឈ្មោះគន្ធា អាយុ៣៨ឆ្នាំ រស់នៅភូមិត្រពាំងត្របែក ឃុំអង្គតាសោម ស្រុកត្រាំកក់ ខេត្តតាកែវ។

៣. ម្តាយរបស់គេមានមាឌធំល្មម កម្ពស់ប្រហែលមួយម៉ែត្រហុកសិប សម្បុរខ្មៅស្រអែម សក់វែងស្លូត ច្រមុះស្រួច ភ្នែកធំល្មម ដៃជើងសមនឹងដងខ្លួន។ គាត់និយាយស្តីមួយៗតែច្បាស់។

៤. គាត់មានទំនាក់ទំនងល្អ រួសរាយ រាក់ទាក់ចំពោះមនុស្សទូទៅ។

៥. គេមានទឹកចិត្តគោរពនិងស្រឡាញ់ចំពោះម្តាយ និងក្រុមគ្រួសាររបស់គេណាស់។

## លំហាត់

ចូរអ្នកសរសេរតែងសេចក្ដីពណ៌នាពីគ្រូរបស់អ្នក។

## សេចក្ដីអធិប្បាយ

អ្នកគ្រូរបស់ខ្ញុំមានឈ្មោះធីតា មានអាយុប្រហែលសាមសិបឆ្នាំ។ សព្វថ្ងៃគាត់រស់នៅភូមិត្នោតជ្រុំ សង្កាត់បឹងទំពុន ខណ្ឌមានជ័យ រាជធានីភ្នំពេញ។

អ្នកគ្រូរបស់ខ្ញុំមានមាឌតូចច្រលឹង កម្ពស់ប្រហែលមួយម៉ែត្រហាសិបប្រាំបី សម្បុរសណ្ដែកបាយ សក់ខ្មៅរលោងប្រះស្មា។ ចំណែកមុខអ្នកគ្រូខ្ញុំមានរាងពងក្រពើ អមទៅដោយច្រមុះស្រួច ភ្នែកខ្មៅរលើប បបូរមាត់ក្រហមព្រឿងៗគួរឱ្យចង់គយគន់។ ដៃជើងរបស់គាត់សក្ដិសម នឹងដងខ្លួន មានម្រាមដៃស្រួចដូចបន្លាក្រូច។ គាត់មានសម្ដីពីរោះណាស់។ អ្នកគ្រូខ្ញុំមិនកាចពេក មិនស្លូតពេក គាត់តែងអប់រំសិស្សជារៀងរាល់ថ្ងៃ។

ខ្ញុំស្រឡាញ់អ្នកគ្រូខ្ញុំណាស់ ព្រោះគាត់ជាអ្នកមានគុណទីពីរដែលបានផ្ដល់ចំណេះដឹងនិងដំបូន្មានល្អៗដល់ខ្ញុំ។

មេរៀនទី
១៩ អំណាន

# រឿងគោ ក្របីគ្មានធ្មេញលើ

## សំណួរ

១. តើខ្លានិយាយជាមួយគោដូចម្ដេច?

២. តើខ្លាសួរកសិកររកអ្វី? តើកសិករឆ្លើយដូចម្ដេច?

៣. ហេតុអ្វីបានជាគោនិងក្របីបាក់ធ្មេញលើអស់?

៤. តើនៅក្នុងរឿងនេះមានតួអង្គណាខ្លះ?

៥. បើសិនជាមានបញ្ហាកើតមានចំពោះមុខ តើអ្នកយកអ្វីមកដោះស្រាយ?

## ចម្លើយ

១. ខ្លានិយាយជាមួយគោថា "ខ្លួនបងគោឯងធំ ហេតុអ្វីក៏ទ្រាំឱ្យមនុស្សទឹមដូច្នេះ"។

២. ខ្លាសួរកសិកររកប្រាជ្ញា។ កសិករឆ្លើយថា"ប្រាជ្ញាទុកនៅផ្ទះ ចាំពូទៅយកឱ្យមើល តែពូសុំចងឯងសិន ព្រោះខ្លាចឯងស៊ីគោខ្ញុំ"។

៣. បានជាគោនិងក្របីបាក់ធ្មេញលើអស់ព្រោះសើច ហើយដួលមាត់បុកត្រូវនឹងថ្ម ពេលឃើញកសិករវាយសំពងខ្លា។

៤. នៅក្នុងរឿងនេះមានតួអង្គខ្លា គោ ក្របី និងកសិករ។

៥. បើសិនជាមានបញ្ហាកើតមានចំពោះមុខ ខ្ញុំនឹងយកប្រាជ្ញាមកដោះស្រាយ។

# ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ "សើច"

សើច ≠ យំ

២. វេវចនសព្ទនឹងពាក្យ "សំពង" គឺ វាយ ។

៣. សទិសសព្ទនឹងពាក្យ "សព្វ"

-សព្វ(គុ. ឬ កិ.វិ) ទាំងពួង, ទាំងអស់, ទាំងមូល, ទាំងស្រុង, ទូទៅ, គ្រប់, រាល់..។ *ឧ. ចេះសព្វមុខវិជ្ជា។*

-សព្វ(កិ.វិ ឬ គុ) ពេញ, គាប់, ស្មោះស្ម័គ្រ, ត្រូវ, ឥតខុស, ឥតទាស់(វ.ស និង ស.ស) *សព្វព្រះទ័យ ។*

-សព(ន) ខ្មោចស្រស់, រូបបុគ្គលស្លាប់។ *ឧ. ធ្វើបុណ្យសព។*

-សប់(កិ) ស្រូបដោយខ្យល់, ទាញរុញដោយដៃស្ទប់រឿយៗឱ្យមានខ្យល់។ *ឧ. សប់កង់។*

៤. ក្នុងចំណោមសត្វទាំងអស់ខាងក្រោម តើសត្វណាខ្លះជាសត្វពាហនៈ?

| |
|---|
| គោ មាន់ ទា ដំរី ឆ្កែ ជ្រូក សេះ ឆ្មា ក្ងាន ក្របី សេក សារិកា ស្វា |

☞សត្វដែលជាសត្វពាហនៈគឺ៖ គោ សេះ ដំរី ក្របី។

**សំណេរ**

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ជីវភាព ឈ្មួញ"

ជីវភាព (ន.) ភាពនៃការរស់នៅ, ការចិញ្ចឹមជីវិត។

ឈ្មួញ (ន.) អ្នកដែលធ្វើជំនួញ, អ្នកជួញ ។

២. បដិសព្ទនឹងពាក្យ "បង្កើន ធូរធារ"

បង្កើន ≠ បន្ថយ

ធូរធារ ≠ ខ្សត់ខ្សោយ

៣. វេវចនសព្ទនឹងពាក្យ "ម្ដាយ" គឺ៖ ម៉ែ ម៉ាក់ មេ មាតា ។

៤. សទិសសព្ទនឹងពាក្យ "ទា"

-ទា (ន) ឈ្មោះសត្វស្លាបស្រុកមួយពួក មានម្រាមជើងជាប់គ្នា ស្រដៀងនឹងប្រវឹកតែមានរូបធំជាងប្រវឹក : *ឧ. សត្វទាកំពុងហែលទឹក ។*

-ទារ (កិ) ស្រដីក្រើនយករបស់ដែលគេជំពាក់, ក្រើន តឿន បន្តឹងយកប្រាក់តាមកំណត់ត្រូវបង់ : *ឧ. ទារលុយ ។*

-ទាល (គុ) ទីទៃពីស្រួច, ដែលមានចុងគ្រមែល។ *ឧ. ចុងកាំបិតទាល, មុខពូថៅទាល ។*

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញកថាខណ្ឌខាងក្រោមឱ្យបានត្រឹមត្រូវ។

ពាហនៈ កម្លាំង ជីវភាព ប្រសើរ ចិញ្ចឹម

សត្វគោ ក្របី សេះជា...*កម្លាំង*...អូសទាញដ៏សំខាន់របស់កសិករ។ ក្រៅពីសត្វ...*ពាហនៈ*...កសិករយើងត្រូវចិញ្ចឹមសត្វផ្សេងៗ ដូចជាជ្រូក មាន់ ទា។ល។ ដើម្បីបង្កើន...*ជីវភាព*...គ្រួសារ។ លើសពីនេះ ការ...*ចិញ្ចឹម*...ត្រី កង្កែប អន្ទង់  សត្វក្រួចជាដើម គឺធ្វើឱ្យជីវភាពគ្រួសារកាន់តែ...*ប្រសើរ*...ឡើង។

**មេរៀនទី**

# អំពីនាម

១៥ វេយ្យាករណ៍

## ចម្លើយលំហាត់

១. ក្នុងចំណោមពាក្យខាងក្រោម តើពាក្យណាខ្លះជានាម?

| |
|---|
| ជីតា ដើរ ខ្មៅ ក្របី សរសេរ សាលារៀន ដើមត្នោត ក្រហម កាតាប ប៊ិក។ |

☞ ពាក្យដែលជានាមគឺ៖ ជីតា ក្របី សាលារៀន ដើមត្នោត កាតាប ប៊ិក។

២. តើពាក្យណាខ្លះត្រូវនឹងរូបភាព? ចូរគូសសញ្ញាព្រួញភ្ជាប់ពាក្យទៅនឹងរូបភាពឱ្យបានត្រឹមត្រូវ ហើយប្រាប់ថាពាក្យនីមួយៗសម្គាល់អ្វី?



ក. ដើមឈើ ខ. វាលស្រែ គ. រមាស ឃ. សៀវភៅ ង. អ្នកគ្រូ

៣. ចូរជ្រើសរើសពាក្យនាមក្នុងប្រអប់ទៅបំពេញចន្លោះល្បះខាងក្រោមឱ្យបានត្រឹមត្រូវ

| សិស្ស ដើមឈើ បណ្ណាល័យ គោក្របី លោកគ្រូ អ្នកគ្រូ |
| --- |

ក. ...*គោក្របី*...ជាសត្វមានសារៈសំខាន់ចំពោះកសិករ។

ខ. យើងជា...*សិស្ស*...ត្រូវស្ដាប់ដំបូន្មានឪពុកម្ដាយ...*លោកគ្រូ អ្នកគ្រូ*..។

គ. ...*ដើមឈើ*...ផ្ដល់សារប្រយោជន៍ច្រើនយ៉ាងណាស់។

ឃ. នៅពេលទំនេរ យើងនាំគ្នាអានសៀវភៅ នៅឯ...*បណ្ណាល័យ*...។

៤. ចូរតែងល្បះនឹងពាក្យជានាម "គោ មាន់ ជ្រូក" ក្នុងមួយពាក្យឱ្យបានមួយល្បះ។

**ចម្លើយ៖**

-*គោ* ជាសត្វមានប្រយោជន៍ក្នុងការភ្ជួររាស់ដី។

-ខ្ញុំចូលចិត្តញ៉ាំសាច់*មាន់* អាំង។

-ពេលទំនេរខ្ញុំជួយដាក់បាយ*ជ្រូក* ជំនួសពុកម៉ែខ្ញុំ។

**មេរៀនទី**

**១៦ ការស្ដាប់**

# អ្នកមានគុណ

## សំណួរ

១. តើកុលបុត្រ កុលធីតាត្រូវធ្វើអ្វីខ្លះចំពោះអ្នកមានគុណ?

២. តើនរណាខ្លះជាអ្នកមានគុណរបស់យើង?

៣. តើអ្នកមានគុណមានបំណងប្រាថ្នាដូចម្ដេចចំពោះយើង?

៤. តើអ្នកគួរធ្វើអ្វីខ្លះដើម្បីក្លាយជាកូនកតញ្ញូ?

## ចម្លើយ

១. កុលបុត្រ កុលធីតាត្រូវចេះគោរពស្រឡាញ់ និងមានចិត្តកតញ្ញូចំពោះអ្នកមានគុណរបស់យើង។

២. អ្នកមានគុណរបស់យើងមានដូចជា ជីដូនជីតា ឪពុកម្ដាយ អាណាព្យាបាល លោកគ្រូ អ្នកគ្រូជាដើម។

៣. អ្នកមានគុណមានបំណងប្រាថ្នាចង់ឱ្យយើងមានសេចក្ដីសុខ និងមានអនាគតល្អ។

៤. ដើម្បីក្លាយជាកូនកតញ្ញូ យើងត្រូវខិតខំសិក្សា គោរពលោក និងជួយចិញ្ចឹមលោកវិញ។

## ចម្លើយលំហាត់

១. ពន្យល់ពាក្យ "វ័យ កតញ្ញូ អាណាព្យាបាល"៖

-វ័យ (ន) អាយុ កំណត់អាយុ។

-កតញ្ញូ (ន) អ្នកដឹងឧបការគុណដែលអ្នកឯទៀតគេបានធ្វើហើយដល់ខ្លួន គឺអ្នកដែលមិនភ្លេច, មិនរមិលគុណគេ។

-អាណាព្យាបាល (ន) អ្នកគ្រប់គ្រងថែរក្សា។

២. បដិសព្ទនឹងពាក្យ "ដឹងគុណ រស់"៖

ដឹងគុណ ≠ រមិលគុល

រស់ ≠ ស្លាប់

៣. វេវចនសព្ទនឹងពាក្យ "កុលបុត្រ កុលធីតា"

- កុលបុត្រ គឺ កូនប្រុស បុត្រា។

- កុលធីតា គឺកូនស្រី បុត្រី។

**សំណេរ**

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "គោរព ពុះពារ"៖

- គោរព (ន) សេចក្ដីលំអុត, លំអុតលំឱន, ឱនលំទោន, ដំណើរប្រតិបត្តិតាម សេចក្ដីកោតក្រែង។ (ប្រើជាកិរិយាសព្ទក៏បាន)

- ពុះពារ (កិ) ព្យាយាម ខិតខំ ប្រឹងប្រែង។

២. បដិសព្ទនឹងពាក្យ "កតញ្ញូ ពុះពារ"

កតញ្ញូ ≠ អកតញ្ញូ

ពុះពារ ≠ រួញរា

៣. វេវចនសព្ទនឹងពាក្យ "ប្រាក់" គឺ៖ លុយ រូបិយបណ្ណ ថវិកា បច្ច័យ។

៤. សទិសសព្ទនឹងពាក្យ "វិញ"

-វិញ(និ) ទៀត, ដូចដែល។ *ឧ. ត្រឡប់វិញ, មកវិញ។*
ជាជាង, ស្រួលជាង, ទេតើ : *ឧ. យកវិញ, ទៅតាមផ្លូវនេះវិញ។*

-វេញ(កិ) ត្រដាញ់បញ្ចូលផ្គង់។ *ឧ. វេញខ្សែគោ។*

ខ. ចូររៀបពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ។

| | | | | |
|---|---|---|---|---|
| ១. | យើង | ឪពុកម្ដាយ។ | ស្រឡាញ់ | គោរព |

☞ យើងគោរពស្រឡាញ់ឪពុកម្ដាយ។

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ២. | លោក | ទាំងពីរ | សព្វថ្ងៃ | ខិតខំ | រកស៊ី | ចិញ្ចឹម | យើង។ | ដើម្បី |

☞ សព្វថ្ងៃលោកទាំងពីរខិតខំរកស៊ីដើម្បីចិញ្ចឹមយើង។

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ៣. | ចំពោះ | លោក | យើង | កតញ្ញូ | ត្រូវ | មាន | ចិត្ត | ជានិច្ច។ |

☞ យើងត្រូវមានចិត្តកតញ្ញូចំពោះលោកជានិច្ច។

គ. ចូរសរសេរបំពេញល្បះតាមគំនិតផ្ទាល់ខ្លួន។

១. ឪពុកម្ដាយជាអ្នក...*មានគុណ*...ចំពោះបុត្រាបុត្រី។

២. លោកទាំងពីរខិតខំ...*ធ្វើការ*...ដើម្បីចិញ្ចឹមកូនចៅ។

៣. អ្នកមានគុណមានដូចជា... *ឪពុកម្ដាយ អាណាព្យាបាល តាយាយ លោកគ្រូអ្នកគ្រូ*...។

## ឃ. ចូរតែងល្បះតម្រូវតាមរូបភាព



១. សិស្សល្អចេះគោរពអ្នកគ្រូ។



២. ពេលទំនេរយើងនាំគ្នាអាន

សៀវភៅ។

**មេរៀនទី**

# អនាម័យ

១៧ អំណាន

## សំណួរ

១. តើកុមារមានទម្លាប់អាក្រក់មានលក្ខណៈយ៉ាងណាខ្លះ?

២. មុនពេលញ៉ាំនំចំណី តើកុមាររូបនោះបានធ្វើដូចម្ដេច?

៣. ដោយសារគ្មានអនាម័យនាំឲ្យកុមាររូបនោះមានសុខភាពដូចម្ដេច?

៤. ហេតុអ្វីបានជាសុខភាពរបស់កុមារនោះល្អឡើងវិញ?

## ចម្លើយ

១. កុមារមានទម្លាប់អាក្រក់ដូចជា មិនសម្អាតខ្លួនប្រាណ មិនសម្អាតសម្លៀកបំពាក់ យកដៃកខ្វក់ទៅជូតនឹងខ្លួនប្រាណ ឬសម្លៀកបំពាក់។

២. មុនពេលញ៉ាំនំចំណី កុមាររូបនោះមិនដែលលាងដៃនឹងសាប៊ូសោះ។

៣. ដោយសារគ្មានអនាម័យ នាំឲ្យកុមាររូបនោះមានជំងឺ មានសុខភាពទ្រុឌទ្រោម និងចុះខ្សោយជាលំដាប់។

៤. បានជាសុខភាពរបស់កុមារនោះល្អឡើងវិញព្រោះកុមារនោះបានភ្ញាក់រឭក និងអនុវត្តតាមក្បួនអនាម័យ ដូចជាលាងដៃនឹងសាប៊ូមុននឹងញ៉ាំចំណី។

## ចម្លើយលំហាត់

២. វេវចនសព្ទនឹងពាក្យ "ដៃ" គឺ៖ ព្រះហស្ត ហត្ថា។

៣. សទិសសព្ទនឹងពាក្យ "វា" គឺ វា វារ វៀរ វាល វៀល។

-វា(បុរិសៈ) គេ. ពាក្យសម្រាប់និយាយជំនួសឈ្មោះមនុស្សក្មេងជាង, មនុស្សថ្នាក់ទាបជាង ឬក៏សត្វតិរច្ឆាន, វត្ថុ...។ *ឧ. កូនក្មេងវាយំ ។*

-វារ(កិ) លូនដោយប្រវារ ។ *ឧ. កូនតូចទើបនឹងចេះវារ ។*

-វារ(កិ) បោះទងចេញ ឬបោះទងតោងជាប់ ។ *ឧ. ល្ពៅវារ ។*

-វៀរ(កិ) លើកលែង, តម, ឈប់ខាន, អត់មិនធ្វើ។ *ឧ. វៀរចាកអំពើទុច្ចរិត ។*

-វាល(ន) ទីដីស្រលះឥតមានព្រៃ, ឥតមានអ្វីបាំង, លំហ។ *ឧ. វាលស្រែ, កណ្ដាលវាល ។*

-វៀល(កិ) ចិតឆ្វៀលជុំវិញដើម្បីយកសាច់ខាងក្រៅ ឬសាច់ខាងក្នុងដែលមូល ។ *ឧ. វៀលសាច់ដូង ។*

៤. បដិសព្ទនឹងពាក្យ "ទ្រុឌទ្រោម"

ទ្រុឌទ្រោម ≠ រឹងមាំ

៥. ចូរស្រង់ពាក្យជា "នាម" ឱ្យបានប្រាំពាក្យពីអត្ថបទខាងលើ។

☞ កុមារ សម្លៀកបំពាក់ សាប៊ូ សុខភាព មិត្តភក្តិ ចំណី ដៃ...។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "សម្អាត ទ្រុឌទ្រោម"

- សម្អាត (កិ.) ធ្វើឲ្យស្អាត, ឲ្យអស់មន្ទិល។

- ទ្រុឌទ្រោម (កិ.) ស្រុត, ស្រុតចុះ, លិចចុះ។

២. បដិសព្ទនឹងពាក្យ "ខ្ជិល ខ្សោយ"

ខ្ជិល ≠ ឧស្សាហ៍

ខ្សោយ ≠ ខ្លាំង

៣. វេវចនសព្ទនឹងពាក្យ "អាហារ" គឺ៖ ចំណី ម្ហូប ភោជន។

៤. សទិសសព្ទនឹងពាក្យ "លាង" គឺ លៀង។

-លាង( កិ) ជម្រះ, សម្អាតដោយវត្ថុរាវមានទឹកជាដើម។ *ឧ. លាងដៃ, លាងជើង, លាងមាត់។*

-លៀង( កិ) ចិញ្ចឹម,ចិញ្ចឹមរក្សា : ។ *លៀងជីវិត,លៀងសត្វ។*

-លៀង( កិ) រៀបឬចំណាយប្រាក់ចាត់ចែងភោជនាហារ ឱ្យភ្ញៀវបរិភោគ : *ស៊ីលៀង, ជប់លៀង។*

ខ. ចូររកពាក្យ និងកន្សោមពាក្យមកបំពេញក្នុងអត្ថបទឱ្យបានត្រឹមត្រូវ។

ខ្ញុំឃើញកុមារម្នាក់ខ្ជិលច្រអូសក្នុងការរៀនសូត្រ ហើយថែមទាំង....*ខ្ជិលសម្អាត*....ខ្លួនប្រាណទៀតផង។ រាល់ពេលញ៉ាំ...*អាហារ*...កុមារនោះមិនបាន...*លាងដៃ*...ទេ។ ក្រោយមកសុខភាពវា

....*ទ្រុឌទ្រោម*....និងចុះខ្សោយជាលំដាប់។ កុមារនោះបាន....*ភ្ញាក់រលឹក*...និងអនុវត្តតាមក្បួនអនាម័យ...*សុខភាព*...វាក៏ល្អឡើងវិញ។

គ. ចូរដាក់ចំណងជើងរូបភាព។



១. អាហារគ្មានអនាម័យ ២. សុខភាពទ្រុឌទ្រោម ៣. សុខភាពល្អ

ឃ. ចូរសរសេរតែងសេចក្ដីពណ៌នាពីមនុស្សដែលប្អូនស្គាល់

## សេចក្ដីអធិប្បាយ

ខ្ញុំមានមិត្តម្នាក់ឈ្មោះតារា ភេទប្រុស អាយុស្របាលនឹងខ្ញុំដែរ។ តារារស់នៅក្នុងទីក្រុងភ្នំពេញ។

តារាមិត្តខ្ញុំមានមាឌតូចល្មម មិនស្គម មិនធាត់ និងមានកម្ពស់ប្រហែលមួយម៉ែត្រពីរតឹក។ តារាមានសម្បុរសណ្ដែកបាយ អមដោយភ្នែកមូលក្រឡង់ ច្រមុះស្រួចដូចកូនកាត់បរទេស ស្លឹកត្រចៀកវែងៗ និងមានសក់ខ្មៅរលោង។ ចំណែកដងខ្លួនរបស់តារាមានរាងសង្ហាណាស់ វាមានដៃជើងស្រលូនសមល្មមទៅនឹងកម្ពស់។ បើនិយាយអំពីអត្តចរិតវិញ តារាមិត្តខ្ញុំជាមនុស្សស្លូតបូត ចេះគោរព

ចាស់ទុំ ចេះនិយាយស្តីគួរសមជាមួយមនុស្សចាស់ និងលោកគ្រូ អ្នកគ្រូ ប៉ុន្តែតារាឆាប់ខឹងបន្តិចនៅពេលមាននរណាម្នាក់និយាយបង្អាប់គេ។

តារាជាមិត្តល្អកម្ររកបានណាស់ គេតែងជួយយកអាសារអ្នកដទៃក្នុងពេលមានទុក្ខលំបាក។ ខ្ញុំពេញចិត្តតារាណាស់ ដែលបានរាប់អានគ្នាជាមិត្តដូច្នេះ។

**មេរៀនទី ១៨ អំណាន**

# កិច្ចការយើងនៅផ្ទះ

## សំណួរ

១. តើនៅក្នុងសាលារៀន កូនបានធ្វើអ្វីខ្លះ?

២. តើនៅផ្ទះ កូនបានធ្វើអ្វីខ្លះ?

៣. តើកូនចូលចិត្តជួយធ្វើកិច្ចការផ្ទះជាមួយឪពុកម្ដាយកូនដែរឬទេ? ព្រោះអ្វី?

## ចម្លើយ

១. នៅក្នុងសាលារៀន កូនខិតខំរៀនសូត្រឱ្យបានពូកែ។

២. នៅផ្ទះ កូនខំរៀនបន្ត ជួយធ្វើកិច្ចការផ្ទះ និងស្ដាប់ដំបូន្មានឪពុកម្ដាយ។

៣. កូនចូលចិត្តជួយធ្វើកិច្ចការផ្ទះជាមួយឪពុកម្ដាយកូន ព្រោះកូនចង់ក្លាយជាកូនល្អនៅក្នុងគ្រួសារ។

## ចម្លើយលំហាត់

១. វេវចនសព្ទនឹងពាក្យ “បុត្រ”គឺ កូន។

២. បដិសព្ទនឹងពាក្យ “ចេះ”

ចេះ ≠ ល្ងង់

៣. ពាក្យចួនពីក្នុងមេសូត្រ ដែលចួននឹងពាក្យដូចខាងក្រោម៖

វគ្គទី១ : សាលា ចួននឹង ....*សិក្សា*........

អក្សរ ចួននឹង .....*ឫក*.......

៤. ស្រង់ពាក្យជានាមពីក្នុងអត្ថបទឱ្យបានប្រាំពាក្យ៖ សាលា ផ្ទះ កិច្ចការ ម៉ាក់ ប៉ា កម្លាំង ដំបូន្មាន អក្សរ...។

៥. គូសសញ្ញា ✓ ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវ ដែលជាអត្ថន័យរបស់មេសូត្រខាងលើ។

☐ នៅផ្ទះកូននាំគ្នាលេងសប្បាយ។

☐ នៅផ្ទះកូនត្រូវជួយធ្វើស្រែចម្ការ។

☐ នៅផ្ទះកូនត្រូវមើលទូរទស្សន៍។

☑ *នៅផ្ទះកូនត្រូវខំរៀនបន្ថែម និងជួយធ្វើកិច្ចការផ្ទះ។*

**សំណេរ**

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "អក្សរ រូតរះ"

អក្សរ (ន.) គំនូសសញ្ញាផ្សេងៗសម្រាប់កត់ត្រាភាសា។

រូតរះ (កិ.) ស្រូតរូត; រវៀសរវៃ, ម៉ឺម្នា។

២. បដិសព្ទនឹងពាក្យ "សរសើរ ល្អ"

សរសើរ ≠ បង្អាប់

ល្អ ≠ អាក្រក់

៣. វេវចនសព្ទនឹងពាក្យ "សិក្សា"គឺ រៀនសូត្រ។

៤. សទិសសព្ទនឹងពាក្យ "គេ"

-គេ( បុ) ពាក្យសម្រាប់និយាយចំពោះអ្នកដទៃដោយមិនចេញឈ្មោះអ្នកណាមួយឡើយ។ *ឧ. ខ្ញុំមិនហ៊ាននិយាយរកគេទេ។*

-គេហ៏(បុ) ពាក្យសម្រាប់ប្តីប្រពន្ធហៅគ្នាទៅវិញទៅមក ដោយស្មោះស្មើ, ជាពាក្យរាបសារបស់ប្រជាជន, មានសេចក្តីថា "អ្នកផ្ទះ"។ *ឧ. គេហ៏អើយបាយឆ្អិនទៅ?*

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងវគ្គនៃមេស្មូត្រ។

| |
|---|
| ប្រើ បវរ ដើរ ជួយ ស្មោះសរ ផ្ទះ ប្រសើរ |

រៀនរួចរួតរះ ជួយធ្វើការ...*ផ្ទះ*... ម៉ាក់ប៉ាលោក...*ប្រើ*...
ជួយតាមកម្លាំង កុំគិតគេច...*ដើរ*... ទើបគេសរសើរ
ថាជាបុត្រល្អ។
កូនល្អចេះ...*ជួយ*... ខិតខំលើកស្ទួយ គ្រួសារ...*បវរ*...
ស្តាប់ដំបូន្មាន ដោយចិត្ត...*ស្មោះសរ*... ពុកម៉ែត្រេកអរ
គ្រួសារសុខសាន្ត។

គ. ចូរតែងល្បះតាមរូបភាពខាងក្រោម។





កុមារី...*<u>កំពុងបោសសំរាម</u>*...។ ...*<u>សិស្សពីរនាក់</u>*...កំពុងរៀន។

ឃ. ចូរតែងល្បះនឹងពាក្យ "គ្រួសារ ប្រសើរ ខិតខំ" ១ពាក្យ ១ល្បះ។

១. ខ្ញុំស្រឡាញ់*<u>គ្រួសារ</u>*ខ្ញុំណាស់។

២. ការចេះជួយធ្វើកិច្ចការផ្ទះគឺជាការ*<u>ប្រសើរ</u>*ណាស់។

៣. យើងជាសិស្សត្រូវ*<u>ខិតខំ</u>* រៀនសូត្រ។

**មេរៀនទី**

**១៩ បំណិន**

# តួអង្គ

## សំណួរ

១. តើតួអង្គក្នុងរឿងនេះមាននរណាខ្លះ?

២. តើលោកចៅហ្វាយប្រាប់ទៅនរណាឱ្យសម្លាប់ជ្រូក?

៣. តើលោកចៅហ្វាយឱ្យអ្នកបម្រើសម្លាប់ជ្រូក យកអ្វីមកជូនគាត់?

៤. ហេតុអ្វីបានជាអ្នកបម្រើយកបេះដូង និងអណ្ដាតជូនចៅហ្វាយដដែលៗ?

## សំណួរ

១. តួអង្គក្នុងរឿងនេះមាន អ្នកបម្រើ និងចៅហ្វាយ។

២. លោកចៅហ្វាយប្រាប់ទៅអ្នកបម្រើឱ្យសម្លាប់ជ្រូក។

៣. លោកចៅហ្វាយឱ្យអ្នកបម្រើសម្លាប់ជ្រូក យកបេះដូង និងអណ្ដាតមកជូនគាត់។

៤. បានជាអ្នកបម្រើយកបេះដូង និងអណ្ដាតជូនចៅហ្វាយដដែលៗ ព្រោះអ្នកបម្រើចង់ឱ្យចៅហ្វាយដឹងថា "ល្អ និងអាក្រក់" គឺមកពីសម្ដី និងចិត្ត គឺអណ្ដាតនិងបេះដូងនេះឯង។

**មេរៀនទី**

២០ អំណាន

# មេរៀនកូនចាំ

## សំណួរ

១. តើអត្ថបទមេសូត្រខាងលើ កូននិយាយពីអ្វីប្រាប់ឪពុកម្ដាយ?

២. តើទិសធំទាំងអស់មានប៉ុន្មាន? មានឈ្មោះអ្វីខ្លះ?

៣. តើទិសតូចទាំងអស់មានប៉ុន្មាន? មានឈ្មោះអ្វីខ្លះ?

## ចម្លើយ

១. អត្ថបទមេសូត្រខាងលើ កូននិយាយប្រាប់ឪពុកម្ដាយអំពីទិស។

២. ទិសធំទាំងអស់មាន៤ គឺ ទិសបូព៌(ខាងកើត) ទិសទក្សិណ(ខាងត្បូង) ទិសបស្ចិម(ខាងលិច) និងទិសឧត្ដរ(ខាងជើង)។

៣. ទិសតូចទាំងអស់មាន៤ គឺ ទិសអាគ្នេយ៍ ទិសនិរតី ទិសពាយ័ព្យ និងទិសឦសាន។

## ចម្លើយលំហាត់

១. បដិសព្ទនឹងពាក្យ "ខុស ធំ មាំមួន"

| | | |
|---|---|---|
| ខុស | ≠ | ត្រូវ |
| ធំ | ≠ | តូច |
| មាំមួន | ≠ | ទន់ខ្សោយ |

២. រកវេវចនសព្ទនឹងពាក្យ "បូព៌ ទក្សិណ បស្ចិម ឧត្ដរ"

-វេវចនសព្ទនឹងពាក្យ "បូព៌" គឺ ខាងកើត។

-វេវចនសព្ទនឹងពាក្យ "ទក្សិណ" គឺ ខាងត្បូង។

-វេវចនសព្ទនឹងពាក្យ "បស្ចិម" គឺ ខាងលិច។

-វេវចនសព្ទនឹងពាក្យ "ឧត្តរ" គឺ ខាងជើង។

៣. រកពាក្យចួនក្នុងវគ្គទី១ និងទី២។

វគ្គទី១៖ ខ្ញុំ ⟷ សុំ

ប្រាប់ ⟷ រាប់

វគ្គទី២៖ ទក្សិណ ⟷ មិន

ក្បូន ⟷ ស្ទូន ⟷ មួន

៤. ស្រង់ពាក្យជានាមនៅក្នុអត្ថបទមេសូត្រខាងលើ៖ ពុក ម៉ែ កូន ទិស ក្បូន បូព៌ ទក្សិណ បស្ចិម ឧត្តរ។...

៥. ចូរគូសសញ្ញា ✓ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវ។

☐ ទិសធំមានចំនួន៣ គឺ ទិសបូព៌ ទក្សិណ និងបស្ចិម។

*☑ ទិសធំមានចំនួន៤ គឺ ទិសបូព៌ ទក្សិណ បស្ចិម និងឧត្តរ។*

☐ ទិសធំមានចំនួន៥ គឺ ទិសបូព៌ ទក្សិណ បស្ចិម ឧត្តរ និង អាគ្នេយ៍។

## សំណេរ

ក. សរសេរតាមអាន

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងវគ្គនៃមេសូត្រខាងក្រោមឱ្យបានត្រឹមត្រូវ។

ម៉ែ កូន ខ្ញុំ រៀន បួន បស្ចិម ប្រាប់ ប្រៀន ទក្សិណ រាប់ ស្ទួន មាំមួន ឧត្តរ ស្តាប់

ម៉ែអើយ..._ស្តាប់ខ្ញុំ_... ពុកអើយកូនសុំ ...ចង្អុលទិស_ប្រាប់_..
តាមដែលកូនរៀន ពុក.._ប្រៀន_ ម៉ែប្រាប់... ..ថាបើនឹង_រាប់_...
ទិសធំមានបួន។

ទិសបូព៌..._ទក្សិណ_... បស្ចិមរាប់មិន មានខុសនឹងក្បួន
ទើបដល់ឧត្តរ ...បន្តមិន_ស្ទួន_... កូនចេះមាំមួន
....ទិសតូច_បួន_ទៀត។...

គ. ចូរតែងល្បះតម្រូវតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ តាមរូបភាពនីមួយៗ។





_ម្តាយកំពុងលាងចាន។_ _កុមារាសរសេរអក្សរ។_
_កូនស្រីបោសសំរាម។_ _កុមារីទន្ទេញមេរៀន។_



# សញ្ញាខណ្ឌ «។»

## ចម្លើយលំហាត់

ក. ចូរដាក់សញ្ញាខណ្ឌ (។)បញ្ចប់ល្បះខាងក្រោមឱ្យបានត្រឹមត្រូវ។

១. យើងត្រូវខិតខំរៀនទាន់ខ្លួននៅក្មេង ។

២. យើងនាំគ្នារៀនលេខ និងអក្សរឱ្យបានពូកែ ។

៣. ការខ្ជិលច្រអូស

៤. កូនល្អស្តាប់ម៉ែ សិស្សពូកែស្តាប់គ្រូ ។

៥. ការឧស្សាហ៍ព្យាយាម

ខ. ចូរអានអត្ថបទខាងក្រោម រួចដាក់សញ្ញាខណ្ឌ (។) នៅខាងក្រោយល្បះនីមួយៗឱ្យបានត្រឹមត្រូវ។

> ផ្ទះខ្ញុំតូច តែស្អាត។ បន្ទប់ដេករបស់ខ្ញុំមានគ្រែតូចមួយ ហើយមានបង្អួចបើកចំហ នាំឱ្យពន្លឺ និងខ្យល់ចេញចូលបានគ្រប់គ្រាន់។ ថ្វីត្បិតផ្ទះខ្ញុំតូច តែវាមានបរិស្ថានល្អ ស្រស់បំព្រង ព្រោះ វាមានរបងព័ទ្ធជុំវិញ មានដំណាំហូបផ្លែ សួនច្បារ និងសួនបន្លែគ្រួសារ។

គ. តែងល្បះដោយប្រើសញ្ញា “។” ឱ្យបានពីរល្បះ។

១. ខ្ញុំរៀនថ្នាក់ទី៣។ ខ្ញុំជាសិស្សពូកែប្រចាំថ្នាក់។

**មេរៀនទី**

២២ ការស្តាប់

# រឿង កុមារចេះសន្សំសំចៃ

## សំណួរ

១. តើអត្ថបទរឿងដែលប្អូនបានស្តាប់នេះមានតួអង្គណាខ្លះ?

២. តើសំណាងនិងសុភីនៅឯណា?

៣. តើសំណាងនិយាយទៅកាន់សុភីដូចម្តេចខ្លះ?

៤. តើសំណាងណែនាំសុភីពីអ្វី?

៥. តើប្អូនចូលចិត្តធ្វើតាមសុភីដែរឬទេ? ព្រោះអ្វី ?

## ចម្លើយ

១. អត្ថបទរឿងដែលខ្ញុំបានស្តាប់នេះមានតួអង្គ សំណាង និងសុភី។

២. សំណាងនិងសុភីនៅអង្គុយនិយាយគ្នាក្រោមម្លប់ឈើ។

៣. សំណាងនិយាយទៅកាន់សុភីថា៖ *"សុភី! ពេលដែលខ្ញុំខ្ចីសៀវភៅមេរៀនឯងមើល ខ្ញុំឃើញមានស្នាមហែក និងគូសវាសលេងផ្តេសផ្តាសទៀតផង"*។

៤. សំណាងណែនាំសុភីឱ្យចេះថែទាំសៀវភៅ និងចេះសន្សំសំចៃសន្លឹកសៀវភៅ។

៥. ខ្ញុំមិនចូលចិត្តធ្វើតាមសុភីទេ ព្រោះជាទង្វើមិនល្អ នាំឱ្យខាតបង់ប្រាក់កាសរបស់ឪពុកម្តាយ។

## ចម្លើយលំហាត់

៣. ចូរគូសសញ្ញា ✓ ក្នុងប្រអប់ចម្លើយមួយដែលជាដំបូន្មានរឿងឱ្យបានត្រឹមត្រូវ។

☐ រឿងនេះអប់រំយើងឱ្យស្រឡាញ់ប្រដាប់ប្រដាសិក្សា។

☐ រឿងនេះអប់រំយើងឱ្យស្រឡាញ់ និងចេះថែទាំសៀវភៅឱ្យបានល្អ។

☑ *រឿងនេះអប់រំយើងឱ្យស្រឡាញ់ និងចេះថែទាំ សម្លៀកបំពាក់។*

☐ រឿងនេះអប់រំយើងឱ្យស្រឡាញ់ និងចេះទុកដាក់ប្រដាប់ប្រដាសិក្សា។

**មេរៀនទី**

២៣ តែងសេចក្តី

# ការពណ៌នាអំពីសត្វ

## សំណួរ

១. តើចម្រើនជាឈ្មោះសត្វអ្វី? ញីឬឈ្មោល ?

២. តើចម្រើនជាសត្វមានរូបរាង សម្បុរដូចម្តេច?

៣. តើប្អូនយល់ថាចម្រើនជាសត្វដូចម្តេច?

៤. តើប្អូនមានអារម្មណ៍ដូចម្តេចចំពោះការចិញ្ចឹមសត្វឆ្មា?

## ចម្លើយ

១. ចម្រើនជាឈ្មោះសត្វឆ្មា។ វាជាឆ្មាឈ្មោល។

២. ចម្រើនជាសត្វមានរូបរាងតូចបន្តិច តែធាត់ ហើយសម្បុរត្រសក់។

៣. ខ្ញុំយល់ថាចម្រើនជាសត្វមានប្រយោជន៍ណាស់។ វាជួយចាប់កណ្តុរនៅក្នុងផ្ទះ។

៤. ខ្ញុំស្រឡាញ់ការចិញ្ចឹមសត្វឆ្មាណាស់ ព្រោះវាមានប្រយោជន៍ចំពោះយើង។

## លំហាត់

ចូរប្អូនពណ៌នាអំពីសត្វចិញ្ចឹមណាមួយដែលប្អូនពេញចិត្ត ដូចជាសត្វឆ្កែ ឆ្មា គោ ក្របី ឬជ្រូក។

## សេចក្តីអធិប្បាយ

នៅផ្ទះខ្ញុំមានចិញ្ចឹមសត្វឆ្កែមួយក្បាល។ ឆ្កែខ្ញុំមានឈ្មោះថា

វាគី។ វាជាឆ្កែឈ្មោល។

អាគីឆ្កែខ្ញុំមានមាឌតូចច្រឡឹង និងមានកម្ពស់ទាបល្មម។ អាគីមានសម្បុរស មានរោមស្រលូនវែងៗគួរឱ្យចង់អង្អែល។ អាគីឆ្កែខ្ញុំមិនកាចទេ វាស្លូតគួរឱ្យស្រឡាញ់ ប៉ុន្តែបើមានអ្នកមិនស្គាល់ចូលផ្ទះវាព្រូសព្ញខ្លាំងៗ។ អាគីឧស្សាហ៍ណាស់ វាជួយយាមផ្ទះ និងចេះជួយពាំយករបស់របរដែលខ្ញុំប្រើវាបានទៀតផង។

អាគីជាឆ្កែមែន តែវាជាមិត្តដ៏ស្មោះត្រង់ម្នាក់របស់ខ្ញុំ។ ខ្ញុំស្រឡាញ់វាដូចជាសមាជិកម្នាក់នៅក្នុងគ្រួសារខ្ញុំដែរ។

**មេរៀនទី** 
២៤ អំណាន

# អ្នកជិតខាងល្អ

## សំណួរ

១. តើអ្នកជិតខាងល្អជាមនុស្សដូចម្តេច?

២. តើអ្វីដែលយើងមិនគួរធ្វើចំពោះអ្នកជិតខាង?

៣. តើអ្វីដែលយើងគួរធ្វើចំពោះអ្នកជិតខាង?

៤. ហេតុអ្វីបានជាត្រូវគោរពអ្នកជិតខាង?

## ចម្លើយ

១. អ្នកជិតខាងល្អជាមនុស្សដែលរស់នៅក្បែរផ្ទះយើងគ្រប់គ្នា គ្រប់ទីកន្លែង។

២. អ្វីដែលយើងមិនគួរធ្វើចំពោះអ្នកជិតខាងគឺ ការបៀតបៀន ការរើសអើង និងការបង្កទំនាស់ផ្សេងៗដល់គ្នា។

៣. អ្វីដែលយើងគួរធ្វើចំពោះអ្នកជិតខាងគឺ ចេះគោរពសិទ្ធិ ចេះស្រឡាញ់រាប់អាន និងចេះជួយទុក្ខធុរៈគ្នាទៅវិញទៅមក។

៤. បានជាត្រូវគោរពអ្នកជិតខាងព្រោះអ្នកជិតខាងជាអ្នកដែលរស់នៅក្នុងសហគមន៍ជាមួយយើង ហើយជាអ្នកដែលផ្តល់សេចក្តីសុខដល់យើងបានគ្រប់ពេលវេលា ជាពិសេសមានតែអ្នកជិតខាងនេះហើយ ដែលអាចជួយយើងបានទាន់ពេលវេលា ក្នុងគ្រាមានអាសន្នផ្សេងៗ។

# ចម្លើយលំហាត់

១. ស្រង់បដិសព្ទនឹងពាក្យ "ទន់ភ្លន់"

ទន់ភ្លន់ ≠ រឹងរូស

២. វេវចនសព្ទនឹងពាក្យ "ទុក្ខ" គឺ៖ លំបាក ព្រួយ គ្រោះ អាសន្ន។

៣. គូសភ្ជាប់ពាក្យជា "នាម" ខាងក្រោមឱ្យបានត្រឹមត្រូវ។




៤. ធ្វើចំណែកក្រុមពាក្យជាចំណីអាហារ និងវត្ថុខាងក្រោម៖ ខ្មៅដៃ នំ សាច់ ផ្ទះ កែវ គុយទាវ ចាន សម្ល កៅអី បាយ ទូ។

| ក្រុមពាក្យជាចំណីអាហារ | ក្រុមពាក្យជាវត្ថុ |
| --- | --- |
| នំ សាច់ គុយទាវ សម្ល បាយ | ខ្មៅដៃ ផ្ទះ កែវ ចាន កៅអី ទូ |

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ជម្លោះ"

- ជម្លោះ (ន) វិវាទ ដំណើរឈ្លោះ។

២. បដិសព្ទនឹងពាក្យ "ថ្លៃថ្នូរ"

ថ្លៃថ្នូរ ≠ ថោកទាប

៣. វេវចនសព្ទនឹងពាក្យ "ជិត" គឺ៖ កៀរ ទៀប ហៀប។

៤. សទិសសព្ទនឹងពាក្យ "រាប"

-រាប(គុ) ដែលមិនរដិបរដុប, ដែលឥតប៉ោង, ឥតផត, ឥតខ្ពស់ទាប។ *ឧ. ដីរាប, ផ្លូវរាប។*

-រៀប(កិ) ធ្វើឱ្យមានរបៀប, ចាត់របៀប។ *ឧ. រៀបផ្ទះ។*

-រៀប(កិ) (ភ្ជាប់ជាមួយ-រាប់) និយាយបូរបាច់តាមរបៀបហូរហែ ឬនិយាយដំណាលតាមរបៀបរឿងរ៉ាវ។ *ឧ. លោកគ្រូរៀបរាប់ពីដំណើររឿងទុំទាវឱ្យសិស្សស្តាប់។*

-រៀប(និ) ទៀប, ហៀប, ជិត, រកកល, ទៀបនឹង, ស្ទើរនឹង។ *ឧ. ខ្ញុំរៀបនឹងនិយាយប្រាប់អ្នកទៅហើយ។*

ខ. ចូររៀបពាក្យក្នុងប្រអប់នីមួយៗខាងក្រោមជាល្បះត្រឹមត្រូវ។

| | | | | | |
|---|---|---|---|---|---|
| ១. | ខ្ញុំ | អ្នកជិតខាង | ណាស់។ | ស្រឡាញ់ | ខ្ញុំគោរព |

☞ *ខ្ញុំគោរពស្រឡាញ់អ្នកជិតខាងខ្ញុំណាស់។*

| | | | | | |
|---|---|---|---|---|---|
| ២. | រាប់អានគ្នា។ | យើងចេះ | យោគយល់ | អធ្យាស្រ័យ | និង |

☞ *យើងចេះយោគយល់ អធ្យាស្រ័យ និងរាប់អានគ្នាណាស់។*

គ. ចូរតែងល្បះតាមរូបភាពនិងពាក្យខាងក្រោមឱ្យបានត្រឹមត្រូវ។





*កុមារី* សំពះ*លោកតា* ។ *កុមារា* ដឹកដៃ *លោកតាឆ្លងផ្លូវ* ។

ឃ. ចូរបំពេញល្បះ និងប្រើសញ្ញា "។" ដើម្បីបញ្ចប់ល្បះ។

១. អ្នកជិតខាងល្អ ត្រូវ...*ចេះ*...គោរពស្រឡាញ់...*រាប់អាន*...គ្នាដោយមិនរើសអើង *។*

២. ពេល...*មាន*...នំ ចំណី ម្ហូបអាហារ យើងតែង...*ចែក*...រំលែកគ្នាហូប *។*

៣. ដូច្នេះ យើងត្រូវចេះរួម...*រស់*...ជាមួយគ្នា...*ក្នុង*...សហគមន៍មួយប្រកប...*ដោយ*...សន្តិភាព *។*

**មេរៀនទី**

២៥ បំណិន

# សទិសសព្ទ

☞សទិសសព្ទគឺជាពាក្យដែលមានន័យផ្សេងគ្នា តែមានសូរអាដូចគ្នា។

## ចម្លើយលំហាត់

១. សទិសសព្ទនឹងពាក្យ "ធំ"

- -ធំ(គុ) ទីទៃពីតូច : *ឧ. ធំធាត់ ។*
- -ធំ(បុរិស) ពាក្យសម្រាប់ក្មួយហៅបងប្រុស ឬបងស្រីរបស់ឪពុក ឬម្ដាយ : *ឧ. ឪពុកធំ, ម្ដាយធំ ។*
- -ធុំ(កិ) ចាប់ក្លិន, ដឹងក្លិនដោយច្រមុះ : *ឧ. ធុំក្លិនក្រអូប ។*

២. សទិសសព្ទនឹងពាក្យ "គរ"

- -គរ(កិ) ធ្វើឱ្យជាគំនរ : *ឧ. គរអុស, គរសំរាម ។*
- -គ(គុ) ឥតសំដី : *ឧ. មនុស្សគ ។*
- -គ(ន) ឈ្មោះឈើជាដំណាំ ផ្លែមានសរសៃជាប៉ុយសំឡីសម្រាប់ច្រកញ្ជាត់ខ្នើយ, កែប, ពូកជាដើម : *ឧ. សំឡីគ ។*

**មេរៀនទី**
**២៦ អំណាន**

# ពិធីបុណ្យដាលាននៅភូមិខ្ញុំ

---

## សំណួរ

១. តើបុណ្យដាលានគេធ្វើនៅឯណា?

២. តើនរណាខ្លះចូលរួមក្នុងពិធីបុណ្យនេះ?

៣. តើគេធ្វើបុណ្យដាលានដើម្បីអ្វី?

## ចម្លើយ

១. បុណ្យដាលានគេធ្វើនៅក្រោមដើមពោធិ៍។

២. អ្នកចូលរួមក្នុងពិធីបុណ្យនេះមាន ប្រជាជនទាំងអស់នៅក្នុងភូមិ រួមទាំងអាចារ្យ និងព្រះសង្ឃផងដែរ។

៣. គេធ្វើបុណ្យដាលានដើម្បីបួងសួងទេវតាសុំសេចក្ដីសុខសាន្ត និង ប្រកបរបរស្រែចម្ការទទួលបានផលច្រើន។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ "សុខ ជួប"

សុខ ≠ ទុក្ខ

ជួប ≠ ព្រាត់

២. រកសទិសសព្ទនឹងពាក្យ "ជុំ"

-ជុំ(កិ ឬ កិ.វិ) មូលគ្នា។ ឧ. ដំណើរវិលវង់ជួបមកកន្លែង ដើមវិញ : *ឧ. ដើរមួយជុំ។*

-ជំ (កិ) ពិគ្រោះ, ស្នើឱ្យដឹងការណ៍, ឱ្យដឹងផ្លូវច្បាប់ : *ឧ. ខ្ញុំបាទទៅជំអំពីការណ៍ហ្នឹងរួចហើយ. ចាំជំញាតិលោកសិន ។*

៤. រកពាក្យចួននឹងពាក្យ "ខ្ញុំ" ក្នុងវគ្គទី១។

ខ្ញុំ |—| ជុំ

រកពាក្យចួននឹងពាក្យ "ដល់" ក្នុងវគ្គទី៣។

ដល់ |—| ផល

៥. គូសសញ្ញា ✓ក្នុងប្រអប់ចម្លើយខាងក្រោមមួយដែលត្រឹមត្រូវ

☐ បុណ្យដារលានធ្វើនៅក្នុងវត្ត។

☐ បុណ្យដារលានធ្វើនៅក្នុងភូមិ។

☑ *បុណ្យដារលានធ្វើនៅក្រោមដើមពោធិ៍។*

សំណេរ

ក. សរសេរតាមអាន

ខ. ចូរជ្រើសរើសពាក្យខាងក្រោមទៅបំពេញក្នុងចន្លោះវគ្គនៃមេសូត្រខាងក្រោមឱ្យបានចួនត្រឹមត្រូវ។

| |
|---|
| អាហារ ញញឹម ពព្រាយ ខ្ញុំ ប្រុសស្រី ទេសនា ស្គាយ ស្រីប្រុស ព្រះសង្ឃ |

បុណ្យដារភូមិ...*ខ្ញុំ*... មឹងពួជួបជុំ សប្បាយរីករាយ

នៅក្រោមដើមពោធិ៍ ...ញញឹម*ពព្រាយ*... ខ្លះរែកទូល...*ស្គាយ*...

នំម្ហូបអាហារ។

មីងពូទាំងអស់ ...ចាស់ទុំ*ស្រីប្រុស*... រួមទាំងអាចារ្យ

រាប់បាតព្រះសង្ឃ បួងសួងទេវតា ...ស្ដាប់លោក*ទេសនា*...

ប្រាថ្នាសុខសាន្ត។

គ. តែងល្បះនឹងពាក្យ ៖ “បុណ្យ ទេសនា”

- ប្រជាជនខ្មែរនិយមធ្វើ *បុណ្យ* ទានណាស់។

- លោកយាយខ្ញុំចូលចិត្តស្ដាប់លោក *ទេសនា* ។

# អំពីគុណនាម

## ចម្លើយលំហាត់

ក. គូសបន្ទាត់ពីក្រោមពាក្យដែលជាគុណនាមក្នុងអត្ថបទខ្លីខាងក្រោម៖

ខ្ញុំមានមិត្តម្នាក់ឈ្មោះ សុជាតិ។ វាមានរាងទាប សម្បុរស សក់ខ្លី មុខមូល ច្រមុះស្រួច ភ្នែកភ្លឺថ្លា។ ចំណែកប្អូនស្រីវាមានសម្បុរខ្មៅស្រអែម មានមាឌតូចល្អិត ចិត្តល្អ ហើយឧស្សាហ៍ព្យាយាម និងមានចរិតស្លូតត្រង់គួរឱ្យស្រឡាញ់រាប់អាន។

ខ. បំពេញចន្លោះក្នុងល្បះខាងក្រោម ដោយប្រើពាក្យជាគុណនាម៖

១. សុធានីជាក្មេង...*ឧស្សាហ៍*...រៀនសូត្រណាស់។

២. បងស្រីខ្ញុំមានចរិត...*ស្លូតបូត*...សុភាពរាបសា ហើយ...*ស្អាត*...រាងវៃក្នុងការងារ។

៣. តាវាមានរាង...*ខ្ពស់*...ស្រឡះ សក់...*ខ្មៅ*... ហើយតែងតែបានពិន្ទុ...*ល្អ*...ជាងគេនៅក្នុងថ្នាក់។

គ. តែងល្បះនឹងគុណនាមខាងក្រោម៖

- ថ្លៃថ្នូរ : បងប្រុសខ្ញុំមានចរិតថ្លៃថ្នូរណាស់។
- ខ្ពស់ : គាត់មានរាងខ្ពស់ស្រឡះ។
- ស្រស់ : គាត់មានទឹកមុខស្រស់ញញឹម។

**មេរៀនទី**

**២៨ អំណាន**

# ល្បែងបោះអង្គញ់

## សំណួរ

១. តើខ្មែរយើងមានល្បែងប្រជាប្រិយអ្វីខ្លះ?

២. តើគេនិយមលេងល្បែងបោះអង្គញ់នៅពេលណា?

៣. តើគេលេងល្បែងបោះអង្គញ់យ៉ាងដូចម្ដេច?

៤. តើអ្នកចូលចិត្តលេងល្បែងបោះអង្គញ់ឬទេ? ព្រោះអ្វី?

## សំណួរ

១. ខ្មែរយើងមានល្បែងប្រជាប្រិយជាច្រើនដូចជា៖ បោះអង្គញ់ ទាញព្រ័ត្រ លាក់កន្សែង ចោលឈូង ចាប់កូនខ្លែង។ល។

២. គេនិយមលេងល្បែងបោះអង្គញ់នៅពេលបុណ្យចូលឆ្នាំខ្មែរ។

៣. ដើម្បីលេងល្បែងបោះអង្គញ់នេះ គេចែកគ្នាជាពីរក្រុម គឺមួយក្រុមជាបុរស និងមួយក្រុមទៀតជាស្ត្រី។ គេប្រើគ្រាប់អង្គញ់សម្រាប់ដាំធ្វើជាកោយ និងសម្រាប់ធ្វើជាគ្រាប់បោះ។ ក្រុមដែលឈ្នះត្រូវយកគ្រាប់អង្គញ់ទៅជោះក្បាលជង្គង់ក្រុមចាញ់។

៤. ខ្ញុំចូលចិត្តលេងល្បែងបោះអង្គញ់ណាស់ ព្រោះវាជាល្បែងប្រជាប្រិយខ្មែរ ដែលដូនតាបានបន្សល់ទុកមកជាយូរហើយ។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ "ឈ្នះ"

ឈ្នះ ≠ចាញ់

២. រកវេវចនសព្ទនឹងពាក្យ “គង់វង្ស” គឺ៖ ស្ថិតស្ថេរ ជាប់លាប់។

៣. រកសទិសសព្ទនឹងពាក្យ “លាក់”

-លាក់(កិ) ធ្វើឱ្យមានគន្លាក់ : *ឧ. លាក់ឈើ ។*

-លាក់(កិ) បិទបាំង, បំបាំង ឬទុកមិនឱ្យគេឃើញ មិនឱ្យគេដឹង ។ *ឧ. លាក់របស់, លាក់ខ្លួន, លាក់ពុត..... ។*

-លក្ខ ឬ លក្ស(ន) កំណត់, ទីសម្គាល់, គ្រឿងចំណាំ, ចន្លោង, គ្រឿងកំណត់, រាប់, ខ្នាត,បុណ្យ, បុណ្យភ័ព្វ, សំណាង ។ សំខ្យា : ចំនួន១សែន ។

-លក្ខណ៍ ឬលក្សណ៍(ន) លក្ខណៈ។ ឧ. មនុស្សខាតលក្ខណ៍ : មនុស្សដែលមានលក្ខណៈអភ័ព្វ មានឫកពាថោកទាប ។ ស្ត្រីគ្រប់លក្ខណ៍ : ស្ត្រីដែលបរិបូណ៌ដោយលក្ខណៈល្អ ។

-ល័ក្ត ឬល័ខ(ន) ជ័រខះ រឹងកើតអំពីសត្វពួកមួយ មានសម្បុរក្រហមសម្រាប់ប្រើការជ្រលក់សូត្រអម្បោះជាដើម ។ *ឧ. ល័ក្តស្រម៉, ល័ក្តដុំកន្លង់... ។*

៤. ស្រង់ពាក្យជាគុណនាមក្នុងអត្ថបទឱ្យបានយ៉ាងតិច៣៖ តិច ច្រើន នេះ មួយ ប្រជាប្រិយ...។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ “ប្រពៃណី”

- ប្រពៃណី (ន.) ទំនៀម; ពូជពង្ស, តំណវង្សត្រកូល។

២. រកបដិសព្ទនឹងពាក្យ "ឈ្នះ"

ឈ្នះ ≠ ចាញ់

២. រកវេវចនសព្ទនឹងពាក្យ "ចាញ់" គឺ៖ បរាជ័យ។

៣. រកសទិសសព្ទនឹងពាក្យ "ដ៏"

-ដ៏(និ) ដែល, ដែលជា, ពាក្យវិសេសនៈ, មានសំឡេងខ្លី កំបុត សម្រាប់និយាយផ្សំនឹងគុណនាម ប្រើរៀងរបៀបត្រង់ខាងដើមគុណនាមដែលគួរប្រកបជាមួយផងបាន : *ឧ. ធម៌ដ៏បវរ, ទ្រព្យដ៏ប្រសើរ។*

-ដ(ន) ទីចម្លង, កំពង់ចម្លង : *ឧ. កំពង់ដ, ទូកដ។*

-ដរ(គុ) ដែលរើឡើងវិញដោយប៉ះទង្គិច : *ឧ. ដំបៅដរ។*

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងអត្ថបទខាងក្រោមឱ្យបានត្រឹមត្រូវ។

| |
|---|
| ក្រុម អង្គុញ់ លេង កំណត់ ខ្មែរ បុរស ល្បែង |

បោះ...*អង្គុញ់*...ជាល្បែងដ៏មានប្រជាប្រិយមួយដែលគេនិយម...*លេង*...នៅក្នុងឱកាសបុណ្យចូលឆ្នាំ...*ខ្មែរ*...។ គេលេង...*ល្បែង*...នេះដោយចែកជាពីរក្រុម គឺមួយក្រុមជា...*បុរស*... និងមួយក្រុមទៀតជាស្ត្រី។ ...*ក្រុម*...ទាំងពីរមានសមាជិកតិច ឬច្រើនមិន...*កំណត់*...ឡើយ។

គ. តែងល្បះដោយប្រើ "នាម" ចំនួនពីរល្បះ និងប្រើគុណនាមចំនួនពីរល្បះ។

១. *ផ្ទះ*ខ្ញុំមាន*សួនច្បារ*មួយ។ (នាម)

២. *កូនឆ្កែ*នេះគួរឱ្យស្រឡាញ់ណាស់។ (នាម)

៣. សុខាជាសិស្ស*ឧស្សាហ៍*។ (គុណនាម)

៤. វាមានស្លឹកត្រចៀក*វែង*។ (គុណនាម)

**មេរៀនទី**

២៩ ការនិយាយ

# ការណែនាំទីកន្លែងទេសចរណ៍ក្នុងភូមិ

## សំណួរ

១. តើកុសលសួរមីងអំពីអ្វី?

២. តើមីងនិយាយទៅកាន់កុសលដូចម្ដេចខ្លះ?

៣. តើរមណីយដ្ឋានភ្នំជើងព្រៃមានទីតាំងនៅឯណា?

៤. ពេលសួររួច តើកុសលនិយាយទៅកាន់មីងដូចម្ដេច?

៥. តើមីងឆ្លើយទៅកុសលដូចម្ដេច?

## ចម្លើយ

១. កុសលសួរមីងអំពីទីតាំងរបស់ភ្នំជើងព្រៃ។

២. មីងនិយាយទៅកាន់កុសលដោយបង្ហាញទិសដៅ និងទីតាំងនៃភ្នំជើងព្រៃ។

៣. រមណីយដ្ឋានភ្នំជើងព្រៃមានទីតាំងនៅខេត្តកំពង់ចាម។

៤. ពេលសួររួច កុសលនិយាយទៅកាន់មីងថា "អរគុណមីង!..."។

៥. មីងឆ្លើយទៅកុសលថា "មិនអីទេក្មួយ!..."។

# ទឹកជំនន់នៅភូមិខ្ញុំ

## សំណួរ

១. តើនៅក្នុងភូមិគេមានរឿងអ្វីកើតឡើង?

២. តើអ្នកភូមិបានធ្វើអ្វីខ្លះ ពេលមានភ្លៀងខ្លាំង?

៣. តើទឹកជំនន់បង្កផលអាក្រក់អ្វីខ្លះដល់ពួកគាត់ និងសហគមន៍?

៤. ហេតុអ្វីបានជាប្រជាជនច្រើនកើតជំងឺរាក?

៥. ក្រោយគ្រោះមហន្តរាយ តើមានអង្គការ ឬសប្បុរសជនណាខ្លះចុះជួយជនរងគ្រោះ?

## ចម្លើយ

១. នៅក្នុងភូមិគេមានភ្លៀងធំធ្លាក់ជាប់គ្នាឥតស្រាកស្រាន្ត។

២. ពេលមានភ្លៀងខ្លាំង អ្នកភូមិបាននាំគ្នាជញ្ជូនកូនចៅ សត្វពាហនៈ គោ ក្របី និងជ្រូក មាន់ ទា ព្រមទាំងសម្ភារៈ ឧបករណ៍ប្រើប្រាស់សំខាន់ៗទៅកាន់ទីទួលសុវត្ថិភាព។

៣. ទឹកជំនន់បង្កផលអាក្រក់ពួកគាត់ និងសហគមន៍យ៉ាងខ្លាំងដូចជាបាត់បង់ជីវិតមនុស្ស សត្វ ខូចខាតទ្រព្យសម្បត្តិ ផ្ទះសម្បែង សាលារៀន មណ្ឌលសុខភាព ស្រូវ ដំណាំ និងស្ពាន ផ្លូវនានា។

៤. បានជាប្រជាជនច្រើនកើតជំងឺរាកព្រោះ ពួកគាត់ប្រើប្រាស់ទឹកមិនស្អាតដែលនាំមកដោយទឹកជំនន់ និងខ្វះអនាម័យ។

៤. ក្រោយគ្រោះមហន្តរាយ មានអង្គការនិងសប្បុរសជនជាច្រើន បានចុះជួយជនរងគ្រោះ ដូចជា គណៈកម្មាធិការជាតិគ្រប់គ្រងគ្រោះមហន្តរាយ កាកបាទក្រហមកម្ពុជា អង្គការមនុស្សធម៌ជាតិ អន្តរជាតិ និងសប្បុរសជនជាច្រើនទៀត។

## ចម្លើយលំហាត់

១. ពន្យល់ពាក្យ "បង្អុរ សត្វពាហនៈ"

- បង្អុរ (កិ.) ធ្លាក់ភ្លៀង។
- សត្វពាហនៈ (ន.) សត្វបម្រើសម្រាប់ជិះ, ទឹម ដូចជា សេះ ដំរី គោ ក្របី ជាដើម។

២. រកបដិសព្ទនឹងពាក្យ "ខ្លាំង ធ្ងន់ធ្ងរ"

ខ្លាំង ≠ ខ្សោយ

ធ្ងន់ធ្ងរ ≠ ធូរស្រាល

៣. រកវេវចនសព្ទនឹងពាក្យ "អាគារសិក្សា" គឺ៖ អាគាររៀនសូត្រ។

៤. រកសទិសសព្ទនឹងពាក្យ "ទុក្ខ"

-ទុក្ខ(ន) សេចក្ដីព្រួយ, សេចក្ដីលំបាក : *ឧ. កើតទុក្ខ ។*

-ទុក(កិ) ដាក់វត្ថុអ្វីក្នុងទីណាមួយដើម្បីឱ្យគង់នៅ ឬរក្សាអ្វីៗឱ្យគង់ : *ឧ. ទុករបស់របរ ។* បម្រុង : *ទុកបាយឱ្យ ។*

## សំណេរ

១. ជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងល្បះឱ្យបានត្រឹមត្រូវ

| |
|---|
| ឧបត្ថម្ភ បង្កគ្រោះមហន្តរាយ ក្នុងភូមិ លិចលង់ ក្រុមសង្គ្រោះ |

១. នៅក្នុងភូមិមួយចំនួនត្រូវ...*លិចលង់*...ស្ទើរតែទាំងអស់។

២. ទឹកជំនន់ថ្ងៃនេះបាន...*បង្កគ្រោះមហន្តរាយ*...ជាច្រើនដល់ប្រជាជន...*ក្នុងភូមិ*...។

៣. ក្រោយគ្រោះមហន្តរាយ មាន...*ក្រុមសង្គ្រោះ*...ចុះជួយ...*ឧបត្ថម្ភ*...ស្បៀងអាហារ ថ្នាំពេទ្យ និងសម្ភារៈប្រើប្រាស់ចាំបាច់នានាដល់ជនរងគ្រោះ។

**មេរៀនទី ៣១ បំណិន**

# ការស្គាល់ហេតុ និងផល

☞ ហេតុគឺជាព្រឹត្តិការណ៍ឬរឿងអ្វីមួយដែលកើតឡើង។

☞ ផលគឺជាលទ្ធផលដែលកើតមានឡើងអាស្រ័យដោយហេតុ។

**ចម្លើយលំហាត់**

ក. ឃ្លាបង្ហាញហេតុ និងឃ្លាបង្ហាញផលក្នុងល្បះខាងក្រោម៖

១. មនុស្សអាចបង្កើតយានអវកាសបាន (ផល) ដោយសារវិទ្យាសាស្ត្ររីកចម្រើន (ហេតុ)។

២. ព្រះអាទិត្យបញ្ចេញរស្មី (ហេតុ) ទើបរុក្ខជាតិរីកលូតលាស់បាន (ផល)។

៣. ស្រូវក្នុងស្រែស្រុកអស់ (ផល) មកពីគ្មានទឹក (ហេតុ)។

ខ. ចូរអានអត្ថបទខាងក្រោម រួចប្រាប់ល្បះដែលបង្ហាញទំនាក់ទំនងហេតុ និងផល។

> ប្រជាជនដែលរស់នៅតាមដងទន្លេច្រើនប្រកបមុខរបរដាំដំណាំនិងនេសាទ។ ពួកគាត់ងាយរងគ្រោះណាស់ នៅពេលមានទឹកជំនន់។ ដោយខ្លាចទឹកជំនន់ ទើបគាត់នាំគ្នាលើកផ្ទះឱ្យខ្ពស់។

ចម្លើយ៖ ល្បះដែលបង្ហាញពីទំនាក់ទំនងហេតុនិងផលគឺ៖“ដោយខ្លាចទឹកជំនន់ ទើបគាត់នាំគ្នាលើកផ្ទះឱ្យខ្ពស់។

**មេរៀនទី**

៣២ អំណាន

# មុខរបរចិញ្ចឹមត្រី

## សំណួរ

១. តើពូសុខ មីងយនមានមុខរបរជាអ្វី?

២. តើពួកគាត់ចិញ្ចឹមត្រីនៅឯណា?

៣. ហេតុអ្វីបានជាត្រីរបស់គាត់ឆាប់ទទួលបានផល?

៤. ហេតុអ្វីបានជាគ្រួសារពូសុខ មីងយនមានជីវភាពធូរធារ?

## ចម្លើយ

១. ពូសុខ មីងយនមានមុខរបរជាអ្នកធ្វើស្រែចម្ការ និងចិញ្ចឹមត្រី។

២. ពួកគាត់ចិញ្ចឹមត្រីនៅឯក្នុងស្រះមួយក្បែរភូមិ។

៣. បានជាត្រីរបស់គាត់ឆាប់ទទួលបានផល ព្រោះគាត់មានបច្ចេកទេសចិញ្ចឹមត្រីបានល្អ ឱ្យចំណីត្រីបានទៀងទាត់ និងថែទាំបរិស្ថានក្បែរស្រះរបស់គាត់បានស្អាតល្អ។

៤. បានជាគ្រួសារពូសុខ មីងយនមានជីវភាពធូរធារ ព្រោះពួកគាត់ជាមនុស្សខ្នះខ្នែងព្យាយាមក្នុងការប្រកបមុខរបរចិញ្ចឹមជីវិត ពោលគឺបានផលមកពីការចិញ្ចឹមត្រីតែម្តង។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ “ទន់”

ទន់ ≠ រឹង

២. រកវេវចនសព្ទនឹងពាក្យ "លាមក" គឺ អាចម៍។

៣. រកសទិសសព្ទនឹងពាក្យ "កើត"

-កើត( កិ) តាំងមានឡើង, ប្រកប។ *ឧ. កើតរោគ, កើតសង្គ្រាម...។*

-កើត(ន) ឈ្មោះទិសខាងព្រះអាទិត្យរះគឺទិសបូព៌ : *ទិសខាងកើត។* ឈ្មោះចំណែកខាងខ្នើត គឺតាំងពីថ្ងៃទី១ទៅដល់ថ្ងៃទី១៥ : *ថ្ងៃ៨កើត។*

៤. ពាក្យទាំងអស់ខាងក្រោមនេះ ពាក្យដែលជានាមគឺ៖

| ក | ខ |
|---|---|
| ពាក្យជានាម → | ត្រី |
| | ចិញ្ចឹម |
| | ស្រះ |
| | ភូមិ |
| | តូច |

៥. ពាក្យទាំងអស់ខាងក្រោមនេះ ពាក្យដែលជាគុណនាមគឺ៖

| ក | ខ |
|---|---|
| | កាប់ |
| ពាក្យជាគុណនាម → | ឧស្សាហ៍ |




៦. ស្រង់ល្បះដែលបង្ហាញទំនាក់ទំនងរវាងហេតុនិងផលពីក្នុងអត្ថបទ៖

- វាល់ព្រឹក និងល្ងាច ពួកគាត់ទាំងពីរតែងតែឱ្យចំណីត្រី (ផល) ព្រោះទឹកនៅវេលានេះត្រជាក់។ (ហេតុ)

៧. អត្ថបទខាងលើនិយាយពី "ការចិញ្ចឹមត្រី ដើម្បីបង្កើនជីវភាពគ្រួសារ"។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ជីវភាព សមរម្យ អាសន្ន"

- ជីវភាព (ន.) ភាពនៃការរស់នៅ, ការចិញ្ចឹមជីវិត។

- សមរម្យ (គុ.) ដែលត្រូវបែបត្រូវយ៉ាង, ដែលមិនទាស់ភ្នែក។

- អាសន្ន (ន.) ហេតុដែលគួរឱ្យខ្លាចនៅជិតបង្កើយ ឬតាម'ប្រ-កិតជិតមក។

២. រកបដិសព្ទនឹងពាក្យ "ស្រទ្បាញ់ ឡើង"

ស្រទ្បាញ់ ≠ ស្អប់

ឡើង ≠ ចុះ

៣. រកវេវចនសព្ទនឹងពាក្យ "អធ្យាស្រ័យ" គឺ៖ អត់ឱន យោគយល់ ប្រណី។

ខ. បំពេញល្បះខាងក្រោម៖

១. ប្រជាជនភូមិខ្ញុំ...*សប្បាយ*...ចិត្តណាស់ ព្រោះគាត់រស់នៅបានសុខសាន្ត។

២. ណាត្រីដឹកត្រីយកទៅ...*លក់*...នៅឯផ្សាររាល់ថ្ងៃ។

៣. កសិករភ្ជួរដាស់ដីនៅដើម...*រដូវ*...វស្សា។

៤. ពូឱរើសពូជត្រីល្អៗយកទៅ...*ចិញ្ចឹម*...ដើម្បីឱ្យបានផលខ្ពស់។

គ. រៀបពាក្យខាងក្រោមឱ្យទៅជាល្បះពេញលេញ៖

| | | | |
|---|---|---|---|
| រាល់ថ្ងៃ | ធ្វើការ។ | ពូសុខ | ខិតខំ |

☞ រាល់ថ្ងៃ ពូសុខខិតខំធ្វើការ។

| | | | | | |
|---|---|---|---|---|---|
| នៅ | ច្រូត | ស្រែ។ | កសិករ | ក្នុង | ស្រូវ |

☞ កសិករច្រូតស្រូវនៅក្នុងស្រែ។

| | | | | | |
|---|---|---|---|---|---|
| ចិញ្ចឹម | គ្រួសារ | ត្រី | ពូសុខ | ស្រះ។ | ក្នុង |

☞ គ្រួសារពូសុខចិញ្ចឹមត្រីក្នុងស្រះ។

ឃ. គូសសញ្ញាព្រួញភ្ជាប់ពីរូបភាពទៅនឹងល្បះខាងក្រោម៖





មីងយនកំពុងលក់ត្រីនៅផ្សារ។ ពូសុខកំពុងឱ្យចំណីត្រី។

**មេរៀនទី**

៣៣ ការនិយាយ

# ការរៀបរាប់ពីសុខភាព និងអាកាសធាតុ

## សំណួរ

១. ហេតុអ្វីបានជាកញ្ញាដឹងថាវិបុលមិនស្រួលខ្លួន?

២. ហេតុអ្វីបានជាមនុស្ស សត្វងាយកើតជំងឺនៅរដូវក្ដៅ?

៣. ដើម្បីថែរក្សាសុខភាព តើកញ្ញានិយាយប្រាប់វិបុលដូចម្ដេច?

៤. តើវិបុលឆ្លើយតបទៅកញ្ញាវិញដូចម្ដេច?

## ចម្លើយ

១. បានជាកញ្ញាដឹងថាវិបុលមិនស្រួលខ្លួន ព្រោះវិបុលមានទឹកមុខមិនស្រស់។

២. បានជាមនុស្ស សត្វងាយកើតជំងឺនៅរដូវក្ដៅ ព្រោះនៅរដូវក្ដៅគ្មានភ្លៀងធ្លាក់ ឯអាកាសធាតុមានការប្រែប្រួល។

៣. ដើម្បីថែរក្សាសុខភាព កញ្ញានិយាយប្រាប់វិបុលឱ្យពាក់ម្ដូក ពាក់ម៉ាស ដើម្បីបង្ការកម្ដៅនិងធូលី។

៤. វិបុលឆ្លើយតបទៅកញ្ញាវិញថា "អរគុណឯងណាស់កញ្ញា!..."។

## ចម្លើយលំហាត់

១. គូសសញ្ញា ✓ ក្នុងប្រអប់ចម្លើយត្រឹមត្រូវ៖

☐ អត្ថបទខាងលើរៀបរាប់អំពីការធ្វើអនាម័យលាងដៃ ដេកក្នុង

មុង។

☑ *<u>អត្ថបទខាងលើរៀបរាប់អំពីសុខភាព និងអាកាសធាតុ។</u>*

☐ អត្ថបទខាងលើរៀបរាប់អំពីការស្លៀកពាក់ និងការសម្អាតខ្លួនប្រាណ។

☐ អត្ថបទខាងលើរៀបរាប់អំពីការហូបនំចំណី និងអនាម័យ។

២. ចូរអ្នករៀបរាប់អំពីសុខភាពផ្ទាល់ខ្លួនប្រាប់គ្នាទៅវិញទៅមកជាមួយដៃគូ។

**មេរៀនទី**
# ការលក់ដូរ
៣៤ អំណាន

## សំណួរ

១. តើម្ដាយសុភីប្រកបរបរអ្វី?

២. តើម្ដាយសុភីលក់អ្វីខ្លះ?

៣. ហេតុអ្វីបានជាគេចូលចិត្តទិញអីវ៉ាន់មីងសឿន?

៤. តើគ្រួសារមីងសឿនមានជីវភាពដូចម្ដេច?

## ចម្លើយ

១. ម្ដាយសុភីប្រកបរបរលក់ដូរនៅផ្សារ។

២. ម្ដាយសុភីលក់បន្លែ ត្រី សាច់ និងគ្រឿងទេស។

៣. បានជាគេចូលចិត្តទិញអីវ៉ាន់មីងសឿន ព្រោះគាត់លក់តម្លៃថោកសមល្មម។

៤. គ្រួសារមីងសឿនមានជីវភាពសមរម្យ។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "អុរ អីវ៉ាន់"

-អុរ (កិ.វិ. ឬ គុ.) ដែលធ្លាក់ភ្លៀងខ្លាំង។ (ន.) មុខមាត់ដែលទើបភ្ញាក់ពីដេកមិនទាន់លុបលាងជម្រះនៅឡើយ។

- អីវ៉ាន់ (ន.) វត្ថុឬរបស់របរផ្សេងៗហៅដោយរួបរួម។

២. រកបដិសព្ទនឹងពាក្យ "កុះករ"

កុះករ ≠ តិចតួច

៣. រកវេវចនសព្ទនឹងពាក្យ "នឿយហត់" គឺៈ លំបាក អស់កម្លាំង ។

៤. រកសទិសសព្ទនឹងពាក្យ "ផ្សារ"

-ផ្សារ (ន) កន្លែងលក់ដូរ : *ឧ. ផ្សារត្រី ។*

-ផ្សារ (កិ) ភ្ជាប់ដោយទឹកអន្សារ : *ឧ. ផ្សារដែក. ផ្សារឆ្នាំង ។*

-ផ្សា (គុ) ឈឺចាប់ពើតរាលឆៀបៗដោយមុខសស្រ្តា របួសដាច់. រលាត់. ប៉ះពាល់ត្រូវ ។ *ឧ. ខ្លោចផ្សា. ឈឺផ្សា... ។*

-ផ្សា (អា.និ) ព្រោះ. ព្រោះហេតុ. ដោយ. ដោយហេតុ. តាមតែតាមតែចង់. ព្រោះតែ ចំណង់ : *ផ្សានឹងបាន* = ចង់តែនឹងបាន ។

ខ. រៀបពាក្យក្នុងប្រអប់ជាល្បះត្រឹមត្រូវៈ

| | | | | | |
|---|---|---|---|---|---|
| ១. | គ្រួសារ | ប្រកបរបរ | ដូរ។ | ខ្ញុំ | លក់ |

☞ <u>គ្រួសារខ្ញុំប្រកបរបរលក់ដូរ។</u>

| | | | | | |
|---|---|---|---|---|---|
| ២. | ស៊ីដន | ផ្សារ | ទិញ | ទៅ | នំបញ្ចុក។ |

☞ <u>ស៊ីដនទៅផ្សារទិញនំបញ្ចុក។</u>

| | | | | | |
|---|---|---|---|---|---|
| ៣. | ខ្ញុំ | ក្រឡាន។ | លក់ | ប្រកបរបរ | អ្នកភូមិ |

☞ អ្នកភូមិខ្ញុំប្រកបរបរលក់ក្រឡាន។

គ. ចូររកពាក្យមកបំពេញល្បះខាងក្រោម រួចដាក់សញ្ញា "។" ដើម្បីបញ្ចប់ល្បះឱ្យបានត្រឹមត្រូវ។

១. សុភីទំនេរ នាងបានឆ្លៀតពេលទៅជួបម្ដាយ...លក់ដូរ...នៅឯផ្សារ។

២. សុភីនិងម្ដាយក្រោកពីនិទ្រាតាំងពី...ព្រលឹមស្រាង...រៀបចំបន្លែ ត្រី សាច់ និង...គ្រឿងទេស...។

៣. នៅក្នុងផ្សារមានមនុស្សច្រើន...កុះករ...ស្លៀកពាក់ស្អាតបាតដើរ ...ទិញ...ម្ហូបអាហារប្រចាំថ្ងៃនិងទិញ...អីវ៉ាន់...ប្រើប្រាស់ផ្សេងៗ។

ឃ. ចូរតែងល្បះតាមរូបភាពខាងក្រោមដោយប្រើពាក្យ "លក់ និងទិញ"



អ្នកមីងទិញផ្លែឈើ។



បងស្រីលក់បន្លែគ្រប់មុខ។

ឃ. ចូរសរសេរតែងសេចក្ដីពណ៌នាអំពីសត្វ "ឆ្កែ"

## សេចក្ដីអធិប្បាយ

នៅផ្ទះខ្ញុំមានចិញ្ចឹមសត្វឆ្កែមួយក្បាល។ ឆ្កែខ្ញុំមានឈ្មោះថា អាគី។ វាជាឆ្កែឈ្មោល។

អាគីឆ្កែខ្ញុំមានមាឌតូចច្រឡឹង និងមានកម្ពស់ទាបល្មម។ អាគីមានសម្បុរស មានរោមស្រលូនវែងៗគួរឱ្យចង់អង្អែល មានស្លឹកត្រចៀកបះឡើងលើ ភ្នែកខ្មៅមូលក្រឡង់ ព្រមទាំងមានកន្ទុយតូចវែងបក់ចុះបក់ឡើង។ អាគីឆ្កែខ្ញុំមិនកាចទេ វាស្លូតគួរឱ្យស្រឡាញ់ ប៉ុន្តែបើមានអ្នកមិនស្គាល់ចូលផ្ទះ វាព្រូសឮខ្លាំងៗ។ អាគីឧស្សាហ៍ណាស់ វាជួយយាមផ្ទះ និងចេះជួយពាំយករបស់របរដែលខ្ញុំប្រើវាបានទៀតផង ជាពិសេសវាចេះខាំសត្វចង្រៃដែលចូលក្នុងផ្ទះ។

អាគីជាឆ្កែមែន តែវាជាមិត្តដ៏ស្មោះត្រង់ម្នាក់របស់ខ្ញុំ។ ខ្ញុំស្រឡាញ់វាដូចជាសមាជិកម្នាក់នៅក្នុងគ្រួសារខ្ញុំដែរ។

**មេរៀនទី** 

# អំពីកិរិយា

៣៥ វេយ្យាករណ៍

☞ កិរិយាជាពាក្យសម្ដែងអំពើ ឬបង្ហាញសកម្មភាព។

**ចម្លើយលំហាត់**

ក. ចូរសរសេរពាក្យជាកិរិយាឱ្យត្រូវនឹងរូបភាពខាងក្រោម។

| លក់ | លោត | ច្រៀង |
|---|---|---|





...លោត... ...ច្រៀង... ...លក់...

ខ. ចូរអានពាក្យខាងក្រោម រួចស្រង់ពាក្យណាខ្លះជាកិរិយា។

| ច្រៀង ទេសភាព រៀន សរសេរ ជិះ មើល ល្អ សើច ថ្មី លេង ក្ដៅ ប្រាសាទ ដេរ |
|---|

☞ ពាក្យជាកិរិយាមាន៖ ច្រៀង រៀន សរសេរ ជិះ មើល សើច លេង ដេរ។

គ. ចូរអានល្បះខាងក្រោម រួចស្រង់ពាក្យជាកិរិយាពីក្នុងល្បះ។

១. កុមារទៅសាលារៀន។ (កិ. ☞ ទៅ)

២. គ្រួសារចិត្រាអង្គុយនៅមាត់សមុទ្រ។ (កិ. ☞ អង្គុយ)

៣. គេសង់អាគារខ្ពស់ៗក្នុងទីក្រុង។ (កិ. ៧ សង់)

៤. ទេសចរទិញវត្ថុអនុស្សាវរីយ៍។ (កិ. ៧ ទិញ)

ឃ. ចូរយកកិរិយា "ធ្លាក់ ថត ឈរ" ទៅបំពេញក្នុងល្បះខាងក្រោម

១. គេ..._ថត_...រូបប្រាសាទអង្គរវត្ត។

២. ទឹកជ្រោះ..._ធ្លាក់_...ពីលើថ្ម។

៣. គោថ្ម..._ឈរ_...យ៉ាងសង្ហា។

ង. ចូរតែងល្បះដោយប្រើកិរិយា "រៀន អង្គុយ ប្រឹងប្រែង" ក្នុងពាក្យឱ្យបានមួយល្បះ។

១. ប្អូនខ្ញុំកំពុងរៀន។

២. ម៉ែខ្ញុំអង្គុយនៅលើវាលស្មៅ។

៣. ពុកខ្ញុំប្រឹងប្រែងធ្វើការណាស់។

**មេរៀនទី ៣៦ អំណាន**

# ការហាត់ប្រាណ

## សំណួរ

១. តើនរណាខ្លះដែលដាស់បូណាទៅហាត់ប្រាណ?
២. ពេលក្រោកពីដេក តើបូណានិយាយដូចម្ដេចខ្លះទៅកាន់អ្នកទាំងបី?
៣. តើនរណាខ្លះទៅហាត់ប្រាណជាមួយបូណា?
៤. ហេតុអ្វីបានជាពួកគេទៅហាត់ប្រាណ?

## ចម្លើយ

១. អ្នកដែលដាស់បូណាទៅហាត់ប្រាណគឺ មាន់ ចាប និងព្រះ-អាទិត្យ។
២. ពេលក្រោកពីដេក បូណានិយាយទៅកាន់អ្នកទាំងបីថា "អូ! សួស្ដីបងមាន់ បងចាប បងព្រះអាទិត្យ បងៗចាំខ្ញុំយូរហើយឬ? ថ្ងៃនេះខ្ញុំគេងជ្រុលបន្តិច ព្រោះយប់មិញចូលគេងម៉ោងដប់ ដោយរវល់បង្ហើយកិច្ចការផ្ទះសម្រាប់ត្រៀមប្រឡងឆមាស។ អរគុណបងៗ តោះយើង! ទៅហាត់ប្រាណ"។
៣. អ្នកដែលទៅហាត់ប្រាណជាមួយបូណាមាន មាន់ ចាប និងព្រះអាទិត្យ។
៤. បានជាពួកគេទៅហាត់ប្រាណ ព្រោះការហាត់ប្រាណនាំឱ្យមាន

សុខភាពល្អ។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ "ភ្លឺ"

ភ្លឺ ≠ ងងឹត

២. រកវេវចនសព្ទនឹងពាក្យ "គេង"៖ សិង ផ្ទំ ដេក សម្រាន្ត និទ្រា។

៣. រកសទិសសព្ទនឹងពាក្យ "ពី"

-ពី(និ. អា.និ) ខាង, អំពី, ឯ : *ឧ. ពីនេះ ពីនោះ។ មកពីណា?*

-ពីរ(ប.សំ) ចំនួន២ : *ឧ. ខ្ញុំមានផ្លែក្រូចពីរ។*

៤. ស្រង់ពាក្យ "កិរិយា" ដែលមានក្នុងអត្ថបទ៖ គេង ឮ រងាវ ក្រោក ស្រែក ដាស់ ភ្ញាក់ សម្ងំ ជួយ ទៅ ហាត់ ស្ទុះ ពោល ចាំ ចូល បង្ហើយ ប្រឡង.បណ្តើរ បញ្ចេញ បង្ការ មាន...។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ឧស្សាហ៍"

- ឧស្សាហ៍ (ន.) សេចក្ដីឱហាត, សេចក្ដីខ្នះខ្នែងឬសង្វាត, ការខំប្រឹងមិនខ្ជិល, មិនច្រអូស។ (កិ.) ឱហាត, សង្វាត, ខំប្រឹង។

២. រកបដិសព្ទនឹងពាក្យ "ឈឺ ឧស្សាហ៍"

ឈឺ ≠ ជា

ឧស្សាហ៍ ≠ ខ្ជិល

៣.រកវេវចនសព្ទនឹងពាក្យ "ព្រឹក" គឺ៖ព្រលឹម អរុណ ព្រហាម។

៤.រកសទិសសព្ទនឹងពាក្យ "រៀប"

-រៀប(កិ) ធ្វើឱ្យមានរបៀប, ចាត់របៀប : *ឧ. រៀបផ្ទះ, រៀបចំខ្លួន។*

-រៀប(កិ) (ភ្ជាប់ជាមួយ-រាប់) : និយាយបូរបាច់តាមរបៀបហូរហែ ឬនិយាយដំណាលតាមរបៀបរឿងរ៉ាវ។ *ឧ. លោកគ្រូរៀបរាប់ពីដំណើររឿងទន្សាយចង់ស៊ីចេកឱ្យសិស្សស្ដាប់។*

-រាប(គុ) ដែលមិនរដិបរដុប, ដែលឥតប៉ោង, ឥតផត, ឥតខ្ពស់ទាប។ *ឧ. ដីរាប, ផ្លូវរាប។*

ខ. ចូរជ្រើសរើសពាក្យជាកិរិយាសព្ទក្នុងប្រអប់ទៅបំពេញក្នុងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ។

| ចូលចិត្ត ព្រឹក ប្រាណ ហាត់ ធ្វើឱ្យ ទៅ ក្រោក ឱ្យ |
|---|

១. រាល់ព្រឹកមុន...*ទៅ*...សាលា ខ្ញុំ...*ក្រោក*...ពីព្រលឹម ដើម្បី...*ហាត់*...ប្រាណ។

២. ការហាត់ប្រាណ...*ធ្វើឱ្យ*...យើងមានសុខភាពល្អ។

៣. ខ្ញុំ...*ចូលចិត្ត*...ហាត់ប្រាណណាស់ ព្រោះវាជាទម្លាប់ល្អ និងជួយ...*ឱ្យ*...យើងមានសុខភាពល្អ មាំមួន ប្រាជ្ញាឈ្លាសវៃ។

គ. គូសភ្ជាប់រូបភាពនឹងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ។



ពួកគេកំពុងបោសសម្អាតទីធ្លាមុខផ្ទះ ដើម្បីបរិស្ថាន។





ពួកគេកំពុងនាំគ្នាហាត់ប្រាណ ដើម្បីសុខភាព។

មេរៀនទី
៣៧ អំណាន

# យើងទៅមណ្ឌលសុខភាព

## សំណួរ

១. តើគ្រូបានផ្ដាំប្អូនឱ្យចងចាំអ្វីខ្លះ?

២. តើប្អូនស្គាល់ជំងឺអ្វីខ្លះ នៅក្នុងស្រុកយើង?

៣. ប្រសិនជាប្អូនមានជំងឺ តើត្រូវទៅព្យាបាលនៅកន្លែងណា?

៤. តើប្អូនត្រូវធ្វើអ្វីខ្លះ ដើម្បីបង្ការជំងឺឆ្លង។

## ចម្លើយ

១. គ្រូបានផ្ដាំខ្ញុំឱ្យចងចាំអំពីការរស់នៅប្រកបដោយអនាម័យ ដើម្បីកុំឱ្យមានជំងឺ។

២. ខ្ញុំស្គាល់ជំងឺដូចជា កញ្ជ្រិល គ្រុនក្ដៅ រាក ផ្ដាសាយ...។

៣. ប្រសិនជាខ្ញុំមានជំងឺ ខ្ញុំត្រូវទៅព្យាបាលនៅមណ្ឌលសុខភាព។

៤. ដើម្បីបង្ការជំងឺឆ្លង ខ្ញុំត្រូវមានអនាម័យជាប្រចាំ គឺហូបស្អាត ផឹកស្អាត និងរស់នៅស្អាត។

## ចម្លើយលំហាត់

១. ឱ្យសិស្សហាត់ច្រៀង

២. រកបដិសព្ទនឹងពាក្យ "រហ័ស"

រហ័ស ≠ យឺត

៣. រកវេវចនសព្ទនឹងពាក្យ "រូតរះ" គឺ ម៉ឺម៉ា ប្រញាប់ រវៀសរវៃ

ស្រូតរូត រួសរាន់ ឃ្មាតខ្មី រហ័សរហួន។

៤. រកសទិសសព្ទនឹងពាក្យ “ សព្វ”

-សព្វ( គុ.ឬកិ.វិ) ទាំងពួង, ទាំងអស់, ទាំងមូល, ទាំងស្រុងទូទៅ, គ្រប់, រាល់..: *ឧ. ចេះសព្វមុខវិជ្ជា។*

-សព្វ( កិ.វិ ឬគុ) ពេញ, គាប់, ស្មោះស្ម័គ្រ, ត្រូវ, ឥតខុស ឥតទាស់( រ.ស និង ស.ស) *សព្វព្រះទ័យ ។*

-សប់( កិ) ស្រូបដោយខ្យល់, ទាញរុញដោយដៃស្ទប់រឿយ ឱ្យមានខ្យល់ : *ឧ. សប់កង់។*

-សព( ន) ខ្មោចស្រស់, រូបបុគ្គលស្លាប់ : *ធ្វើបុណ្យសព។*

-សប្តិ( ន) យល់សុបិនឃើញអ្វីមួយនៅពេលដេកលក់, ( យព សប្តិ) ។

៥. គូសសញ្ញា “✓” ក្នុងប្រអប់ចម្លើយដែលត្រូវនឹងអត្ថន័យនៃប ចម្រៀងខាងលើ។

☐ ពេលមានបញ្ហាសុខភាពយើងត្រូវទៅលំហែកាយ។

☐ ពេលមានបញ្ហាសុខភាពយើងត្រូវទៅផ្ទះលក់ថ្នាំពេទ្យ។

☑ *ពេលមានបញ្ហាសុខភាពយើងត្រូវទៅមណ្ឌលសុខភាព។*

## **សំណេរ**

ក. សរសេរតាមអាន

### **ចម្លើយលំហាត់**

១. ពន្យល់ពាក្យ “ចម្លង”

- ចម្លង (កិ.) ធ្វើឲ្យឆ្លង, នាំពីត្រើយម្ខាងទៅត្រើយម្ខាង, ផ្ទេរពីទីមួយទៅទីមួយ, កត់ ឬសរសេរពីច្បាប់មួយទៅដាក់ក្នុងច្បាប់មួយទៀត។

២. រកបដិសព្ទនឹងពាក្យ "ជា"

ជា ≠ ឈឺ

៣. វេវចនសព្ទនឹងពាក្យ "កូន" គឺ៖ បុត្រ។

៤. សទិសសព្ទនឹងពាក្យ "សះ"

-សះ(កិ) ជាពីរោគ : *សះស្បើយ, ដំបៅសះ* ។

-សាសន៍(ន) សាសន, សាសនា : *សាសន៍ព្រះពុទ្ធ ឬ ពុទ្ធសាសន៍, ចូលសាសន៍......* ។

-សាស្ត្រ(ន) គម្ពីរ, គម្ពីរប្រាប់វិទ្យា, គម្ពីរសាសនា, ច្បាប់ប្រដៅក្បួន,តម្រា, វិជ្ជា, ការសិក្សា, ពាក្យណែនាំ, ពាក្យពន្យល់, ពាក្យបង្គាប់។ ប្រើរៀងភ្ជាប់ពីខាងចុងសព្ទដទៃ : *ប្រវត្តិសាស្ត្រ, គណិតសាស្ត្រ.......* ។

- សស្ត្រ (ន) គ្រឿងប្រដាប់ធ្វើដោយដែកមានមុខមុត មាន កាំបិត, ផ្គាក់, ដាវ, លំពែង ជាដើម ។

ខ. ចូររកពាក្យទៅបំពេញចន្លោះខាងក្រោម។

| | | |
|---|---|---|
| គ្រូសូម...*ផ្ដែ*...ផ្ដាំ | កូនត្រូវចងចាំ | ឱ្យបាន...*ច្បាស់*...ថា |
| ទាំងការរស់នៅ | ទាំងការញ៉ាំ...*អាហារ*... | ត្រូវចេះរក្សា |
| ធ្វើអនាម័យ | ត្រូវចេះ...*រក្សា*... | ធ្វើអនាម័យ។ |

គ. ចូរតែងល្បះតាមរូបភាពខាងក្រោម។



១. ពុកម៉ែនាំកូនទៅមណ្ឌលសុខ-ភាព។



២. អ្នកគ្រូពេទ្យកំពុងព្យាបាលជំងឺ។

**មេរៀនទី ៣៨ តែងសេចក្តី**

# ពណ៌នាអំពីព្រឹត្តិការណ៍

## សំណួរ

១. តើព្រឹត្តិការណ៍នេះកើតឡើងនៅពេលណា? កន្លែងណា?

២. តើគ្រោះថ្នាក់ចរាចរណ៍នេះបង្កឡើងដោយសារអ្វី?

៣. ក្រោយពេលកើតហេតុ តើមានអ្វីកើតឡើង?

៤. ដើម្បីចៀសវាងគ្រោះថ្នាក់ចរាចរណ៍ តើប្អូនត្រូវធ្វើដូចម្តេច?

## ចម្លើយ

១. ព្រឹត្តិការណ៍នេះកើតឡើងកាលពីថ្ងៃអាទិត្យមុន នៅត្រង់ចំណុចផ្លូវកោងក្បែរសាលារៀនមួយ។

២. គ្រោះថ្នាក់ចរាចរណ៍នេះបង្កឡើងដោយសារអ្នកបើកបរបើកក្នុងល្បឿនលឿន នៅពេលមានភ្លៀងធ្លាក់។

៣. ក្រោយពេលកើតហេតុ គេឃើញម៉ូតូខូចខាតទាំងស្រុង រីឯអ្នកបើកបរវិញមានឈាមហូរពេញខ្លួន ដោយរងរបួសធ្ងន់ដេកសន្លប់ស្តូកស្តឹង។

៤. ដើម្បីចៀសវាងគ្រោះថ្នាក់ចរាចរណ៍ ខ្ញុំត្រូវធ្វើដំណើរដោយការប្រុងប្រយ័ត្នជានិច្ច និងត្រូវគោរពច្បាប់ចរាចរណ៍។

## លំហាត់

ចូរសរសេរតែងសេចក្តីពណ៌នាអំពីគ្រោះថ្នាក់ចរាចរណ៍មួយ

រវាង “រថយន្ត និងម៉ូតូ” ។

## សេចក្តីអធិប្បាយ

ថ្ងៃមួយ នៅពេលខ្ញុំកំពុងធ្វើដំណើរតាមផ្លូវ ខ្ញុំបានឃើញគ្រោះថ្នាក់ចរាចរណ៍មួយកើតឡើងរវាងរថយន្តដឹកទំនិញនិងម៉ូតូនៅត្រង់ផ្លូវបំបែកមួយកន្លែង។

មុនពេលកើតហេតុ គេឃើញរថយន្តនិងម៉ូតូនេះបើកបរក្នុងទិសដៅស្របគ្នា។ លុះមកដល់ត្រង់ផ្លូវបំបែក ស្រាប់តែរថយន្តបានវ៉ាម៉ូតូ ហើយបត់ចូលទៅផ្លូវមួយទៀត បណ្តាលឱ្យប៉ះម៉ូតូដែលកំពុងបើកបរក្នុងល្បឿនលឿនដែរនោះ រេចង្កូតដួលក្រោមកង់រថ-យន្ត។ ក្រោយពេលកើតហេតុ គេឃើញម៉ូតូខូចខាតទាំងស្រុងរីឯអ្នកបើកម៉ូតូ ត្រូវខ្ទាតបីបួនត្រឡប់ធ្លាក់ចិញ្ចើមផ្លូវសន្លប់បាត់ស្មារតី។ មួយសន្ទុះក្រោយមក ក៏មានប៉ូលិសមកជួយធ្វើអន្តរាគមន៍យកអ្នករងគ្រោះទៅមន្ទីរពេទ្យ និងឃាត់រថយន្តដើម្បីដោះស្រាយតាមផ្លូវច្បាប់។

ខ្ញុំមានអារម្មណ៍សោកស្តាយ និងអាណិតអាសូរដល់ជនរងគ្រោះណាស់ដែលបានជួបគ្រោះថ្នាក់ដូច្នេះ។

**មេរៀនទី**

**៣៩ អំណាន**

# ទោសនៃគ្រឿងញៀន

## សំណួរ

១. តើសុភក្ត្រឃើញសកម្មភាពអ្វី ពេលគេត្រឡប់ពីសាលារៀនវិញ?

២. តើម្ដាយសុភក្ត្រនិយាយពន្យល់កូនដូចម្ដេចខ្លះ?

៣. តើម្ដាយសុភក្ត្របានទូន្មានសុភក្ត្រដូចម្ដេចខ្លះ?

៤. តើសុភក្ត្រប្ដេជ្ញាចិត្តដូចម្ដេចខ្លះ? ហេតុអ្វី?

## ចម្លើយ

១. ពេលគេត្រឡប់ពីសាលារៀនវិញ សុភក្ត្រឃើញនគរបាលកំពុងនាំខ្លួនបុរសម្នាក់ចូលក្នុងសាលាឃុំ។

២. ម្ដាយសុភក្ត្រនិយាយពន្យល់កូនអំពីផលវិបាកនៃការជក់គ្រឿងញៀន ដែលនាំឱ្យប៉ះពាល់ដល់សុខភាព និងជាពិសេសគឺត្រូវខាតបង់ទ្រព្យសម្បត្តិថែមទៀតផង។

៣. ម្ដាយសុភក្ត្របានទូន្មានសុភក្ត្រឱ្យឃ្លាតឆ្ងាយពីគ្រឿងញៀន គឺមិនត្រូវចង់ដឹង ចង់សាកគ្រឿងញៀនទេ។

៤. សុភក្ត្រប្ដេជ្ញាចិត្តថាខិតខំរៀនសូត្រ និងចៀសឱ្យផុតពីគ្រឿងញៀន។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ “ខិតខំ ស្គមស្គាំង”៖

ខិតខំ ≠ ខ្ជិល

ស្គមស្គាំង ≠ ធាត់ទ្រលុក

២. រកវេវចនសព្ទនឹងពាក្យ "អន្តរាយ" គឺ៖ វិនាស ហិនហោច ខ្ទេចខ្ទី ខូចខាត។

៣. រកសទិសសព្ទនឹងពាក្យ "រាង"

-រាង(កិ ឬ គុ) ចាល, រអា, លែងចង់, លែងត្រូវការទៀត។ *ឧ. ផ្លូវនោះពិបាកណាស់ ខ្ញុំរាងហើយ មិនទៅទៀតទេ។*

-រាង(ន) សណ្ឋាន, ទ្រង់ទ្រាយ : *ឧ. រាងក្រអាញ, រាងស្តើង...។*

-រាង(ន) ផ្ទាំងរនាបឫស្សីពាសស្រទបចេកដាក់លើគែមទូកម្ខាង បន្ទេរឱ្យផ្អៀងមកខាងក្នុងទូកបែកខាងក្រោមឱ្យរះនឹងទឹក ដើម្បីចែវឬអុំទូកទៅឱ្យត្រីក័ន្តស្លន់លោតចូលក្នុងទូក, គេធ្វើតែក្នុងវេលាមានយប់ខែភ្លឺហៅថា *ដេញរាង* ។

-រៀង(កិ ឬ កិ.វិ) +ដាក់តាមលំដាប់, ធ្វើឱ្យត្រូវលំដាប់, ឱ្យត្រូវជួរ, ឱ្យត្រូវរបៀប : *ឧ. រៀងលេខ, ដាក់រៀងគ្នា។*

+ដែលមានតៗគ្នាតាមលំដាប់, *ឧ. ដរាបរៀងតាមផ្លូវ, តែងមានរៀងមក។*

+រាល់, សព្វ, គ្រប់ : *ឧ. រៀងខ្លួន, រៀងរាល់ថ្ងៃ។*

៤. ស្រង់ពាក្យជាកិរិយានៅក្នុងអត្ថបទឱ្យបានពពាក្យ៖ ត្រឡប់ ឮ ឃើញ និយាយ ប្រើប្រាស់ ពន្យល់...។

**សំណេរ**

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ហិង្សា ចោរកម្ម អន្តរាយ"

- ហិង្សា (ន) ការបៀតបៀន, ការពាធា, ការធ្វើអាក្រក់រកគ្នា, ការធ្វើទុក្ខគ្នា។

- ចោរកម្ម (ន) អំពើររបស់ចោរ, អំពើលួចប្លន់។

- អន្តរាយ (ន) ដំណើរខូចប្រយោជន៍, ការខូចបង់សៀត, សេចក្ដីវិនាស។

២. រកបដិសព្ទនឹងពាក្យ "បាត់បង់ ឆ្ងាយ"

| | | |
|---|---|---|
| បាត់បង់ | ≠ | គង់វង្ស |
| ឆ្ងាយ | ≠ | ជិត |

៣. រកវេវចនសព្ទនឹងពាក្យ "សាក" គឺៈ ល្បង លមើល ភ្លក់។

៤. រកសទិសសព្ទនឹងពាក្យ "វា"

-វា( បុរិសៈ) គេ, ពាក្យសម្រាប់និយាយជំនួសឈ្មោះមនុស្សក្មេងជាង, មនុស្សថ្នាក់ទាបជាង ឬក៏សត្វតិរច្ឆាន, វត្ថុ...។ *ឧ. កូនក្មេងវាយំ ។*

-វារ( កិ) លូនដោយប្រវារ ។ *ឧ. កូនតូចទើបនឹងចេះវារ ។*

-វារ( កិ) បោះទងចេញ ឬបោះទងតោងជាប់ ។ *ឧ. ល្ពៅវារ ។*

-វៀរ( កិ) លើកលែង, តម, ឈប់ខាន, អត់មិនធ្វើ : *ឧ. វៀរចាកអំពើទុច្ចរិត ។*

-វាល(ន) ទីដីស្រលះឥតមានព្រៃ, ឥតមានអ្វីបាំង លំហ : *ឧ. វាលស្រែ, កណ្ដាលវាល ។*

-វៀល(កិ) ចិតឆ្មៀលជុំវិញដើម្បីយកសាច់ខាងក្រៅ ឬសាច់ខាងក្នុងដែលមូល : *ឧ. វៀលសាច់ដូង ។*

ខ. ជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញចន្លោះ

| | | | |
|---|---|---|---|
| ឈប់ | គ្រឿងញៀន | នៅ | សាក |

១. អ្នកប្រើប្រាស់...*គ្រឿងញៀន*...ធ្វើឱ្យបាត់បង់ការចងចាំ។

២. សុភក្រ្ត...*ឈប់*...ដើរលេងទៀតហើយ។

៣. កូនមិនត្រូវចង់ដឹង ឬចង់...*សាក*...គ្រឿងញៀននោះទេ។

៤. កូននិងមិត្តភក្តិត្រូវ...*នៅ*...ឱ្យឆ្ងាយពីវា។

គ. សរសេរបំពេញល្បះប្រាប់ហេតុនិងផលខាងក្រោម

១. សុផលខូចសុខភាព...*ព្រោះ*...វាប្រើប្រាស់គ្រឿងញៀន។

២. កសិករគ្មានទឹកធ្វើស្រែ...*ព្រោះ*...គ្មានភ្លៀងធ្លាក់។

៣. ទឹកជំនន់ជន់លិចភូមិអស់...*ទើប*...ប្រជាជនខ្វះទីជម្រក និងស្បៀងអាហារ។

**មេរៀនទី**

៩០ ការនិយាយ

# រៀបរាប់ពីសមាជិកគ្រួសារ និងមុខរបរ

## សំណួរ

១. តើសមាជិកគ្រួសារចិន្តាធ្វើការងារអ្វីខ្លះ?

២. តើសមាជិកគ្រួសារណារិនប្រកបមុខរបរអ្វីខ្លះ?

៣. ចំពោះគ្រួសារប្អូនវិញ តើប្រកបមុខរបរអ្វីខ្លះ?

## ចម្លើយ

១. សមាជិកគ្រួសារចិន្តាធ្វើការងារផ្សេងៗគ្នា ដូចជា ម្ដាយចិន្តាជាអ្នកលក់ដូរ ឪពុកជាយោធា ចំណែកជីដូនជីតានៅផ្ទះជួយមើលថែទាំចៅៗ។

២. សមាជិកគ្រួសារណារិនប្រកបមុខរបរដូចជា ម្ដាយជាគ្រូពេទ្យ ឪពុកជាកសិករ និងលោកយាយជាអ្នកត្បាញហូលផាមួង។

៣. (ចម្លើយស្រេចលើសិស្ស)

**មេរៀនទី ៤១ អំណាន**

# ឥទ្ធិពលនៃគ្រឿងស្រវឹង

## សំណួរ

១. តើអ្នកផឹកស្រាច្រើនប្រើសម្ដីដូចម្ដេច?

២. បើផឹកស្រាដល់កំណត់ តើគាត់យកអ្វីទៅបញ្ចាំ?

៣. បើគ្មានស្រែទៅបញ្ចាំ តើគាត់យកអ្វីទៅបញ្ចាំទៀត?

៤. តើអ្នកផឹកស្រាតែងជួបនឹងផលអាក្រក់អ្វីខ្លះ?

## ចម្លើយ

១. អ្នកផឹកស្រាច្រើនប្រើសម្ដីអួតក្អេងក្អាង។

២. បើផឹកស្រាដល់កំណត់ គាត់យកស្រែទៅបញ្ចាំ។

៣. បើគ្មានស្រែទៅបញ្ចាំ គាត់យកកូនទៅបញ្ចាំទៀត។

៤. អ្នកផឹកស្រាតែងជួបនឹងផលអាក្រក់ជាច្រើនដូចជា ខូចសុខភាព មានជម្លោះនឹងគ្នា ជួបគ្រោះថ្នាក់ចរាចរណ៍ ខាតបង់ថវិកា ខូចកិត្តិយស បាត់បង់តម្លៃក្នុងសង្គម។

## ចម្លើយលំហាត់

១. សូត្រមេសូត្រឡើងវិញ។

២. បដិសព្ទនឹងពាក្យ “ក្រ”

ក្រ ≠ មាន

៣. វេវចនសព្ទនឹងពាក្យ “ភឿន” គឺ៖ មិត្ត សម្លាញ់ គ្នើ ម្រាក់ ។

៤. សទិសសព្ទនឹងពាក្យ “ “ពីរ”

-ពីរ( ប.សំ) ចំនួន២ : *ឧ. ខ្ញុំមានផ្លែក្រូចពីរ ។*

-ពី(និ. អា.និ) ខាង, អំពី, ឯ : *ឧ. ពីនេះ ពីនោះ, មកពីណា?*

៥. រកពាក្យចួននៅក្នុងអត្ថបទខាងលើ៖

-វគ្គទី១៖ ប្រមឹក ⟝⟞ ផឹក

ក្មេង ⟝⟞ វង្វេង ⟝⟞ ក្អែង

-វគ្គទី២៖ បំពាន ⟝⟞ មាន

អត់ ⟝⟞ កត់ ⟝⟞ កំណត់

៦. គូសសញ្ញា ✓ក្នុងប្រអប់ចម្លើយដែលទាក់ទងនឹងអត្ថន័យមេសូត្រ

☐ អ្នកប្រមឹកមានប្រយោជន៍ដល់គ្រួសារ។

☐ អ្នកប្រមឹកតែងជួយដល់ជនក្រីក្រ។

☑ *អ្នកប្រមឹកធ្វើឱ្យគ្រួសារជួបការលំបាក។*

☐ អ្នកប្រមឹកធ្វើឱ្យគ្រួសារមានសុភមង្គល។

## សំណេរ

ក. សរសេរតាមអាន

ខ. ជ្រើសរើសពាក្យចួនក្នុងប្រអប់ទៅបំពេញចន្លោះកំណាព្យ

| បំពាន | លុយអត់ | ផឹក | បញ្ចាំ | វង្វេង | តឹង |
|---|---|---|---|---|---|

ឯអ្នកប្រមឹក ប្រមូលកន...*ផឹក*... ធ្វើភឿននឹងក្មេង

សំដីច្រើន...*តឹង*... ស្រវឹង...*វង្វេង*... ជំហរអួតក្អេង

មិនចេះក្រខ្សត់។

អួតទាំង...*__បំពាន__*... ផឹកម៉ែលុយមាន ផឹកម៉ែ...*__លុយអត់__*...

ឯងចេះតែកិន ចិនចេះតែកត់ ផឹកដល់កំណត់

យកស្រែ...*__បញ្ចាំ__*...។

គ. រៀបពាក្យខាងក្រោមឱ្យបានជាល្បះត្រឹមត្រូវ។

| | | | | |
|---|---|---|---|---|
| វង្វេង | សុរា | ស្មារតី។ | អ្នកសេព | តែង |

☞ អ្នកសេពសុរាតែងវង្វេងស្មារតី។

ឃ. ចូរសរសេរតែងសេចក្តីពណ៌នាពីគ្រោះថ្នាក់ចរាចរណ៍មួយរវាង ម៉ូតូនិងកង់។

### សេចក្តីអធិប្បាយ

ថ្ងៃមួយ នៅពេលខ្ញុំកំពុងធ្វើដំណើរតាមផ្លូវ ខ្ញុំបានឃើញគ្រោះថ្នាក់ចរាចរណ៍មួយកើតឡើងរវាងម៉ូតូនិងកង់។

មុនពេលកើតហេតុ គេឃើញម៉ូតូនេះបើកបរតាមបណ្តោយផ្លូវ ក្នុងទិសដៅពីជើងទៅត្បូង។ លុះមកដល់ត្រង់គំនូសកាត់ទទឹងផ្លូវស្រាប់តែមានក្មេងម្នាក់ជិះកង់ឆ្លងផ្លូវមក ក៏បណ្តាលឱ្យបុកគ្នាជាមួយនឹងម៉ូតូ។ ក្រោយពេលកើតហេតុ គេឃើញកង់របស់ក្មេងនោះ ខូចខាតបន្តិចបន្តួច ចំណែកក្មេងនោះរលាត់កែងដៃចេញឈាមតិចៗ។ រីឯខាងម៉ូតូមិនមានខូចខាតអ្វីទេ។ មួយសន្ទុះក្រោយមកក៏មានអ្នកស្រុកក្បែរនោះជួយយកក្មេងទៅឱ្យគ្រូពេទ្យលាងរបួសនិងបិតថ្នាំឱ្យ។

ក្នុងពេលជាមួយគ្នានោះដែរ កងកម្លាំងមានសមត្ថកិច្ចក៏ឃាត់ខ្លួនអ្នកបើកម៉ូតូយកទៅអប់រំអំពីការបើកបរ និងឱ្យជួយចេញថ្លៃថ្នាំព្យាបាលកុមាររងគ្រោះ។

ខ្ញុំមានអារម្មណ៍សោកស្តាយ និងតក់ស្លុតណាស់ចំពោះគ្រោះថ្នាក់ចរាចរណ៍នេះ ហើយខ្ញុំប្តេជ្ញាថា ខ្ញុំត្រូវតែធ្វើដំណើរដោយប្រុងប្រយ័ត្នគ្រប់ពេលវេលា។

# សញ្ញាសួរ «?»

## ចម្លើយលំហាត់

ក. ចូរដាក់សញ្ញាសួរ "?" ឬសញ្ញាខណ្ឌ "។" ដើម្បីបញ្ចប់ល្បះឱ្យបានសមស្រប។

១. យើងខិតខំរៀនទាន់ខ្លួននៅក្មេង...។...

២. តើគ្រឿងស្រវឹងធ្វើឱ្យយើងបាត់ស្មារតីមែនឬទេ...?...

៣. តើសព្វថ្ងៃអ្នករៀននៅឯណា...?...

៤. គ្រូកំពុងបង្រៀនសិស្សក្នុងថ្នាក់...។...

ខ. ចូរប្រើសញ្ញា "។" ឬសញ្ញា "?" ដើម្បីបញ្ចប់ល្បះក្នុងអត្ថបទខាងក្រោម។

| |
|---|
| អ្នកផឹកស្រាច្រើនហួសកំណត់ បណ្ដាលឱ្យបាត់បង់ស្មារតី និងខូចសុខភាព...។... តើអ្នកធ្លាប់សាកល្បងវាដែរឬទេ...?... ដើម្បីឱ្យយើងមានសុខភាពល្អ មានកម្លាំងខ្លាំងក្លា ប្រាជ្ញាឈ្លាសវៃ ត្រូវចៀសឱ្យផុតពីការសេពសុរា...។... ក្រៅពីចំណុចដូចខាងលើ តើស្រាធ្វើឱ្យយើងខាតបង់អ្វីទៀត...?... ដូច្នេះអ្នកមិនត្រូវសាកល្បងប្រើប្រាស់វាទេ...។... |

គ. តែងល្បះខ្លីៗដោយប្រើសញ្ញាសួរ "?" ឱ្យបានចំនួនពីរល្បះ។

១. ឆ្នាំនេះ តើអ្នករៀនថ្នាក់ទីប៉ុន្មានហើយ?

២. តើអ្នកមានបងប្អូនប៉ុន្មាននាក់?

**មេរៀនទី**

៤៣ អំណាន

# សិប្បកម្មថ្មកែវ

## សំណួរ

១. តើថ្មកែវមានប្រភពនៅឯណា?

២. តើថ្មកែវមានពណ៌ដូចម្ដេច?

៣. តើគេយកថ្មកែវមកធ្វើអ្វីខ្លះ?

៤. តើចម្លាក់ថ្មកែវមានសារៈសំខាន់ឬទេ? ពីព្រោះអ្វី?

## ចម្លើយ

១. ថ្មកែវមានប្រភពនៅខេត្តពោធិ៍សាត់។

២. ថ្មកែវមានពណ៌ចម្រុះ ភ្លឺរលោង។

៣. គេយកថ្មកែវមកឆ្លាក់ធ្វើរូបសំណាកផ្សេងៗដូចជាវត្ថុសិល្បៈ វត្ថុអនុស្សាវរីយ៍ និងវត្ថុជាទីសក្ការៈ។

៤. ចម្លាក់ថ្មកែវមានសារៈសំខាន់ណាស់ ពីព្រោះវាបានជួយលើកកម្ពស់ជីវភាពប្រជាជនឱ្យកាន់តែសម្បូរធូរធារ។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ “យូរ”

យូរ ≠ ឆាប់

២. រកវេវចនសព្ទនឹងពាក្យ “គោរព”៖ លំទោន លំឱន ប្រណិប័តន៍ គំនាប់។

៣. រកសទិសសព្ទនឹងពាក្យ "ធន"

-ធន(ន) ទ្រព្យ, សម្បត្តិ : *ធនធាន*។

-ធន់(កិ) អត់ធ្មត់, ទ្រាំ, ស៊ូ : *គោធន់នឹងកំដៅថ្ងៃ* ។

-ធុន(ន) អ្វីៗនីមួយៗដែលមានបែបយ៉ាងនឹងកំណើតជាមួយគ្នា: *ចានមួយធុន, មនុស្សធុនអន់* ។

៤. គូសភ្ជាប់ពាក្យដែលជានាម គុណនាម និងកិរិយាឱ្យបានត្រឹមត្រូវ

| ក | ខ |
|---|---|
| នាម | ថ្មកែវ |
| គុណនាម | ឆ្លាក់ |
| កិរិយា | ល្អ |
| | សិប្បកម្ម |

៥. គូសសញ្ញា ✓ ក្នុងប្រអប់ដែលបញ្ជាក់ហេតុនិងផល។

☑ហេតុ ☐ផល : ប្រជាជនប្រកបរបរសិប្បកម្មចម្លាក់ថ្មកែវ។

☐ហេតុ ☑ផល : ប្រជាជនមានជីវភាពធូរធារ។

៦. គូសសញ្ញា ✓ ក្នុងប្រអប់ដែលជាគំនិតសំខាន់របស់អត្ថបទ។

☐ ថ្មកែវជាប្រភេទថ្មធម្មជាតិម្យ៉ាងគ្មានតម្លៃ។

☐ ត្បូងថ្មអាចយកមកឆ្លាក់ជារូបសំណាកផ្សេងៗ។

☑ *ចម្លាក់ថ្មកែវធ្វើឱ្យប្រជាជនសម្បូរធូរធារ។*

☐ ថ្មធម្មជាតិមានសារប្រយោជន៍។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "វត្ថុ អនុស្សាវរីយ៍"

- វត្ថុ (ន) របស់ជាទីតាំង; លំនៅ; ទី; ទីដី; ចម្ការ; ទ្រព្យ; អីវ៉ាន់។ល។

- អនុស្សាវរីយ៍ (ន) ការដែលគួររលឹកនឹកឃើញ ចងចាំនៅក្នុងចិត្តឥតភ្លេច ។

២. រកបដិសព្ទនឹងពាក្យ "រលោង"

រលោង ≠ គគ្រើម

៣. រកវេវចនសព្ទនឹងពាក្យ "ទឹក ដី"៖

- ទឹក គង្គា ជល វារី អាបោ។

- ដី ប្រឹថពី ពសុធា ធរណី បឋវី។

៤. រកសទិសសព្ទនឹងពាក្យ "ជា"

-ជា(ន) ឈ្មោះពស់មួយប្រភេទ មានពិសខ្លាំង, កាលនៅតូចហៅពស់ជា, លុះធំទ្រើសបន្តិចហៅពស់ក្រាយ, ដល់ធំអស់ទំហំហៅពស់វែក។

-ជា(គុ) ស្រួល ល្អ, សុខ, សប្បាយ, រួចពីឈឺ។

ពាក្យសម្រាប់និយាយចង្អុរនាមសព្ទឱ្យដាច់សេចក្តីដោយ

ខ្សែក : *វិជ្ជាជាសម្បត្តិដ៏ប្រសើរក្នុងលោក។*

-ជា(ន ឬ គុ) ដែលទីទៃពីនៅកំដរទ្រព្យគេ : *មនុស្សអ្នកជា។*

-ចៀវ(កិ) ចិត ឬកាត់ឱ្យជាចំនៀវ : *ចៀវស្លឹកចេក។*

-ជាល(ន) ប្រដាប់ត្បាញដោយបន្ទោះមានក្រឡា ប្រហោងសណ្ដានក្រឡាសំណាញ់ : *ពោតមួយជាល។*

-ជាល(ន) ឈ្មោះនំមួយប្រភេទ : *នំជាល។*

ខ. បំពេញល្បះ៖ចូរអានល្បះខាងក្រោមដោយបំពេញសញ្ញាសួរ "?" និងសញ្ញា "។"

១. ថ្មកែវជាប្រភេទថ្មធម្មជាតិ...*។*

២. គេយកថ្មកែវទៅធ្វើអ្វី...*?*

៣. តើថ្មមានតម្លៃនៅខេត្តពោធិ៍សាត់ជាថ្មអ្វី...*?*

៤. ចម្លាក់ថ្មកែវសម្រាប់តាំងលម្អនិងគោរពបូជា...*។*

គ. ចូរតែងល្បះនឹងពាក្យ "ថ្មកែវ រលោង ឆ្លាក់"។

១. នៅខេត្តពោធិ៍សាត់សម្បូរ *ថ្មកែវ* ណាស់។

២. ថ្មកែវមានពណ៌ភ្លឺ *រលោង* ។

៣. គេយកថ្មកែវទៅ *ឆ្លាក់* ជារូបសំណាកផ្សេងៗ។

# ដំណាំដំឡូងមី

## សំណួរ

១. តើគេនិយមដាំដំឡូងមីនៅកន្លែងណាខ្លះ?

២. ដំឡូងមីអាចយកទៅធ្វើអ្វីខ្លះ?

៣. ហេតុអ្វីបានជាកសិករនិយមដាំដំឡូងមី?

៤. តើនៅភូមិ ឃុំរបស់ប្អូនមានដាំដំឡូងមីដែរឬទេ? តើគេដាំដោយវិធីណា?

## ចម្លើយ

១. គេនិយមដាំដំឡូងមីនៅតាមភូមិដ្ឋាន។

២. ដំឡូងមីអាចយកទៅធ្វើនំចំណីសម្រាប់បរិភោគ ដូចជា នំប៉័ង នំប៉ាវ មី។ល។

៣. បានជាកសិករនិយមដាំដំឡូងមី ព្រោះវាជាដំណាំយ៉ាងសំខាន់ដែលបានលើកកម្ពស់ជីវភាពប្រជាជន និងសេដ្ឋកិច្ចជាតិឱ្យកាន់តែប្រសើរឡើង។

៤. (ចម្លើយអាស្រ័យលើសិស្ស)

## លំហាត់

ក. ចូរគូសសញ្ញា ✓ ក្នុងប្រអប់ដែលជាល្បះត្រឹមត្រូវក្នុងអត្ថបទ។

☐ ដាំដំឡូងមីជាជម្រើសថ្មីរបស់កសិករ ដើម្បីបង្កើនសុខភាព

របស់ពួកគាត់។

☑ ដាំដំឡូងមីជាជម្រើសថ្មីរបស់កសិករ ដើម្បីបង្កើនប្រាក់ចំណូល របស់ពួកគាត់។

☑ ដាំដំឡូងមីជាជម្រើសថ្មីរបស់កសិករ ដើម្បីបង្កើនប្រាក់ជីវភាព របស់ពួកគាត់។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ចំណី កសិករ"

- ចំណី (ន) វត្ថុសម្រាប់ស៊ី ។
- កសិករ (ន) អ្នកធ្វើស្រែចម្ការ។

២. បដិសព្ទនឹងពាក្យ "ខ្ពស់ ចំណូល"

- ខ្ពស់ ≠ ទាប
- ចំណូល ≠ ចំណាយ

៣. វេវចនសព្ទនឹងពាក្យ "បរិភោគ" គឺៈ ស៊ី ហូប ឆាន់ សោយ ទទួលទាន ញ៉ាំ ឆី ស្រស់ស្រូប។

៤. សទិសសព្ទនឹងពាក្យ "ការ"

-ការ(ន) កិច្ច, អំពើដែលត្រូវធ្វើ។ *ឧ. ខ្ញុំធ្វើការនៅក្រុមហ៊ុនឯកជន ។*

-ការ(កិ) មូលសរសៃរសូត្រ, សរសៃរអំបោះជាដើមដោយខ្នារ ។ *ឧ. ការសូត្រ, ការអំបោះ ។*

-ការ(កិ) បិទបាំង, រារាំង, ឃាំងឃាត់ ។ *ឧ. មេមាន់ការកូន ។*

-ការ(កិ) រៀបអាវាហវិវាហមង្គល, ផ្សំផ្គុំកូនប្រុសនិងស្រីជាគូនឹងគ្នា ។ *ឧ. ការកូន, ស៊ីការ, រៀបការ..... ។*

-កា(កិ) សរសេរអាសយដ្ឋានគឺសរសេរចុះឈ្មោះ លំនៅអ្នកដែលនឹងទទួលសំបុត្រនៅស្រោមសំបុត្រ ។ *ឧ. កាខ្នងសំបុត្រ ។*

-កា(ន) បំពង់សម្រាប់ដាក់ទឹកធ្វើដោយលោហៈផ្សេងៗ ឬដោយដីលាបពណ៌, *កាទឹក ។*

-ការណ៍(ន) ហេតុ, ដំណើរ ។ *ឧ. សេចក្ដីរាយការណ៍ ។*

-កាណិ(ន) ត្រចៀក(វ.ស), *ព្រះកាណិ ។*

**មេរៀនទី**

**៤៥ តែងសេចក្តី**

# ការពណ៌នាពីទីកន្លែង

## សំណួរ

១. តើពួកគេបានទៅទស្សនាអ្វី? នៅពេលណា?

២. តើសារមន្ទីរជាតិស្ថិតនៅឯណា?

៣. តើសារមន្ទីរជាតិជាកន្លែងអ្វី? មានអ្វីខ្លះ?

៤. ហេតុអ្វីបានជាភ្ញៀវទេសចរចូលចិត្តមកទស្សនាសារមន្ទីរជាតិ?

៥. តើប្អូនចង់ទៅទស្សនាទីនោះឬទេ? ព្រោះអ្វី?

## ចម្លើយ

១. ពួកគេបានទៅទស្សនាសារមន្ទីរជាតិ នៅថ្ងៃអាទិត្យមុន។

២. សារមន្ទីរជាតិស្ថិតនៅខាងជើងព្រះបរមរាជវាំង។

៣. សារមន្ទីរជាតិជាកន្លែងប្រមូលផ្តុំដាក់តាំង បង្ហាញសម្បត្តិវប្បធម៌ និងប្រវត្តិសាស្ត្រសំខាន់ៗរបស់ប្រទេសធំជាងគេនៅកម្ពុជា មានដូចជា រូបចម្លាក់ ឈុតសម្លៀកបំពាក់ របាំ ទូក គ្រែស្នែងរបស់ស្តេច និងវត្ថុបុរាណជាច្រើនទៀត។

៤. បានជាភ្ញៀវទេសចរចូលចិត្តមកទស្សនាសារមន្ទីរជាតិ ព្រោះទីនេះមានបង្ហាញនូវមរតកវប្បធម៌ដ៏មានតម្លៃរបស់ជាតិតាំងពីបុរាណកាលមក។

៥. ខ្ញុំចង់ទៅទស្សនាទីនោះណាស់ ព្រោះវាជាកន្លែងសម្បូរវត្ថុបុរាណ

ដ៏មានតម្លៃពុំអាចកាត់ថ្លៃបាន។

## សំណេរ

ចូរសរសេរតែងសេចក្តីពណ៌នាអំពីសាលារៀន។

## សេចក្តីអធិប្បាយ

សព្វថ្ងៃនេះ ខ្ញុំរៀននៅសាលាបឋមសិក្សាក្រពើហា។ សាលារៀននេះមានទីតាំងស្ថិតនៅក្នុងទីក្រុងតាខ្មៅ ទីរួមខេត្តកណ្តាល។

ទិដ្ឋភាពសាលារៀននេះ បើមើលពីចម្ងាយ យើងឃើញតែដំបូលក្បឿងលើមៗ ព្រោះមានដើមឈើជាច្រើននៅព័ទ្ធជុំវិញ។ ប៉ុន្តែពេលចូលជិត ក្លោងទ្វារនៅឈរចង្រ្កោងរំលេចអក្សរធំៗថា "សាលាបឋមសិក្សាក្រពើហា" រង់ចាំស្វាគមន៍លោកគ្រូ អ្នកគ្រូ ព្រមទាំងសិស្សានុសិស្សគ្រប់រូប។ សាលារៀននេះមានរបងស៊ីម៉ង់ត៍ព័ទ្ធជុំវិញ និងមានដើមឈើផ្តល់ម្លប់ត្រឈឹងត្រឈៃ។ បរិវេណសាលាលម្អទៅដោយសួនច្បារដែលមានផ្ការីកស្គុះស្គាយចម្រុះពណ៌។ នៅចំកណ្តាលទីធ្លាមានទង់ជាតិបក់រវិចៗឰដ៏អាកាស។ រីឯផ្លូវចូលសាលារៀន ក៏ដូចជាផ្លូវក្នុងទីធ្លាសាលាបានចាក់បេតុងយ៉ាងរឹងមាំងាយស្រួលដល់ការធ្វើដំណើរ។ ជាងនេះទៅទៀត សាលារៀនខ្ញុំមានអគារធ្វើអំពីថ្មយ៉ាងស្អាតតម្រៀបគ្នាជាជួរចំនួនបីខ្នង និងមានទីចាត់ការមួយខ្នង។ ដូចគ្នានេះដែរ បើយើងចូលទៅមើលនៅខាងក្នុងបន្ទប់រៀននីមួយៗសុទ្ធតែត្រូវបានរៀបចំយ៉ាងស្អាត និងមានសណ្តាប់ធ្នាប់។ តុ កៅអី

តម្រៀបជាជួរៗ លម្អដោយផ្ទាំងរូបភាព ពាក្យស្លោក និងតារាងផ្សេងៗ ដែលទាក់ទាញសិស្សឱ្យចង់មករៀននៅសាលានេះ។

ខ្ញុំស្រឡាញ់សាលារៀននេះណាស់ ព្រោះវាជាថ្នាលបណ្ដុះចំណេះដឹងដល់ខ្ញុំ ហើយខ្ញុំនឹងខិតខំរៀនឱ្យបានពូកែ។

**មេរៀនទី**

# សុជីវធម៌តាមទីសាធារណៈ

៤៦ អំណាន

## សំណួរ

១. តើកុមារត្រូវមានទម្លាប់ល្អនៅកន្លែងណាខ្លះ?

២. ពេលប្អូនដើរជិតស្ត្រីមានផ្ទៃពោះ គួរធ្វើដូចម្ដេច?

៣. ពេលប្អូនឃើញចាស់ជរាឬពិការ តើត្រូវធ្វើដូចម្ដេច?

៤. តើការប្រកាន់យកសុជីវធម៌ក្នុងខ្លួន នាំឱ្យប្អូនក្លាយជាមនុស្សបែបណា?

## ចម្លើយ

១. កុមារត្រូវមានទម្លាប់ល្អនៅគ្រប់ទីកន្លែង។

២. ពេលខ្ញុំដើរជិតស្ត្រីមានផ្ទៃពោះ ខ្ញុំគួរដើរដោយប្រុងប្រយ័ត្ន មិនឱ្យប៉ះពាល់គាត់ទេ។

៣. ពេលខ្ញុំឃើញចាស់ជរាឬពិការ ខ្ញុំត្រូវចេះឱនលំទោន គួរសម និងជួយយកអាសារគាត់ ប្រសិនបើគាត់មានបញ្ហាលំបាក។

៤. ការប្រកាន់យកសុជីវធម៌ក្នុងខ្លួន នាំឱ្យខ្ញុំក្លាយជាមនុស្សល្អ មានគេស្រឡាញ់រាប់អានច្រើន។

## ចម្លើយលំហាត់

ជ្រើសរើសពាក្យក្នុងប្រអប់យកទៅបំពេញល្បះខាងក្រោម។

| គួរសម | សុជីវធម៌ | ទង្គិច |
|---|---|---|

១. ពេលយើងដើរជួបស្ត្រីមានផ្ទៃពោះ យើងមិនត្រូវដើរ...*ទន្ទឹច*..
គាត់ឡើយ។

២. យើងត្រូវប្រើពាក្យ...*គួរសម*...ចំពោះចាស់ព្រឹទ្ធាចារ្យនិងអ្នក
ពិការ។

៣. កូនល្អត្រូវមាន...*សុជីវធម៌*...ក្នុងខ្លួនជានិច្ច។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "វាចា ថ្នាំងថ្នាក់"

- វាចា (ន) សម្តី ។
- ថ្នាំងថ្នាក់ (ន.) សេចក្តីអន់អាក់ចិត្ត, ត្រូវណាក់ចិត្ត។

២. បដិសព្ទនឹងពាក្យ "ចាស់"

ចាស់ ≠ ក្មេង, ថ្មី

៣. វេវចនសព្ទនឹងពាក្យ "មិត្ត" គឺៈ ភ្លើ ម្រាក់ គៀន សម្លាញ់
ពួកម៉ាក។

៤. សទិសសព្ទនឹងពាក្យ "នឹង"

-នឹង( ធ) ពាក្យប្រាប់ដំណើរសម្រេចនូវអំពើសម្រាប់ប្រើនាំមុខនាមសព្ទមានន័យថា : ដោយ, ជាមួយ, ដោយសារ, ពួដ៏, នៅត្រង់។ *ឧ. ពូសុខភ្ជួរដីនឹងនង្គ័ល ។*

-នឹង(កិ.នុ) ពាក្យសម្រាប់នាំមុខកិរិយាប្រាប់អនាគតកាលទៅខាងមុខថា ៖ មុខជា, ប្រាកដជា, គង់, គង់តែ,.....ឧ. *ស្អែកខ្ញុំនឹងទៅលេងក្រុងព្រះសីហនុហើយ ។*

-នឹង(គុ ឬគុ.កិ) មិនកម្រើក, នៅស្ងៀមមួយកន្លែង ។

*ឧ. ទឹកនឹង ។ អង្គុយនឹងថ្កល់ ។*

-និង(សន្ធ) ពាក្យសម្រាប់និយាយតពាក្យ ឬតឃ្លាល្បះមួយ ទៅល្បះមួយដែលមានសេចក្តីថា ៖ ទាំង, ព្រមទាំង, ផង, នេះផងនោះផង ។ *គោ និងក្របី... ។*

-ហ្នឹង(ឧទានសព្ទ) នុះហើយ, នុះឯង ៖ *ហ្នឹងឯង!*

ខ. បំពេញអត្ថបទចម្រៀងខាងក្រោម៖

ពេលមិត្តឃើញ...*ចាស់ជរា*... គ្រាំគ្រាទ្រុឌទ្រោមពិការ
មិនគួរ...*មិនសម*...វាចា ប៉ះពាល់កិត្តិយសនាំឱ្យ*ថ្នាំងថ្នាក់* ។
កុមារកុមារី ឃ្លាតខ្ញីមាន...*រាក់ទាក់*...
...*ទើបក្លាយ*...ជាពលរដ្ឋល្អ និងជា...*កូនល្អ*...របស់ពុកម៉ែ។

គ. ចូរតែងល្បះរកមរូបភាពខាងក្រោម។



*កុមារីជម្រាបសួរលោកតា។*



*កុមារីទុកកន្លែងឱ្យស្ត្រីមានផ្ទៃពោះអង្គុយ ។*

# មូសិកទន្ត ឬធ្មេញកណ្ដុរ «៉»

## លំហាត់

ក. ចូរស្រង់ពាក្យដែលមានមូសិកទន្ត ឬធ្មេញកណ្ដុរ "៉" ក្នុងអត្ថបទ

| |
|---|
| រសៀលម៉ោងបី ខ្យល់បក់ប៊ឺៗ ប៉ើងសក់មីងយ៉ាំដែលកំពុងលក់ម៉ាំល្ហុងក្នុងភូមិកោះរ៉ុង។ អ្នកភូមិនាំគ្នាទិញរញ៉ឹករញ៉ី ព្រោះគាត់ប៊ិនកំប្លែងក្រមិចក្រមើម និងច្រៀងយ៉ាងពីរោះ។ តាង៉ែតដឹកដៃយាយវ៉ែនដើរង៉ុកៗទៅទិញម៉ាំទុកឱ្យចៅគាត់ញ៉ាំ។ |

☞ ពាក្យដែលមានធ្មេញកណ្ដុរគឺ៖ ប៊ឺៗ ប៉ើង យ៉ាំ ម៉ាំ រ៉ុង រញ៉ឹក រញ៉ី ប៊ិន យ៉ាង ង៉ែត វ៉ែន ង៉ុកៗ ញ៉ាំ។

ខ. ចូរសរសេរពាក្យក្នុងប្រអប់ខាងក្រោមឱ្យបានត្រឹមត្រូវ។

| |
|---|
| ងឹកងក់ ចាបី សំបែត យាយយឹន ឆៃយាំ រមាំងរមោក |

☞ ង៉ឹកង៉ក់ ចាប៉ី សំប៉ែត យាយយ៉ឹន ឆៃយ៉ាំ រម៉ាំងរម៉ោក។

គ. ចូររកពាក្យដែលប្រើមូសិកទន្ត ឬធ្មេញកណ្ដុរ "៉" ឱ្យបានប្រាំពាក្យ។

☞ រ៉ុយ៉ៃ ម៉ែ តវ៉ា យាយយ៉ាន ប៉ា...។

**មេរៀនទី**

៤៨ ការនិយាយ

# បកស្រាយភ្លើង និងស្លាកសញ្ញាចរាចរណ៍

**សំណួរ**

១. តើភ្លើងសញ្ញាចរាចរណ៍មានប៉ុន្មានពណ៌? អ្វីខ្លះ?

២. តើស្លាកសញ្ញាកុមារដឹកដៃគ្នាខាងលើនេះមានន័យដូចម្ដេច?

៣. តើស្លាកសញ្ញាចរាចរណ៍ខាងក្រោមនេះមានន័យដូចម្ដេច? ចូរបកស្រាយស្លាកនីមួយៗឱ្យបានត្រឹមត្រូវ។

**ចម្លើយ**

១. ភ្លើងសញ្ញាចរាចរណ៍មានបីពណ៌ គឺ ពណ៌បៃតង លឿង និងក្រហម។

២. ស្លាកសញ្ញាកុមារដឹកដៃគ្នាខាងលើនេះមានន័យថានៅកន្លែងនោះមានកុមារឆ្លងកាត់ញឹកញាប់។

៣. ស្លាកសញ្ញាចរាចរណ៍ខាងក្រោមនេះមានន័យថា៖

ហាមស៊ីផ្លេ



ផ្លូវថ្មើរជើងឆ្លងកាត់



មានសត្វពាហនៈឆ្លងកាត់



តំបន់មានសត្វព្រៃឆ្លងកាត់



**មេរៀនទី**

៤៩ អំណាន

# ស្លាកសញ្ញាសុវត្ថិភាព

## សំណួរ

១. តើស្លាកសញ្ញាសុវត្ថិភាពនានាមានអ្វីខ្លះ?

២. តើស្លាកសញ្ញាក្បាលខ្មោចមានន័យដូចម្ដេច?

៣. តើស្លាកសញ្ញាសុវត្ថិភាពមានសារៈសំខាន់ដូចម្ដេចខ្លះ?

## ចម្លើយ

១. ស្លាកសញ្ញាសុវត្ថិភាពនានាមានច្រើនដូចជា ស្លាកសញ្ញាបញ្ជា ស្លាកសញ្ញាបម្រាម ស្លាកសញ្ញាអាសន្ន និងស្លាកសញ្ញាគ្រោះថ្នាក់។

២. ស្លាកសញ្ញាក្បាលខ្មោចមានន័យថា ទីនោះមានមីន ឬគ្រាប់មិនទាន់ផ្ទុះ។

៣. ស្លាកសញ្ញាសុវត្ថិភាពមានសារៈសំខាន់ណាស់ ព្រោះដើម្បីឱ្យអ្នកដំណើរចៀសផុតពីគ្រោះថ្នាក់ផ្សេងៗ ហើយធ្វើដំណើរដោយសុវត្ថិភាព។

## លំហាត់

១. ពន្យល់ពាក្យ “សុវត្ថិភាព”

- សុវត្ថិភាព (ន) ការមានសួស្ដី, ការប្រកបដោយសេចក្ដីសុខ។

២. បដិសព្ទនឹងពាក្យ “មាន ចេះ”

មាន ≠ ក្រ

ចេះ ≠ល្ងង់

៣. វេវចនសព្ទនឹងពាក្យ "ក្បាល" គឺ៖ សិរ ព្រះសិរ ព្រះកេស។

៤. ពាក្យដែលមានមូសិកទន្ត "៉" ក្នុងអត្ថបទគឺ "ម្យ៉ាង"។

៥. តើអត្ថបទខាងលើនេះនិយាយពីអ្វី? ចូរគូសសញ្ញា ✓ ក្នុងប្រអប់ដែលជាចម្លើយត្រឹមត្រូវ។

☐ និយាយពីការប្រើប្រាស់ស្លាកសញ្ញាចរាចរណ៍។

☑ *និយាយពីការប្រើប្រាស់ស្លាកសញ្ញាគ្រោះថ្នាក់។*

☐ និយាយពីការប្រើប្រាស់សញ្ញាកាយវិការ។

☐ និយាយពីការប្រើប្រាស់ស្លាកសញ្ញាគូសខ្វែង។

៦. តើស្លាកសញ្ញាសុវត្ថិភាពខាងក្រោមនេះមានន័យដូចម្តេច?



ហាមជក់បារី



ហាមគេងអត់ដាក់មុង

**សំណេរ**

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ចរាចរណ៍ កាយវិការ"

- ចរាចរណ៍ (ន) ការដើរទៅមក, ដំណើរខ្វាត់ខ្វែងចុះឡើង; ដំណើរតាមផ្លូវសាធារណៈតាមតែផ្លូវណាក៏ដោយ។
- កាយវិការ (ន) ការកម្រើកនៃកាយ, ចលនានៃកាយ ។

២. បដិសព្ទនឹងពាក្យ "មាន ច្រើន"

- មាន ≠ ក្រ
- ច្រើន ≠ តិច

៣. វេវចនសព្ទនឹងពាក្យ "កាយ" គឺ៖ ខ្លួន ប្រាណ កាយា រាងកាយ។

៤. សទិសសព្ទនឹងពាក្យ "ការ"

-ការ(ន) កិច្ច, អំពើដែលត្រូវធ្វើ។ *ឧ. ខ្ញុំធ្វើការនៅក្រុមហ៊ុនដឹកជញ្ជូន ។*

-ការ(កិ) មូលសរសៃរសូត្រ, សរសៃរអំបោះជាដើមដោយខ្នារ។ *ឧ. ការសូត្រ, ការអំបោះ ។*

-ការ(កិ) បិទបាំង, រារាំង, ឃាំងឃាត់។ *ឧ. មេមាន់ការកូន ។*

-ការ(កិ) រៀបអាវាហវិវាហមង្គល, ផ្សំផ្គុំកូនប្រុសនិងស្រីជាគូនឹងគ្នា។ *ឧ. ការកូន, ស៊ីការ, រៀបការ..... ។*

-កា(កិ) សរសេរអាសយដ្ឋានគឺសរសេរចុះឈ្មោះ លំនៅអ្នកដែលនឹងទទួលសំបុត្រនៅស្រោមសំបុត្រ។ *ឧ. កាខ្ទង់សំបុត្រ ។*

-កា(ន) បំពង់សម្រាប់ដាក់ទឹកធ្វើដោយលោហៈផ្សេងៗ ឬ ដោយដីលាបពណ៌, *កាទឹក* ។

-ការណ៍(ន) ហេតុ, ដំណើរ ។ *ឧ. សេចក្តីរាយការណ៍* ។

-កាណិ(ន) ត្រចៀក(វ.ស), *ព្រះកាណ៌* ។

ខ. តែងល្បះដោយប្រើនាម គុណនាម និងកិរិយាខាងក្រោម៖

១. *យើងត្រូវគោរព* ច្បាប់ចរាចរណ៍ *ឱ្យបានខ្ជាប់ខ្ជួន* ។

២. *សៀវភៅនេះ* ថ្លៃ *ណាស់* ។

៣. *យើងត្រូវ* ឈប់ *ពេលមានភ្លើងក្រហម* ។

# សមិទ្ធផលថ្មីៗ

## សំណួរ

១. អ្នកកសាងស្នាដៃថ្មីក្នុងអត្ថបទនេះជាជនជាតិអ្វី?
២. តើសមិទ្ធផលដែលគេបានកសាងមានអ្វីខ្លះ?
៣. ដើម្បីរួមចំណែកថែរក្សាការពារសមិទ្ធផលខាងលើ តើប្អូនត្រូវធ្វើដូចម្តេច?
៤. តើប្អូនចង់ក្លាយខ្លួនជាអ្នកកសាងស្នាដៃធំៗដូចខាងលើដែរឬទេ? ព្រោះអ្វី?

## ចម្លើយ

១. អ្នកកសាងស្នាដៃថ្មីក្នុងអត្ថបទនេះជាជនជាតិខ្មែរ។
២. សមិទ្ធផលដែលគេបានកសាងមាន៖ ផ្លូវជាតិ ផ្លូវលំ ផ្ទះថ្មវីឡា ស្ពានអាកាស ស្ពានឆ្លងទន្លេ វិមានសន្តិភាព ភ្លើងអគ្គិសនី វារី-អគ្គិសនី ប្រឡាយទឹក...។
៣. ដើម្បីរួមចំណែកថែរក្សាការពារសមិទ្ធផលខាងលើ ខ្ញុំត្រូវគោរពច្បាប់នានារបស់ប្រទេស មិនត្រូវបំផ្លិចបំផ្លាញទ្រព្យសម្បត្តិរដ្ឋ និងចូលរួមគ្រប់សកម្មភាពនានាក្នុងន័យថែរក្សាឱ្យបានគង់វង្ស។
៤. ខ្ញុំក៏ចង់ក្លាយខ្លួនជាអ្នកកសាងស្នាដៃធំៗដូចខាងលើដែរ ព្រោះដើម្បីចូលរួមចំណែកលើកកម្ពស់កិត្តិសព្ទប្រទេសជាតិ។

## ចម្លើយលំហាត់

១. ចូរសូត្រមេសូត្រឡើងវិញ។

២. រកបដិសព្ទនឹងពាក្យ "ពេញ"

ពេញ ≠ ខ្វះ

៣. រកវេវចនសព្ទនឹងពាក្យ "អគ្គិសនី" គឺ៖ ភ្លើងអេឡិចត្រិច ភ្លើងម៉ាស៊ីន។

៤. រកសទិសសព្ទនឹងពាក្យ "ប្រៀប"

-ប្រៀប(កិ) ធៀប, ប្រដូច : *ប្រៀបធៀប* : ធៀបប្រដូច, ប្រដូចដោយធៀបគ្នា។

-ព្រាប(ន) ឈ្មោះបក្សីមួយប្រភេទ រូបរាងស្រដៀងនឹងលលក តែសម្បុរផ្សេងគ្នា មានច្រើនបែប, ច្រើនរស់នៅតាមដំបូលផ្ទះ, ដំបូលព្រះវិហារឬកុដិ ជាដើម : *សត្វព្រាប*។

-ព្រៀប (គុ ឬ កិ.វិ) ដែលកំពុងពេញរកកល់ហៀរ, ពេញព្រៀប។ *ឧ. ទឹកជន់ព្រៀបច្រាំង*។

៥. គូសពាក្យចួននឹងពាក្យខាងក្រោមក្នុងអត្ថបទ។

- វគ្គទី១៖ បុរី *ចួននឹងពាក្យ ...ថ្មី...*

រដ្ឋា *ចួននឹងពាក្យ ...ដា... ចួននឹងពាក្យ ...វីឡា...*

៦. គូសសញ្ញា ✓ ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវ។

☐ មេសូត្រខាងលើនិយាយអំពីសមិទ្ធផលពីបុរាណ។

☑ *<u>មេសូត្រខាងលើនិយាយអំពីសមិទ្ធផលបច្ចុប្បន្ន។</u>*

☐ មេសូត្រខាងលើនិយាយអំពីសមិទ្ធផលនៅពេលអនាគត។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. បដិសព្ទនឹងពាក្យ "សាងសង់ សន្តិភាព"

-សាងសង់ ≠ បំផ្លាញ

- សន្តិភាព ≠ សង្គ្រាម

២. វេវចនសព្ទនឹងពាក្យ "ដេរដាស សង់"

- ដេរដាស មូលមី កុះករ កកកុញ ត្រៀបត្រា ស្អេកស្កះ។

- សង់ សាង ស្ថាបនា កសាង បង្កើត។

ខ. ជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញវគ្គមេសូត្រខាងក្រោម៖

| |
|---|
| វាប តំបន់ ទំនាប វារី វាយ |

អគ្គិសនី ដើរដោយ...*<u>វារី</u>*... វាយដល់វាល...*<u>វាប</u>*...

ស្នូនកសិដ្ឋាន ប្រឡាយទឹកប្រៀប តំបន់...*<u>ទំនាប</u>*...

ស្រូវស្រែបវរ។

គ. តែងល្បះចំនួន៣ល្បះ ដោយប្រើនាម គុណនាម និងកិរិយាដូចខាងក្រោម៖

១. ស្ពានអាកាស : *<u>ប្រទេសយើងមានស្ពានអាកាសចំនួនបី។</u>*

២. ស្គីមស្តៃ : *ភ្នំពេញឥឡូវមានផ្ទះប្លង់ស្គីមស្តៃ។*

៣. សាងសង់ : *សំណង់អគារទាំងឡាយសាងសង់ឡើងអំពីថ្ម។*

ឃ. ចូរតែងសេចក្តីពណ៌នាពីវត្តមួយដែលប្អូនធ្លាប់ស្គាល់។

## សេចក្តីអធិប្បាយ

កាលពីចូលឆ្នាំខ្មែរកន្លងទៅថ្មីៗនេះ ខ្ញុំបានទៅលេងវត្តមួយឈ្មោះថា វត្តមហាអម្ពវ័ន ដែលស្ថិតនៅក្នុងភូមិឫស្សីជ្រោយ ឃុំឫស្សីជ្រោយ ស្រុកមុខកំពូល ខេត្តកណ្តាល។

ពេលធ្វើដំណើរទៅជិតដល់ ខ្ញុំឃើញដំបូលព្រះវិហារអណ្តែតលិមៗនៅតាមប្រឡោះចុងរុក្ខា។ កំពូលព្រះវិហារស្រួចត្រដឹមនៅលើអាកាសវេហាស៍បង្អួតរាងដល់ជនានុជនទាំងឡាយ។ លុះចូលទៅដល់ក្នុងវត្ត ដោយឆ្លងកាត់ខ្លោងទ្វារឈរជង្រ្គោង អមដោយគោថ្មឈរយ៉ាងសង្ហារង់ចាំស្វាគមន៍ភ្ញៀវគ្រប់ទិសទី យើងឃើញទិដ្ឋភាពក្នុងវត្តអារាមនេះមានភាពមនោរម្យណាស់ ព្រោះមានដើមឈើធំៗ ខ្ពស់ៗផ្តល់ម្លប់ត្រឈឹងត្រឈៃ។ នៅក្រោមដើមឈើនីមួយៗមានបង់អង្គុយលេង មានសួនផ្កា មានរូបបដិមាផ្សេងៗ ព្រមទាំងមានចារឹកអក្សរសុភាសិតជាច្រើន។ ចំណែកនៅតាមជញ្ជាំងព្រះវិហារមានលម្អដោយក្បូរក្បាច់រចនាយ៉ាងល្អប្រណីត។ នៅផ្នែកខាងក្នុងវិហារវិញមានលម្អដោយផ្ទាំងគំនូររឿងពុទ្ធប្រវត្តិ និងមានព្រះពុទ្ធបដិមាធំៗនិងតូចៗជាច្រើនសម្រាប់គោរពបូជា។

ខ្ញុំសប្បាយរីករាយណាស់នៅពេលបានទៅទស្សនាកំសាន្តនៅក្នុងវត្តក្នុងឱកាសចូលឆ្នាំថ្មី ព្រោះវត្តអារាមមិនគ្រាន់តែជាទីកន្លែងគោរពបូជាប៉ុណ្ណោះទេ ថែមទាំងជាទីជួបជុំញាតិមិត្តជិតឆ្ងាយបង្កើតនូវបរិយាកាសសប្បាយរីករាយថែមទៀតផង។

មេរៀនទី
៥១ អំណាន

# រឿងទឹកចិត្តប៉ូលីស

## សំណួរ

១. តើតារានិងស្រីពេជ្រធ្វើដំណើរទៅសាលារៀនដោយមធ្យោបាយអ្វី?

២. តើពួកគេដើរឆ្លងផ្លូវត្រង់កន្លែងណា?

៣. តើភ្លើងសញ្ញាចរាចរណ៍ពណ៌អ្វីដែលពួកគេត្រូវឈប់?

៤. តើប៉ូលីសចរាចរណ៍បានធ្វើអ្វីខ្លះដើម្បីជួយក្មេងទាំងពីរឆ្លងផ្លូវ?

## ចម្លើយ

១. តារានិងស្រីពេជ្រធ្វើដំណើរទៅសាលារៀនដោយថ្មើរជើង។

២. ពួកគេដើរឆ្លងផ្លូវតាមគំនូសពណ៌សត្រង់កន្លែងដែលមានភ្លើងសញ្ញាចរាចរណ៍។

៣. ភ្លើងសញ្ញាចរាចរណ៍ដែលពួកគេត្រូវឈប់មានពណ៌ក្រហម។

៤. ប៉ូលីសចរាចរណ៍បានជួយដឹកដៃក្មេងទាំងពីរឆ្លងផ្លូវ។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ “ហ៊ាន”

- ហ៊ាន ≠ ខ្លាច

២. វេវចនសព្ទនឹងពាក្យ “សំពះ” គឺ៖ ថ្វាយបង្គំ។

៣. សទិសសព្ទនឹងពាក្យ “ក៏”

-ក៏(និ) ពាក្យជាសន្ធានមានសំឡេងកញ្ចក់ខ្លីសម្រាប់និយាយតប្រយោគដោយឡែក។ *អ្នកក៏ទៅ ខ្ញុំក៏ទៅ ។*

-ក(ន) អវយវៈដែលតពីក្បាលទៅស្មា ឬទៅខ្លួននៃមនុស្សសត្វ។ ដៃ ជើងមនុស្សក៏មាន *ក* ដែរ : *កដៃ កជើង* ។ ទងខាងដើមក្ទួរស្រូវក៏ហៅថាកដែរ : *កស្រូវ* ។ កន្លែងដែលតជាប់ពីមាត់ដបជាដើមចុះទៅទល់នឹង ក្អែងក៏ហៅថាកដែរ : *កដប.កក្អម...* ។

-ក(កិ) តាំងផ្ដើម, តាំងធ្វើ។ *កសាង, កកើត* ។

-ករ(ន.បា) ដៃ។ *លើកករប្រណម្យ* : លើកដៃប្រណម្យ។

៤. ស្រង់ពាក្យជានាមក្នុងអត្ថបទឱ្យបានចំនួន៣ពាក្យ។

☞ តារា សាលារៀន ផ្លូវ មហាវិថី ភ្លើង...។

៥. ស្រង់ពាក្យជាគុណនាមក្នុងអត្ថបទឱ្យបានចំនួន៣ពាក្យ។

☞ ស ក្រហម នោះ ច្រើន ពីរ...។

៦. ស្រង់ពាក្យជាកិរិយាក្នុងអត្ថបទឱ្យបានចំនួន៣ពាក្យ។

☞ ធ្វើ ដើរ ទៅ ចេញ បើក ឈរ...។

៧. តើអត្ថបទនេះចង់អប់រំអំពីអ្វី? ចូរគូសសញ្ញា ✓ក្នុងប្រអប់ដើម្បីជ្រើសរើសចម្លើយមួយត្រឹមត្រូវជាងគេ។

☐ អប់រំឱ្យមានសេចក្ដីក្លាហាន។

☑ *អប់រំឱ្យចេះជួយគ្នាទៅវិញទៅមក។*

☐ អប់រំឱ្យយល់ដឹងពីភ្លើងសញ្ញាចរាចរណ៍។

☐ ររប់រំឱ្យដើរលើចិញ្ចើមផ្លូវ។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "សុវត្ថិភាព"

- សុវត្ថិភាព(ន) ការមានសួស្តី, ការប្រកបដោយសេចក្តីសុខ។

២. បដិសព្ទនឹងពាក្យ "ភ័ព្វ"

-ភ័ព្វ ≠ អភ័ព្វ

៣. វេវចនសព្ទនឹងពាក្យ "រថយន្ត" គឺ ឡាន។

៤. សទិសសព្ទនឹងពាក្យ "កំពុង"

-កំពុង(និ)(កិ.ជំ) ពាក្យនាំមុខកិរិយាសម្រាប់សម្តែងអំពើដែលនៅតែបន្ត, កាលដែលជាប់នៅក្នុងរវាង។ *ឧ. កំពុងរៀន...។*

-កំពុង(គុ) ដែលពេញកំពូកកណ្តាលឡើងមិនរាបស្មើ។ *ឧ. ថ្លាលកំពុង។*

-កំពង់(ន) ទីកន្លែងនៅមាត់ទឹកដែលជនានុជនចុះឡើងឬចតទូកជាដើម។ *កំពង់ទូក, កំពង់ទឹក...។*

ខ. ចូរតែងល្បះតាមរូបភាពខាងក្រោម។



<u>ពេលជិះម៉ូតូត្រូវពាក់មួកសុវត្ថិភាព។</u>

<u>នគរបាលជួយដឹកដៃក្មេងឆ្លងផ្លូវ។</u>

**មេរៀនទី**

**៥២ វេយ្យាករណ៍**

# ត្រីសព្ទ ឬសញ្ញាសក់ក «៊»

## លំហាត់

ក. ចូរស្រង់ពាក្យដែលមានប្រើត្រីសព្ទ ឬសញ្ញាសក់ក(៊)ក្នុងអត្ថបទខាងក្រោម។

> កាលពីម្សិលមិញម្ដាយខ្ញុំបានទៅផ្សារទិញសាប៊ូ ថ្នាំដុសធ្មេញ ប៊ីចេង ខ្ទឹម ម្រេច តៅហ៊ូ និងស៊ុតមួយចំនួនទៀត។ គាត់ភ្លេចទិញប៊ិក សៀវភៅ បន្ទាត់ ជ័រលុបឱ្យខ្ញុំ។ ខ្ញុំចូលចិត្តញ៉ាំស៊ុតចៀន និងនំប៉័ងជាងញ៉ាំតៅហ៊ូ។

☞ សាប៊ូ ប៊ីចេង តៅហ៊ូ ស៊ុត ប៊ិក ។

ខ. ចូរសរសេរពាក្យដែលមានសញ្ញា "៊" តាមរូបភាពខាងក្រោមឱ្យបានត្រឹមត្រូវ។



ប៊ិក ស៊ីម៉ង់ ទ្រអ៊ូ ហ៊ីង

គ. ចូរគូសរង្វង់ជុំវិញពាក្យដែលមានប្រើត្រីសព្ទ "៊" ក្នុងប្រអប់ខាងក្រោមឱ្យបានត្រឹមត្រូវ។

ចាប៉ី ស៊ី នំប៉ុ[illegible] [illegible]ន ប៉ុន សាប៊ូ ញ៉ាំ កៅស៊ូ ទាហាន
រអ៊ូ អ៊ុំ ប៊ីចេង [illegible]ប៉ុជ អ៊ំ ង៉ិកង៉ក់ ភាស៊ី ទូអ៊ូ គំរូ អ៊ូអរ
ឧស្សាហ៍ ហ៊ីង ម៉ាំ ហ៊ុន ស៊ុត អាស៊ីត

**មេរៀនទី**

**៥៣ អំណាន**

# បុណ្យសមុទ្រ

## សំណួរ

១. តើបុណ្យសមុទ្រប្រព្រឹត្តទៅនៅថ្ងៃណា? ខែណា? ឆ្នាំណា?

២. តើឆ្នេរសមុទ្រអូរឈើទាលស្ថិតនៅក្នុងខេត្តណា?

៣. តើបុណ្យសមុទ្រផ្ដោតលើអត្ថន័យសំខាន់ៗប៉ុន្មាន?

៤. ហេតុអ្វីបានជាគេរៀបចំបុណ្យសមុទ្រ?

## ចម្លើយ

១. បុណ្យសមុទ្រប្រព្រឹត្តទៅនៅថ្ងៃ៣១ ខែធ្នូ ឆ្នាំ២០១១។

២. ឆ្នេរសមុទ្រអូរឈើទាលស្ថិតនៅក្នុងខេត្តព្រះសីហនុ។

៣. បុណ្យសមុទ្រផ្ដោតលើអត្ថន័យសំខាន់ៗបួនគឺ ការផ្សព្វផ្សាយតំបន់ទេសចរណ៍ លើកកម្ពស់ឧស្សាហកម្មទេសចរណ៍ អប់រំ និងថែរក្សាឆ្នេរឱ្យមានសម្រស់ស្រស់ស្អាត។

៤. បានជាគេរៀបចំបុណ្យសមុទ្រ ដើម្បីប្ដេជ្ញាថែរក្សាឆ្នេរសមុទ្រឱ្យមានសោភ័ណភាពនិងអនាម័យ ដូចជាពាក្យស្លោកថា “ទីក្រុងស្អាត រមណីយដ្ឋានស្អាត សេវាកម្មល្អ”។

## ចម្លើយលំហាត់

១. បដិសព្ទនឹងពាក្យ “ថែរក្សា កុះករ”

- ថែរក្សា ≠ បំផ្លិចបំផ្លាញ

- កុះករ ≠ តិចតួច

២. វេវចនសព្ទនឹងពាក្យ "ប្រជាពលរដ្ឋ" គឺ៖ ប្រជាជន ប្រជារាស្ត្រ ប្រជាករ។

៣. សទិសសព្ទនឹងពាក្យ "កម្ម"

-កម្ម(ន) អំពើ, ទោះល្អក្តី អាក្រក់ក្តី ហៅថា *កម្ម*។

-កាំ(ន) អ្វីៗដែលរៀបជាជាន់, ជាថ្នាក់សម្រាប់ទល់, សម្រាប់ទ្រ, សម្រាប់រង។ *ឧ. កាំជណ្តើរ, កាំរទេះ..... ។*

៤. ស្រង់ពាក្យដែលមានបន្តក់ "់" ឱ្យបាន១០ពាក្យក្រៅពីអត្ថបទ។

☞ ស្រស់ សម្រាប់ នាក់ សំខាន់ អប់រំ សម្រស់ ក្បាច់ លក់ ដល់ ចប់។

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "កិត្តិយស ប្រារព្ធ"

- កិត្តិយស (ន) យសសក្តិដែលល្បីទូទៅ, កេរ្តិ៍ឈ្មោះដ៏រុងរឿង ។

- ប្រារព្ធ (កិ) តាំងផ្តើម, ផ្តួចផ្តើម។

២. បដិសព្ទនឹងពាក្យ "ភ្ញៀវជាតិ"

ភ្ញៀវជាតិ ≠ ភ្ញៀវអន្តរជាតិ

៣. វេវចនសព្ទនឹងពាក្យ "ពិភពលោក"គឺ៖ សកលលោក។

៤. សទិសសព្ទនឹងពាក្យ "មាន"

-មាន(កិ) បាន, កប, ប្រកបដោយ, កើត, បរិបូរដោយ, គង់នៅ, ឋិតនៅ.....: *ឧ. មានកូន ។*

-មៀន(ន) ឈ្មោះឈើមួយប្រភេទជាដំណាំស្រុក ផ្លែមូលៗ ទំហំមេដៃ វេលាទុំមានក្លិនសាច់ក្រអូប មានរស ផ្អែមប្រើជាបង្អែម : *ផ្លែមៀន ។*

-មៀន(ន) ចង្កឹះវែងស្រោបគល់ដងកាំបិតឬផ្គាក់ជាដើម ដើម្បីឱ្យជាប់មាំត្រង់អន្សារ : *មៀនកាំបិត ។*

# រឿងភាពស្មោះត្រង់

## សំណួរ

១. តើរឿងសិង្ហនិងឆ្កែគៀមានតួអង្គណាខ្លះ?

២. តើគេអាចចូលមើលសួនសត្វបានដូចម្តេច?

៣. តើបុរសកម្សត់ធ្វើដូចម្តេចដើម្បីចូលមើលសួនសត្វបាន?

៤. ហេតុអ្វីបានជាសត្វសិង្ហមិនស៊ីឆ្កែគៀ ដែលឆ្មាំសួនបោះឱ្យវា?

៥. តើសត្វសិង្ហជាសត្វដូចម្តេច?

## ចម្លើយ

១. រឿងសិង្ហនិងឆ្កែគៀមានតួអង្គ បុរសកម្សត់ ឆ្មាំទ្វារ សិង្ហ និងឆ្កែគៀ។

២. គេអាចចូលមើលសួនសត្វបានដោយទិញសំបុត្រ បើគ្មានប្រាក់ទិញ ត្រូវយកឆ្កែ ឆ្មាជាចំណីសម្រាប់សត្វធំៗជំនួសក៏បាន។

៣. ដើម្បីចូលមើលសួនសត្វបាន បុរសកម្សត់បានចាប់ឆ្កែគៀ តាមផ្លូវទៅឱ្យឆ្មាំទ្វារដើម្បីប្តូរនឹងសំបុត្រ។

៤. បានជាសត្វសិង្ហមិនស៊ីឆ្កែគៀ ដែលឆ្មាំសួនបោះឱ្យវា ព្រោះវាស្រឡាញ់រាប់អានឆ្កែគៀនោះធ្វើជាមិត្តភក្តិ។

៥. សត្វសិង្ហជាសត្វដែលមានភាពស្មោះត្រង់ និងជាមិត្តល្អ។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ “ឈឺ ថ្មី”

ឈឺ ≠ ជា, ថ្មី ≠ ចាស់

២. រកវេវចនសព្ទនឹងពាក្យ “សព” គឺ ខ្មោចស្រស់។

៣. រកសទិសសព្ទនឹងពាក្យ “សព”

-សព(ន) ខ្មោចស្រស់, រូបបុគ្គលស្លាប់ : *ធ្វើបុណ្យសព* ។

-សប់(កិ) ស្រូបដោយខ្យល់, ទាញរុញដោយដៃស្ទប់រឿយៗឱ្យមានខ្យល់ : *សប់កង់* ។

-សព្វ(គុ.ឬកិ.វិ) ទាំងពួង, ទាំងអស់, ទាំងមូល, ទាំងស្រុង, ទូទៅ, គ្រប់, រាល់...: *ចេះសព្វមុខវិជ្ជា* ។

-សព្វ(កិ.វិ ឬគុ) ពេញ, គាប់, ស្មោះស្ម័គ្រ, ត្រូវ, ឥតខុស, ឥតទាស់ (រ.ស និង ស.ស) *សព្វព្រះទ័យ* ។

-សប្តិ(កិ) យល់សុបិនឃើញអ្វីមួយនៅពេលដេកលក់ : *យល់សប្តិ* ។

៤. គូសញ្ញា ✓ នៅក្នុងប្រអប់ចម្លើយមួយដែលត្រឹមត្រូវ។ រឿងសិង្ហ និងឆ្កែតៀអប់រំឱ្យ៖

☐ ចេះស្រឡាញ់រាប់អានគ្នា។

☐ ចេះស្មោះត្រង់នឹងគ្នា ដោយមិនរើសអើង។

☑ <u>*ចេះស្រឡាញ់ស្មោះត្រង់ និងយោគយល់គ្នា។*</u>

☐ ចេះអធ្យាស្រ័យល្អចំពោះគ្នាទៅវិញទៅមក។

មេរៀនទី ៥៥ ការនិយាយ

# បកស្រាយរូបភាព «ការសម្អាតបរិស្ថាន»

## សំណួរ

១. តើសុភាពនិងដារ៉ាកំពុងធ្វើអ្វី?

២. តើរូបភាពនោះនិយាយអំពីអ្វី?

៣. តើការសម្អាតបរិស្ថានមានសារៈសំខាន់ដូចម្ដេចខ្លះ?

៤. តើអ្នកធ្លាប់ចូលរួមសម្អាតបរិស្ថានតាមភូមិរបស់អ្នកដែរឬទេ? ហេតុអ្វី?

## ចម្លើយ

១. សុភាពនិងដារ៉ាកំពុងជជែកគ្នាអំពីរូបភាពមួយ។

២. រូបភាពនោះនិយាយអំពីការសម្អាតបរិស្ថាន។

៣. ការសម្អាតបរិស្ថានមានសារៈសំខាន់ធ្វើឱ្យមានអនាម័យនិងសោភ័ណភាពស្រស់បំព្រង។

៤. ខ្ញុំធ្លាប់ចូលរួមសម្អាតបរិស្ថានតាមភូមិរបស់ខ្ញុំដែរ ព្រោះដើម្បីឱ្យភូមិខ្ញុំមានសោភ័ណភាព និងមានអនាម័យល្អសម្រាប់ការរស់នៅរបស់អ្នកភូមិ។

**មេរៀនទី ៥៦ អំណាន**

# កន្លែងទេសចរណ៍ក្នុងប្រទេសកម្ពុជា

## សំណួរ

១. តើកន្លែងទេសចរណ៍ដែលជាប្រាសាទបុរាណមានចំនួនប៉ុន្មាន? អ្វីខ្លះ?

២. តើកន្លែងទេសចរណ៍ធម្មជាតិមានចំនួនប៉ុន្មាន? អ្វីខ្លះ?

៣. តើយើងត្រូវធ្វើដូចម្ដេច ដើម្បីឱ្យសម្បត្តិទាំងនេះនៅគង់វង្ស?

## ចម្លើយ

១. កន្លែងទេសចរណ៍ដែលជាប្រាសាទបុរាណមានជាច្រើនដូចជា៖ ប្រាសាទអង្គរ ប្រាសាទព្រះខ័ន ប្រាសាទបន្ទាយក្ដី ប្រាសាទបាពួន ប្រាសាទនាគព័ន្ធ ប្រាសាទបាគង ប្រាសាទបាយ័ន ប្រាសាទបន្ទាយស្រី ប្រាសាទបក្សីចាំក្រុង ប្រាសាទមេបុណ្យ ព្រះបណ្ណាល័យ ប្រាសាទកោះកេរ និងប្រាសាទព្រះវិហារ។

២. កន្លែងទេសចរណ៍ធម្មជាតិមានចំនួនជាចម្រើនកន្លែង ដូចជា៖ ទឹកជ្រោះសែនមនោរម្យ ទឹកជ្រោះប៊ូស្រា បឹងយក្សឡោម សមុទ្រឈើ និងឆ្នេរសមុទ្រ។

៣. ដើម្បីឱ្យសម្បត្តិទាំងនេះនៅគង់វង្ស យើងត្រូវថែះថែរក្សាការពារ

កុំឱ្យមានជនអាក្រក់មកបំផ្លិចបំផ្លាញបានជាដាច់ខាត។

## ចម្លើយលំហាត់

១. សូត្រមេសូត្រឡើងវិញ

២. រកពាក្យបដិសព្ទនឹងពាក្យ "ល្អ បុណ្យ"

ល្អ ≠ អាក្រក់

បុណ្យ ≠ បាប

៣. រកវេវចនសព្ទនឹងពាក្យ "នេត្រា" គឺ ភ្នែក ព្រះនេត្រ ចក្ខុ។

៤. រកសទិសសព្ទនឹងពាក្យ "វង្ស"

-វង្ស(ន) ពូជ, ជំហូរ, ផ្លូវ, ត្រកូល, របា, ត្រកូល, តំណត្រកូល, ជាតិ(រ.ស) *រាជវង្ស*។

-វង់(កិ) ធ្វើជារង្វង់, ធ្វើឱ្យមានសណ្ឋានមូល, គូសវាសឱ្យមូល : *វង់ភ្នែកក្រោក, វង់វៀន, ឈរវង់*។

-វង់(ន) មណ្ឌលមូល, ទីមានមណ្ឌលមូល, អ្វីៗដែលមានសណ្ឋានមូល, ក្រុមមនុស្សដែលប្រមូលផ្ដុំគ្នា : *វង់ភ្លេង, វង់ល្បែង*។

៥. រកពាក្យផ្ទួននឹងពាក្យខាងក្រោមពីក្នុងអត្ថបទ។

- ទោសចរណ៍ : ចួននឹងពាក្យ ...*បវរ*... ចួននឹងពាក្យ ...*ល្អ*...

- ដូនតា : ចួននឹងពាក្យ ...*នេត្រា*...

៦. តើមេសូត្រនេះនិយាយអំពីអ្វី? គូសសញ្ញា ✓ក្នុងប្រអប់នូវចម្លើយ

មួយត្រឹមត្រូវជាងគេ។

☐ ប្រាសាទបុរាណ ☑ *<u>កន្លែងទេសចរណ៍</u>*

☐ ទឹកជ្រោះ ☐ ឆ្នេរសមុទ្រ

**សំណេរ**

ក. សរសេរតាមអាន

**ពន្យល់ពាក្យ**

-សម្បត្តិ (ន) សេចក្ដីសម្រេច, ការសមប្រកប; ការបរិបូណ៌; ការគ្រប់ព្រមឬគ្រប់គ្រាន់; សេចក្ដីសុខ; លំអ; គុណភាព; ទ្រព្យ, ធនធាន : *មានសម្បត្តិ*។

-ប្រជាខេមរា (ន) ប្រជាជនខ្មែរ

**ចម្លើយលំហាត់**

១. រកបដិសព្ទនឹងពាក្យ "ខ្ពស់ គង់វង្ស"

| | | |
|---|---|---|
| ខ្ពស់ | ≠ | ទាប |
| គង់វង្ស | ≠ | អន្តរាយ |

២. រកវេវចនសព្ទនឹងពាក្យ "សង់" គឺ៖ សាងសង់ កសាង ស្ថាបនា បង្កើត។

៣. រកសទិសសព្ទនឹងពាក្យ "ជា"

-ជា(ន) ឈ្មោះពស់មួយប្រភេទ មានពិសខ្លាំង, កាលនៅតូចហៅ *ពស់ជា*, លុះធំទ្រើសបន្តិចហៅ *ពស់ក្រាយ*, ដល់ធំអស់ទំហំហៅ *ពស់វែក*។

-ជា(គុ) ស្រួល, ល្អ, សុខ, សប្បាយ, រួចពីឈឺ ។

-ជា (កិ) ពាក្យសម្រាប់និយាយចង្អុរនាមសព្ទឱ្យដាច់សេចក្ដី ដោយឡែក : *វិជ្ជាជាសម្បត្តិដ៏ប្រសើរក្នុងលោក ។*

-ជា(ន ឬ គុ) ដែលទីទៃពីនៅកំដរទ្រព្យគេ : *មនុស្សអ្នកជា ។*

-ចៀរ(កិ) ចិត ឬកាត់ឱ្យជាចំនៀរ : *ចៀរស្លឹកចេក ។*

-ជាល(ន) ប្រដាប់ត្បាញដោយបន្ទោះមានក្រឡាប្រហោង សណ្ឋានក្រឡាសំណាញ់ : *ពោតមួយជាល ។*

-ជាល(ន) ឈ្មោះនំមួយប្រភេទ : *នំជាល ។*

ខ. ជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញមេស្ទូត្រខាងក្រោម។

| ប្រពៃ | បវរ | នាគព័ន្ធ | ប្រាកដ |
|---|---|---|---|

កម្ពុជារដ្ឋ សម្បូរ...*ប្រាកដ*... កន្លែងទេសចរណ៍

បុរាណប្រាសាទ អង្គរ...*បវរ*... ព្រះខ័នសែនល្អ

ទាំងបន្ទាយក្ដី។

បាពួន...*នាគព័ន្ធ*... បាគងបាយ័ន ល្អបន្ទាយស្រី

បក្សីចាំក្រុង មេបុណ្យ...*ប្រពៃ*... ព្រះបណ្ណាល័យ

បារាយណ៍ស្រះស្រង់។

គ. ចូរតែងសេចក្ដីពណ៌នាពីរូបភាពគេហដ្ឋានមួយ។

**សេចក្ដីអធិប្បាយ**

ថ្ងៃមួយ ខ្ញុំបានទៅទស្សនាគេហដ្ឋានថ្មីមួយដែលសង់ឡើងអំពីឈើប្រក់ក្បឿង។ វាគឺជាផ្ទះរបស់ម្ដាយធំខ្ញុំនៅឯស្រុកកំណើត ស្ថិត

នៅក្បែរភ្នំជើងព្រៃ ខេត្តកំពង់ចាម។

បើយើងមើលពីចម្ងាយ យើងឃើញដំបូលផ្ទះពណ៌ក្រហមព្រឿងៗ លេចចេញតាមចន្លោះចុងព្រឹក្សាដែលកំពុងបក់រវិចៗ គួរឱ្យចង់គយគន់។ លុះពេលចូលទៅជិតដល់ ស្រាប់តែ គេហដ្ឋានដ៏ប្រណីតមួយឈរជង្រ្កោងនៅចំកណ្ដាលដីឡូត៍ដ៏ធំល្វឹងល្វើយ មានរុក្ខផលដាំជាជួរៗ មានម្លប់ត្រជាក់ល្ហឹមគួរឱ្យចង់រស់នៅ។ គេហដ្ឋាននេះសង់ខ្ពស់ផុតពីដី មានសសរបីជួរ មានជញ្ជាំងពណ៌ត្រាវ និងលម្អដោយទ្វារបង្អួចពណ៌ផ្ទៃមេឃ។ ចំណែកដំបូលវិញ ប្រក់ក្បឿងស្រកាលេញរបស់ខ្មែររត់ជាជួរតម្រៀបគ្នាបាំងកម្ដៅព្រះអាទិត្យមិនឱ្យជះចូលក្នុងផ្ទះ។ រីឯបរិវេណនៃគេហដ្ឋាននេះមានរបៀបរៀបរយល្អណាស់ គឺមានសួន-ច្បារ មានដើមឈើហូបផ្លែ និងអមទៅដោយរបងព័ទ្ធជុំវិញ។ បើនិយាយអំពីផ្នែកខាងក្នុងនៃគេហដ្ឋានវិញពិតជាស្អាតណាស់។ ម្ដាយធំខ្ញុំចេះរៀបចំទុកដាក់សម្ភារៈយ៉ាងមានសណ្ដាប់ធ្នាប់ឥតខ្ចោះតែម្ដង គឺមានទូតាំងដែលមានផ្ទុកដោយរបស់ប្រើប្រាស់ស្អាតៗ មានកៅអីសាឡុងដែលជូតសម្អាតភ្លឺរលោង និងនៅតាមជញ្ជាំងមានតាំងរូបថតជាច្រើន។

គេហដ្ឋាននោះទាក់ទាញចិត្តខ្ញុំឱ្យចង់រស់នៅណាស់។ ខ្ញុំសង្ឃឹមថា ថ្ងៃក្រោយ ពេលខ្ញុំធំឡើង ខ្ញុំនឹងខិតខំរកលុយធ្វើផ្ទះឱ្យស្អាតដូចផ្ទះរបស់ម្ដាយធំខ្ញុំអ៊ីចឹង។

# បន្តក់ «់»

## លំហាត់

ក. ចូរស្រង់ពាក្យដែលមានបន្តក់ "់" ពីក្នុងអត្ថបទខាងក្រោមឱ្យបានត្រឹមត្រូវ។

រដូវប្រាំងឈានផុតទៅ.............................................
..........................................ព្រឹក្សាសល់តែចុងលីមៗ។

ខ. ចូររកពាក្យដែលប្រើបន្តក់ (់) ឱ្យបាន១០ពាក្យ ក្រៅពីអត្ថបទ។

## ចម្លើយ

ក. ពាក្យដែលមានប្រើបន្តក់(់)៖ ដល់ ផ្កាប់ ផ្លាស់ ក្រាស់ ដណ្តប់ លាន់ បាញ់ បក់ អស់ ស្រក់ គ្រាប់ ល្អក់ សំណាត់ រសាត់ សល់។

ខ. ពាក្យដែលប្រើបន្តក់(១០ពាក្យ)មានដូចជា៖ បាល់ រាល់ ចាស់ កំណត់ សំពត់ បាញ់ សក់ កក់ ប្រើប្រាស់ ចំណាស់។

មេរៀនទី ៥៨ អំណាន

# ធនធានធម្មជាតិ

## សំណួរ

១. តើប្រទេសកម្ពុជាសម្បូរធនធានធម្មជាតិនៅកន្លែងណាខ្លះ?

២. តើតំបន់ព្រៃភ្នំមានធនធានធម្មជាតិអ្វីខ្លះ?

៣. តើតំបន់ខ្ពង់រាប និងវាលទំនាបមានធនធានធម្មជាតិអ្វីខ្លះ?

៤. តើប្អូនត្រូវថែរក្សាការពារធនធានធម្មជាតិដូចម្ដេច?

## ចម្លើយ

១. ប្រទេសកម្ពុជាសម្បូរធនធានធម្មជាតិនៅគ្រប់ទីកន្លែង ដូចជានៅក្នុងទន្លេ សមុទ្រ ព្រៃភ្នំ ក្នុងដីជាដើម។

២. តំបន់ព្រៃភ្នំមានធនធានធម្មជាតិដូចជា រ៉ែ ព្រៃឈើ ម្រឹគីម្រឹគា បក្សាបក្សី។

៣. តំបន់ខ្ពង់រាប និងវាលទំនាបមានធនធានធម្មជាតិដូចជា ដំណាំផ្លែឈើ និងស្រែចម្ការនានា។

៤. ខ្ញុំត្រូវថែរក្សាការពារធនធានធម្មជាតិទាំងនោះដោយមិនបំផ្លិចបំផ្លាញវា ដើម្បីប្រយោជន៍ផ្ទាល់ខ្លួន ហើយត្រូវគោរពច្បាប់នានាដែលទាក់ទងនឹងការការពារបរិស្ថាន។

## ចម្លើយលំហាត់

១. ស្វាត្រមេស្វាត្រឡើងវិញ

២. រកបដិសព្ទនឹងពាក្យ "វែង រាប"

វែង ≠ ខ្លី

រាប ≠ ទួល

៣. រកវេវចនសព្ទនឹងពាក្យ "ប្រពៃ" គឺ ល្អ ត្រឹមត្រូវ។

៤. រកសទិសសព្ទនឹងពាក្យ "រាប"

-រាប(គុ) ដែលមិនរដិបរដុប, ដែលឥតប៉ោង, ឥតផត, ឥតខ្ពស់ទាប។ *ឧ. ដីរាប, ផ្លូវរាប។*

-រៀប(កិ) ធ្វើឱ្យមានរបៀប, ចាត់របៀប : *រៀបផ្ទះ។*

-រៀប(កិ) (*ភ្ជាប់ជាមួយ-រាប់*) : និយាយបូរបាច់តាមរបៀបហូរហែ ឬនិយាយដំណាលតាមរបៀបរឿងរ៉ាវ។ *ឧ. លោកគ្រូរៀបរាប់ពីដំណើររឿងទុំទាវឱ្យសិស្សស្តាប់។*

-រៀប(និ) ទៀប, ហៀប, ជិត, រកកល់, ទៀបនឹង, ស្ទើរនឹង។ *ឧ. ខ្ញុំរៀបនឹងនិយាយប្រាប់អ្នកទៅហើយ។*

៥. រកពាក្យចួនក្នុងអត្ថបទមេសូត្រ "ធនធានធម្មជាតិ"។

- វគ្គទី១៖ កម្ពុជា ⟷ នានា

  កន្លែង ⟷ វែង ⟷ ស្វែង

- វគ្គទី២៖ ភ្នំ ⟷ ធំ

  ទៀត ⟷ ព្រាត ⟷ ញាតិ

- វគ្គទី៣៖ រាប ⟷ ទំនាប

ក្រៃ ⟷ ប្រពៃ ⟷ ថ្លៃ

- ចួនឆ្លងវគ្គទី១និងទី២៖ ជាតិ ⟷ ទៀត

- ចួនឆ្លងវគ្គទី២និងទី៣៖ ព្រៃ ⟷ ក្រៃ

៦. គូសសញ្ញា ✓ ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវដែលទាក់ទងនឹងធនធានធម្មជាតិ។

☐ ដំណាំកសិករភូមិយើងមាន ចេក ល្ហុង ស្វាយ ស្រូវជាច្រើន។

☑ *សងខាងផ្លូវពីកែវសីមាទៅទីរួមខេត្តមណ្ឌលគិរីមានឈើតូចធំសត្វព្រៃ ជ្រោះជ្រលងផងអូរ ភ្នំ ស្រស់បំព្រង។*

☐ សាលាបឋមសិក្សាយើងមានអគារ ទីធ្លា ដើមឈើ សួនច្បារល្អស្អាត។

### សំណេរ

ក. សរសេរតាមអាន

### ចម្លើយលំហាត់

១. ពន្យល់ពាក្យ “បក្សា ផលា”

- បក្សា (ន) សត្វស្លាបទាំងឡាយ (ខ្មែរយើងប្រើតាមទម្លាប់ សំដៅចំពោះតែពួកសត្វស្លាបឈ្មោល) ។

- ផល (ន) ផ្លែ; សេចក្ដីចម្រើន; លាភ; ចំណេញ; រង្វាន់; សម្បត្តិ; សេចក្ដីរុងរឿង; ការដុះដាល; ប្រយោជន៍ដែលបាន

សម្រេចហើយ; អ្វីៗដែលកើតមកអំពីហេតុ; សុខទុក្ខដែលកើតអំពីកម្ម។

២. រកបដិសព្ទនឹងពាក្យ "ថ្កើងថ្កាន"

ថ្កើងថ្កាន ≠ ថមថយ

៣. រកវេវចនសព្ទនឹងពាក្យ "អឺងកង" គឺៈ អឺងអាប់ អ៊ូអរ គឹកកង កងរំពង។

ខ. តែងល្បះទាក់ទងនឹងរូបភាពខាងក្រោមឱ្យបានពីរល្បះ។



១. ពួកកសិករកំពុងភ្ជួររាស់ដី ដើម្បីស្ទូងស្រូវ។

២. មីងៗកសិករកំពុងស្ទូងស្រូវយ៉ាងញាប់ដៃ។

គ. សរសេរតែងសេចក្តីពណ៌នាអំពីសាលារៀន។

## សេចក្តីអធិប្បាយ

សព្វថ្ងៃនេះ ខ្ញុំរៀននៅសាលាបឋមសិក្សាក្រពើហា។ សាលារៀននេះមានទីតាំងស្ថិតនៅក្នុងទីក្រុងតាខ្មៅ ទីរួមខេត្តកណ្តាល។

ទិដ្ឋភាពសាលារៀននេះ បើមើលពីចម្ងាយ យើងឃើញតែ

ដំបូលក្បឿងលីមៗ ព្រោះមានដើមឈើជាច្រើននៅព័ទ្ធជុំវិញ។ ប៉ុន្តែពេលចូលជិត ក្លោងទ្វារនៅឈរចង្គ្រោងរំលេចអក្សរធំៗថា "សាលាបឋមសិក្សាក្រពើហា" រង់ចាំស្វាគមន៍លោកគ្រូ អ្នកគ្រូ ព្រមទាំងសិស្សានុសិស្សគ្រប់រូប។ សាលារៀននេះមានរបងស៊ីម៉ង់ត៍ព័ទ្ធជុំវិញ និងមានដើមឈើផ្ដល់ម្លប់ត្រឈឹងត្រឈៃ។ បរិវេណសាលាលម្អទៅដោយសួនច្បារដែលមានផ្កាវីកស្គុះស្គាយចម្រុះពណ៌។ នៅចំកណ្ដាលទីធ្លាមានទង់ជាតិបក់រវិចៗពួដ៏អាកាស។ រីឯផ្លូវចូលសាលារៀន ក៏ដូចជាផ្លូវក្នុងទីធ្លាសាលាបានចាក់បេតុងយ៉ាងរឹងមាំងាយស្រួលដល់ការធ្វើដំណើរ។ ជាងនេះទៅទៀត សាលារៀនខ្ញុំមានអគារធ្វើអំពីថ្មយ៉ាងស្អាតតម្រៀបគ្នាជាជួរចំនួនបីខ្នង និងមានទីចាត់ការមួយខ្នង។ ដូចគ្នានេះដែរ បើយើងចូលទៅមើលនៅខាងក្នុងបន្ទប់រៀននីមួយៗសុទ្ធតែត្រូវបានរៀបចំយ៉ាងស្អាត និងមានសណ្ដាប់ធ្នាប់។ តុ កៅអីតម្រៀបជាជួរៗ លម្អដោយផ្ទាំងរូបភាព ពាក្យស្លោក និងតារាងផ្សេងៗ ដែលទាក់ទាញសិស្សឱ្យចង់មករៀននៅសាលានេះ។

ខ្ញុំស្រឡាញ់សាលារៀននេះណាស់ ព្រោះវាជាថ្នាលបណ្ដុះចំណេះដឹងដល់ខ្ញុំ ហើយខ្ញុំនឹងខិតខំរៀនឱ្យបានពូកែ។

មេរៀនទី
៥៩ អំណាន

# បំណងខ្ញុំ

## សំណួរ

១. តើនៅក្នុងមេសូត្រខាងលើនេះ គេនឹកមមៃចង់បានអ្វី?

២. ចំពោះអ្នកវិញ តើអ្នកចង់បានដូចគេដែរឬទេ? ព្រោះអ្វី?

៣. តើអ្នកចង់ធ្វើសួនដំណាំ និងចិញ្ចឹមសត្វដែរឬទេ? ព្រោះអ្វី?

## ចម្លើយ

១. នៅក្នុងមេសូត្រខាងលើនេះ គេនឹកមមៃចង់បានផ្ទះតូចមួយនៅក្បែរជើងភ្នំ។

២. (ចម្លើយអាស្រ័យលើសិស្ស)

៣. ខ្ញុំចង់ធ្វើសួនដំណាំ និងចិញ្ចឹមសត្វដែរ ព្រោះដើម្បីបង្កើនជីវភាពគ្រួសារឱ្យបានធូរធារ។

## ចម្លើយលំហាត់

១. អានពាក្យខាងក្រោម៖ ប្រប បណ្ដុះ គ្រសុំ ប្របមាត់ស្ទឹង

២. រកបដិសព្ទនឹងពាក្យ "ជិត ធាត់"

ជិត ≠ ឆ្ងាយ

ធាត់ ≠ ស្គម

៣. រកវេវចនសព្ទនឹងពាក្យ "អាហារ" គឺ៖ ម្ហូប ចំណី ភោជន។

៤. រកសទិសសព្ទនឹងពាក្យ "ទុក"

-ទុក(កិ) ដាក់វត្ថុអ្វីក្នុងទីណាមួយដើម្បីឱ្យគង់នៅ ឬរក្សាអ្វីៗ ឱ្យគង់ : *ទុករបស់របរ។* បម្រុង: *ទុកបាយឱ្យ។*

-ទុក្ខ(ន) សេចក្ដីព្រួយ, សេចក្ដីលំបាក : *កើតទុក្ខ។*

៥. រកពាក្យចួន "ផ្ទះ ភ្នំ" ក្នុងវគ្គទី១។

ផ្ទះ ⟝ ស្រឡះ

ភ្នំ ⟝ ធំ ⟝ ត្រសុំ

**សំណេរ**

ក. សរសេរតាមអាន

ខ. ជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញចន្លោះវគ្គមេស្សូត្រ៖

| |
|---|
| ព្រោះ មែកត្រសុំ អាហារ ស្រឡះ ប្របមាត់ ដំណាំ |

ខ្ញុំនឹកមមៃចង់បានផ្ទះ មួយតូច...*ស្រឡះ*...ក្បែរជើងភ្នំ

សង់...*ប្របមាត់*...ស្ទឹងមានឈើធំ បែក...*មែកត្រសុំ*...ម្លប់សាខា។

នៅជុំជិតផ្ទះខ្ញុំនឹងដាំ អស់ទាំង...*ដំណាំ*...ធ្វើសួនច្បារ

ខ្ញុំ...*ព្រោះ*...បណ្ដុះឈើផ្លែផ្កា ទុកធ្វើ...*អាហារ*...រៀងរាល់ថ្ងៃ។

គ. តែងល្បះនឹងពាក្យ "ដាំ ចិញ្ចឹម" ឱ្យបានពីរល្បះ៖

១. ជីតាខ្ញុំ...*ចូលចិត្ត*...ដាំ...*ដើមឈើនៅជុំវិញផ្ទះ*...។

២. សុភាព...*ទិញពូជត្រីមក*...ចិញ្ចឹម...*ក្នុងស្រះ*...។

# រឿងភូមិ ឃុំមានសុវត្ថិភាព

## សំណួរ

១. តើគេបិទប្រកាសនៅឯណា?

២. តើប្រុញនិងស៊ីថានាំគ្នាមើលអ្វីនៅមុខសាលាឃុំ?

៣. តើភូមិ ឃុំមានសុវត្ថិភាពដែលមានប្រាំបួនប្រការគឺអ្វីខ្លះ? ចូររៀបរាប់។

៤. បើភូមិ ឃុំមានសុវត្ថិភាព តើការរស់នៅរបស់ប្រជាពលរដ្ឋយ៉ាងណាដែរ?

## ចម្លើយ

១. គេបិទប្រកាសនៅឯសាលាឃុំ។

២. ប្រុញនិងស៊ីថានាំគ្នាមើលសេចក្ដីប្រកាសព័ត៌មានថ្មីមួយ នៅមុខសាលាឃុំ។

៣. ភូមិ ឃុំមានសុវត្ថិភាពដែលមានប្រាំបួនប្រការគឺ៖

1. គ្មានអំពើលួច឴ឆក់ប្លន់
2. គ្មានការផលិតចែកចាយ និងប្រើប្រាស់គ្រឿងញៀនខុសច្បាប់
3. គ្មានអំពើអនាចារ ការជួញដូរស្ត្រី កុមារ និងអំពើហិង្សាក្នុងគ្រួសារ

4. គ្មានក្មេងទំនើង
5. គ្មានការលេងល្បែងស៊ីសង គ្មានការប្រើប្រាស់អាវុធខុសច្បាប់ និងបទល្មើសគ្រប់ប្រភេទ
6. គ្មានគ្រោះថ្នាក់ចរាចរណ៍
7. គ្មានគ្រោះថ្នាក់ដោយសារគ្រាប់យុទ្ធភ័ណ្ឌមិនទាន់ផ្ទុះ
8. មានវិធានការទប់ស្កាត់ គ្រប់គ្រង និងឆ្លើយតបចំពោះគ្រោះមហន្តរាយប្រកបដោយប្រសិទ្ធភាព
9. គ្មានការត្រួតពិនិត្យខុសច្បាប់

៤. បើភូមិ ឃុំមានសុវត្ថិភាព ការរស់នៅរបស់ប្រជាពលរដ្ឋក៏បានសុខសាន្ត។

## ចម្លើយលំហាត់

១. ពន្យល់ពាក្យ "សុវត្ថិភាព"

- សុវត្ថិភាព(ន) ការមានសួស្ដី, ការប្រកបដោយសេចក្ដីសុខ។

២. រកបដិសព្ទនឹងពាក្យ "គ្មាន សុខសាន្ត"

- គ្មាន ≠ មាន
- សុខសាន្ត ≠ ទុក្ខភ័យ

៣. រកវេវចនសព្ទនឹងពាក្យ "កុះករ" គឺ៖ អ៊ូអរ ស្អេកស្កះ ដេរដាស មីរ តាន់តាប់ កកកុញ ត្រៀបត្រា ។

៤. រកសទិសសព្ទនឹងពាក្យ "មាន"

-មាន(កិ) បាន, កប, ប្រកបដោយ, កើត, បរិបូរដោយ, គង់នៅ, ឋិតនៅ.....: *ឧ. មានកូន, មានលុយចាយ ។*

-មៀន(ន) ឈ្មោះឈើមួយប្រភេទជាដំណាំស្រុក ផ្លែមូលៗទំហំមេដៃ វេលាទុំមានក្លិនសាច់ក្រអូប មានរសផ្អែម ប្រើជាបង្អែម : *ផ្លែមៀន ។*

-មៀន(ន) ចង្កឹះវែងស្រោបគល់ដងកាំបិត ឬផ្ដាក់ជាដើម ដើម្បីឱ្យជាប់មាំត្រង់អន្សារ : *មៀនកាំបិត ។*

៥. គូសសញ្ញា ✓ ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវ។

☐ ប្រជាជនក្នុងភូមិរួមគ្នាជាមួយមេឃុំដើម្បីអភិវឌ្ឍភូមិ ឃុំឱ្យមានការរីកចម្រើន។

☐ ប្រជាជនក្នុងភូមិរួមគ្នាជាមួយមេឃុំដើម្បីអភិវឌ្ឍស្ពាន ផ្លូវឱ្យមានការរីកចម្រើន។

☑ *ប្រជាជនក្នុងភូមិរួមគ្នាជាមួយមេឃុំដើម្បីអភិវឌ្ឍភូមិ ឃុំឱ្យមានសុវត្ថិភាព។*

☐ ប្រជាជនក្នុងភូមិរួមគ្នាជាមួយមេឃុំដើម្បីអភិវឌ្ឍសាលារៀនឱ្យមានការរីកចម្រើន។

**មេរៀនទី**

**៦១ អំណាន**

# ឧបករណ៍តន្ត្រីខ្មែរ

## សំណួរ

១. តើនរណាជាអ្នកបង្កើតឱ្យមានតូរ្យតន្ត្រីខ្មែរ?

២. តើឧបករណ៍តូរ្យតន្ត្រីខ្មែរមានអ្វីខ្លះ?

៣. តើឧបករណ៍និងបទភ្លេងខ្មែរបុរាណគេយកទៅប្រើប្រាស់ក្នុងពិធីអ្វីខ្លះ?

៤. តើអ្នកត្រូវធ្វើដូចម្ដេច ដើម្បីឱ្យតូរ្យតន្ត្រីខ្មែរបានគង់វង្ស?

## ចម្លើយ

១. អ្នកបង្កើតឱ្យមានតូរ្យតន្ត្រីខ្មែរ គឺបុព្វបុរសខ្មែរ។

២. ឧបករណ៍តូរ្យតន្ត្រីខ្មែរមានៈ ទ្រ ស្គរ តាខេ ឃឹម រនាត គង ស្រឡៃ ចាប៉ី សាដៀវ ឈិង ឆាប ក្រាប។ល។

៣. ឧបករណ៍និងបទភ្លេងខ្មែរបុរាណគេយកទៅប្រើប្រាស់ក្នុងពិធីបុណ្យប្រពៃណីផ្សេងៗ ដូចជាៈ បុណ្យផ្កា កឋិន បំបួសនាគ ចូលឆ្នាំ ភ្ជុំបិណ្ឌ។ល។

៤. ដើម្បីឱ្យតូរ្យតន្ត្រីខ្មែរបានគង់វង្ស ខ្ញុំត្រូវស្រឡាញ់ និងថែរក្សាវាកុំឱ្យបាត់បង់ ហើយត្រូវផ្សព្វផ្សាយឱ្យមនុស្សជំនាន់ក្រោយបានស្គាល់គ្រប់ៗគ្នា។

## ចម្លើយលំហាត់

១. ស្រង់បដិសព្ទពីក្នុងអត្ថបទនឹងពាក្យ "ងាយ"

ងាយ ≠ លំបាក

២. ស្រង់វេវចនសព្ទពីក្នុងអត្ថបទនឹងពាក្យ "ផលិត" គឺៈ បង្កើត ធ្វើ។

៣. ស្រង់សទិសសព្ទពីក្នុងអត្ថបទនឹងពាក្យ "វង់"

-វង់(កិ) ធ្វើជារង្វង់, ធ្វើឱ្យមានសណ្ឋានមូល, គូសវាសឱ្យមូល : *វង់វៀន, ឈរវង់* ។

-វង់(ន) មណ្ឌលមូល, ទីមានមណ្ឌលមូល, អ្វីៗដែលមានសណ្ឋានមូល, ក្រុមមនុស្សដែលប្រមូលផ្តុំគ្នា : *វង់ភ្លេង* ។

-វង្ស(ន) ពូជ, ជំបួរ, ផ្លូវ, ក្រសែ, របា, ត្រកូល, តំណត្រកូល, ជាតិ(រ.ស) *រាជវង្ស* ។

៤. ផ្គូផ្គងពាក្យនាម គុណនាម និងកិរិយាខាងក្រោម។

| | | | |
|---|---|---|---|
| ស្គរ | ដេញ | ខ្មែរ | ពីរោះ |
| ទ្រ | ដំ | សំនៀង | យូរលង់ |
| តាខេ | ផ្លុំ | កាល | បុរាណ |
| ប៉ី | កូត | | |

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "អារម្មណ៍ អតីតកាល"

- អារម្មណ៍ (ន) គ្រឿងគោង; គ្រឿងញួរ; គ្រឿងទាញឬទាញទាក់; គ្រឿងគោងរបស់ចិត្ត; គំនិត; ការដឹង... ។

- អតីតកាល (ន) កាលកន្លងទៅហើយ។

២. រកបដិសព្ទនឹងពាក្យ "រុងរឿង"

រុងរឿង ≠ អន់ថយ

៣. រកវេវចនសព្ទនឹងពាក្យ "នគរ" គឺ៖ ប្រទេស បុរី រដ្ឋ ។

៤. រកសទិសសព្ទនឹងពាក្យ "អ្នក"

-អ្នក( បុ.ស) ពាក្យសម្រាប់ប្រើជំនួស ឈ្មោះបុគ្គលដែលត្រូវនិយាយទៅរកក្នុងទីចំពោះមុខ។ *អ្នក! អញ្ជើញចូល។*

-អ្នក(ន) បុគ្គល. ជន. មនុស្ស។ ពាក្យសម្រាប់នាំមុខសព្ទដទៃ : *អ្នកក្រ. អ្នកស្រែ. អ្នកចម្រៀង។*

-នាក់(ន.វនាប់) ពាក្យសម្រាប់ប្រើខាងចុងគុ.ចំនួន ដើម្បីឱ្យដឹងចំនួនមនុស្ស : *មនុស្ស២នាក់។*

ខ. បំពេញល្បះខាងក្រោមដោយប្រើសញ្ញា "?" និង "។"

១. គេពុំដឹងប្រាកដថា អ្នកណាបង្កើតឧបករណ៍ភ្លេងឡើយ... <u>*។*</u>

២. តើបទភ្លេងខ្មែរប្រគំឡើងក្នុងពិធីបុណ្យអ្វីខ្លះ... <u>*?*</u>

៣. ហេតុអ្វីបានជាបទភ្លេងខ្មែរធ្វើឱ្យអ្នកស្ដាប់ពីរោះជាប់ចិត្ត...<u>*?*</u>

៤. បទភ្លេងខ្មែរមានទាំងអស់ជាងប្រាំមួយរយបទ...<u>*។*</u>

គ. តែងល្បះដោយប្រើពាក្យនាម គុណនាម និងកិរិយា៖

១. ភ្លេង : *បុព្វបុរសខ្មែរបានបង្កើតឧបករណ៍ភ្លេងជាច្រើនប្រភេទ។*

២. រុងរឿង : *កាលពីអតីតកាល ប្រទេសខ្មែរគឺជាប្រទេសរុងរឿងណាស់។*

៣. ភ្លេច : *សព្វថ្ងៃនេះ ខ្ញុំភ្លេចបទភ្លេងបុរាណអស់ជាច្រើនហើយ។*

**មេរៀនទី**
៦២ អំណាន

# ខ្ញុំស្រឡាញ់ទឹកដីខ្មែរ

## សំណួរ

១. នៅពេលមានសត្រូវមកយាយី តើប្រជាជនខ្មែរបានធ្វើដូចម្តេច?

២. តើប្អូនមានអារម្មណ៍ដូចម្តេច ចំពោះមាតុភូមិរបស់ប្អូន?

## ចម្លើយ

១. នៅពេលមានសត្រូវមកយាយី ប្រជាជនខ្មែរសុខចិត្តប្តូរជីវិតដើម្បីការពារទឹកដីឱ្យបានគង់វង្ស។

២. ខ្ញុំមានអារម្មណ៍ស្រឡាញ់មាតុភូមិរបស់ខ្ញុំណាស់ ព្រោះជាកន្លែងផ្តល់កំណើតដល់រូបខ្ញុំ។

## ចម្លើយសំរោត់

១. រកបដិសព្ទពីក្នុងអត្ថបទខាងលើឱ្យបានមួយពាក្យ

បុរាណ ≠ សម័យ

២. រកវេវចនសព្ទពីក្នុងអត្ថបទខាងលើឱ្យបានមួយពាក្យ

មហាក្សត្រ ស្តេច ព្រះរាជា ព្រះភូមី ព្រះនរបតី ព្រះនរនាថ។

៣. រកសទិសសព្ទពីក្នុងអត្ថបទខាងលើឱ្យបានមួយពាក្យ

-សុខ(គុ) ដែលសប្បាយ, ងាយស្រួល, ស្រណុក, សម្រាន្ត។
ន. សេចក្តីសប្បាយ, ដំណើរស្រួល។ *សេចក្តីសុខ*។

- សុក(ន) អាការមួយប្រភេទ ជាស្រោមស្រោបកូនដែលនៅក្នុងផ្ទៃម្តាយ មានទងជាប់នឹងផ្ចិតកូនជាផ្លូវជ្រួតជ្រាបរសជាតិឱ្យកូនចម្រើនធំធាត់តាមកំណត់។

-សុក្ក(គុ) ស.ស្អាត. បរិសុទ្ធ.ថ្លា.ភ្លឺ។ ន. ទឹកអសុចិ. ទឹកកាម។

-សុក្រ(ន) ឈ្មោះផ្កាយទី៦ គឺផ្កាយប្រចាំទ្វីប ឬផ្កាយព្រឹក : *ផ្កាយសុក្រ*។ ឈ្មោះថ្ងៃទី៦ : *ថ្ងៃសុក្រ*។

៤. ស្រង់ពាក្យដែលមានបន្តក់ (ំ) ពីក្នុងអត្ថបទ៖ គ្រប់ ស្រស់ ។

**សំណេរ**

ក. សរសេរតាមអាន

ខ. បំពេញវគ្គចម្រៀងខាងក្រោម៖

ដែនដីខ្មែរប្រែថា...*សុវណ្ណភូមិ*... ខ្មែរគ្រប់ភូមិ...*រមណីយ*...ដ្ឋាន ...*ជាដរាប*...តមកពីបុរាណ ខ្មែរគ្រប់ប្រាណ...*ស្វាគមន៍*...សាមគ្គី។ ថ្ងៃមួយមានសត្រូវ...*ប្រទូសរ៉ាយ*... ...*ខ្មែរគ្រប់កាយ*...សុខចិត្តប្តូរជីវី ...*សឹកសង្គ្រាម*...ឈាមស្រស់លើប្រឹថពី ឱ!ព្រះ...*ភូមីឫទ្ធិ*...វង្សគង្គា។

គ. បំពេញលេខនៅក្នុងប្រអប់នៃវគ្គចម្រៀងខាងក្រោមឱ្យបានត្រឹមត្រូវ។

② ថ្ងៃមួយមានសត្រូវប្រទូសរ៉ាយ ខ្មែរគ្រប់កាយសុខចិត្តប្តូរជីវី
សឹកសង្គ្រាមឈាមស្រស់លើប្រឹថពី ឱ!ព្រះភូមីឫទ្ធិវង្សគង្គា។

① ដែនដីខ្មែរប្រែថាសុវណ្ណភូមិ ខ្មែរគ្រប់ភូមិរមណីយដ្ឋាន

ជាដរាបតមកពីបុរាណ ខ្មែរគ្រប់ប្រាណស្វាគមន៍សាមគ្គី។
៣ កម្ពុជាឯករាជ្យបានឃ្លាតពីទុក្ខ ខ្មែរបានសុខទាំងអស់គ្រប់អាត្មា
សូមទេវតាឱ្យពរសព្ទសាធុការ ហាក្សត្រយើងគ្រប់គ្រងផែនដី។
ឃ. សរសេរតែងសេចក្ដីពណ៌នាពីទីកន្លែងកម្សាន្តនៅស្រុកស្រែពេល
រដូវវស្សា។

## សេចក្ដីអធិប្បាយ

កាលពីថ្ងៃអាទិត្យ ខ្ញុំបានធ្វើដំណើរទៅកម្សាន្ត និងគយគន់ទិដ្ឋភាពវាលស្រែមួយ នៅឯស្រុកស្រែដែលជាស្រុកកំណើតរបស់ឪពុកខ្ញុំ។ ទេសភាពវាលស្រែនៅពេលព្រឹក នារដូវវស្សាពិតជាស្រស់ស្អាតណាស់។

ពេលខ្ញុំទៅដល់វាលស្រែភ្លាម ខ្ញុំឃើញវាលស្រែពណ៌បៃតងលាតសន្ធឹងល្វឹងល្វើយដាច់កន្ទុយភ្នែក។ សន្ទូងនៅក្នុងស្រែកំពុងបែកគុម្ពមានពណ៌ខៀវខ្ចី ហើយបក់រវិចៗទៅតាមចលនាខ្យល់បក់។ ភ្លឺស្រែរត់ជាជួរៗប្រៀបដូចជាក្រឡាចត្រង្គ។ នៅក្នុងស្រែខ្លះទៀត មីងៗកសិករកំពុងញាប់ដៃស្ទូងបង្ហើយ ឯពូៗជញ្ជូនកណ្ដាប់ដោយទឹកមុខញញឹម។ សំឡេងបក្សាបក្សីលាន់ឮទ្រហឹងអឺងកងអំពីចុងព្រឹក្សានៅក្បែរនោះ ប្រៀបបាននឹងតូរ្យតន្ត្រីមួយវង់ បានជួយបំពេរបរិយាកាសនៅវាលស្រែឱ្យកាន់តែរីករាយទ្វេឡើង។

ទិដ្ឋភាពវាលស្រែដែលខ្ញុំបានដើរកម្សាន្ត បានដក់ជាប់នៅ

ក្នុងក្រឧិបេះបូងខ្ញុំឱ្យកាន់តែស្រឡាញ់វាលស្រែស្រុកខ្មែរយើង។ ខ្ញុំសប្បាយចិត្តណាស់ នៅពេលដែលបានឃើញវាលស្រែរបស់ប្រជាកសិករយើងលូតលាស់ល្អបែបនេះ។

**មេរៀនទី ៦៣ អំណាន**

# ផលប្រយោជន៍នៃបច្ចេកវិទ្យាព័ត៌មាន

## សំណួរ

១. តើបច្ចេកវិទ្យាព័ត៌មានប្រើសម្រាប់ធ្វើអ្វី?

២. តើបច្ចេកវិទ្យាព័ត៌មានជាឧបករណ៍ដូចម្ដេច?

៣. តើបច្ចេកវិទ្យាព័ត៌មាន មានសារប្រយោជន៍ដូចម្ដេចខ្លះ?

## ចម្លើយ

១. បច្ចេកវិទ្យាព័ត៌មានប្រើសម្រាប់ចែករំលែកនូវចំណេះដឹង បទពិសោធ ជំនាញបច្ចេកទេស និងបំណិនជីវិតផ្សេងៗ រួមទាំងការរកឃើញថ្មីៗបំពេញឱ្យគ្នាទៅវិញទៅមក។

២. បច្ចេកវិទ្យាព័ត៌មានជាឧបករណ៍វិទ្យាសាស្ត្រប្រើសម្រាប់ទាក់ទងគ្នាតាមបែបទំនើប និងរហ័សទាន់ចិត្ត។

៣. បច្ចេកវិទ្យាព័ត៌មាន មានសារប្រយោជន៍ដល់មនុស្សគ្រប់រូបលើពិភពលោកក្នុងការផ្ដល់និងទទួលព័ត៌មានថ្មីៗ ដើម្បីរួមចំណែកអភិវឌ្ឍសមត្ថភាព។

## ចម្លើយលំហាត់

**១. រកបដិសព្ទនឹងពាក្យ "សម្ងាត់"**

សម្ងាត់ ≠ ខ្ចរខ្ចាយ

២. រកវេវចនសព្ទនឹងពាក្យ "រហ័ស" គឺៈ រហ័សរហួន ប្រញាប់ រួសរាន់ ម៉ឺម៉ា រូតរះ រវៀសរវៃ។

៣. រកសទិសសព្ទនឹងពាក្យ "ដ៏"

-ដ៏(និ) ដែល, ដែលជា, ពាក្យវិសេសនៈ, មានសំឡេងខ្លីកំបុត សម្រាប់និយាយផ្សំនឹងគុណនាម ប្រើរៀងរបៀបត្រង់ខាងដើមគុណនាមដែលគួរប្រកបជាមួយផងបាន : *ធម៌ដ៏បវរ, ទ្រព្យដ៏ប្រសើរ ។*

-ដ៏(ន) ទីចម្លង, កំពង់ចម្លង : *កំពង់ដ, ទូកដ ។*

-ដរ(គុ) ដែលរើឡើងវិញដោយប៉ះទង្គិច : *ដំបៅដរ ។*

៤. ក្នុងចំណោមពាក្យខាងក្រោមនេះ តើពាក្យណាខ្លះជានាម? ចូរគូសភ្ជាប់ពី (ក) ទៅ (ខ)។

| ក | ខ |
|---|---|
| ពាក្យជានាម — រថយន្ត, កំព្យូទ័រ, ទូរស័ព្ទ | រថយន្ត<br>ទំនើប<br>កំព្យូទ័រ<br>ទូរស័ព្ទ<br>បញ្ជូន |
| ពាក្យជាគុណនាម — ថ្មីៗ | រក្សា<br>ថ្មីៗ |

| | |
|---|---|
| ពាក្យជាគុណនាម | ពិភពលោក<br>ទំនើប<br>ប្រសើរ |
| ពាក្យជាកិរិយាសព្ទ | ព័ត៌មាន<br>ទទួល<br>ចំណេះ<br>ចែករំលែក<br>ចំណាយ |

## សំណេរ

ក. សរសេរតាមអាន

**ចម្លើយសំយោគ**

១. ពន្យល់ពាក្យ "ពិភពលោក រថយន្ត"

- ពិភពលោក (ន) លោកទាំងមូល។
- រថយន្ត (ន) រថដ៏វិសេសមួយប្រភេទមានទ្រង់ទ្រាយផ្សេងៗច្រើនបែប បើកឱ្យលឿនទៅមុខឬឱ្យថយមកក្រោយក៏បានដោយកម្លាំងគ្រឿងយន្ត ។

២. រកបដិសព្ទនឹងពាក្យ "ទំនើប គ្រប់"

ទំនើប ≠ បុរាណ

គ្រប់ ≠ ខ្វះ

៣. **រកវេវចនសព្ទនឹងពាក្យ "អភិវឌ្ឍ" គឺ រីកចម្រើន ជឿន លឿន។**

៤. សទិសសព្ទនឹងពាក្យ "ទូរ"

-ទូរ(កិ) ធៀបគ្នា, សាកគ្នា, ផ្ទឹមគ្នាដើម្បីឱ្យឃើញណាមួយប្រសើរជាង : *របស់ខ្ញុំថ្លៃ៥០០រៀលទៅទូរនឹងរបស់អ្នកថ្លៃ១០០០រៀលម្ដេចបាន។*

-ទូ(ន) ប្រដាប់ធ្វើដោយឈើ ឬដែកមានទ្វារ, សម្រាប់ដាក់វត្ថុទាំងពួង : *ទូដែក, ទូកញ្ចក់។*

-ទូល(កិ) នាំអ្វីៗយកទៅមកដោយដាក់លើក្បាល : *ទូលល្អី។*

-ទូល(កិ) ប្រាប់, ឱ្យដំណឹង(រ.ស) : *សូមទូលព្រះអង្គ......។*

ខ. បំពេញល្បះនិងបញ្ចប់ល្បះដោយប្រើសញ្ញា "?" និង "។"

១. ហេតុអ្វីបានជាការនាំសារបច្ចុប្បន្នឆាប់រហ័ស...*?*

២. បច្ចេកវិទ្យាថ្មីនេះបានជាប្រយោជន៍ដល់មនុស្សគ្រប់រូប...*។*

៣. ចូរបង្ហាញពីការប្រើទូរស័ព្ទដៃ...*។*

មេរៀនទី
៦៤ អំណាន

# សមាគមអាស៊ាន

## សំណួរ

១. ដូចម្តេចដែលហៅថា "អាស៊ាន"?

២. តើសមាគមអាស៊ានមានប៉ុន្មានប្រទេស? ប្រទេសណាខ្លះ?

៣. តើទង់និមិត្តសញ្ញាអាស៊ានបង្កើតឡើងដើម្បីអ្វី?

៤. នៅឆ្នាំ២០១២ ប្រទេសណាជាប្រធានសមាគមអាស៊ាន?

## ចម្លើយ

១. ដែលហៅថា "អាស៊ាន" គឺជាសមាគមនៃប្រជាជាតិអាស៊ីអាគ្នេយ៍។

២. សមាគមអាស៊ានមាន១០ប្រទេស គឺប្រទេសឥណ្ឌូនេស៊ី ម៉ាឡេស៊ី ហ្វីលីពីន សិង្ហបុរី ថៃ ប្រ៊ុយណេ ឡាវ មីយ៉ាន់ម៉ា វៀតណាម និងកម្ពុជា។

៣. ទង់និមិត្តសញ្ញាអាស៊ានបង្កើតឡើងដើម្បីលើកកម្ពស់វិស័យវប្បធម៌ សេដ្ឋកិច្ច វឌ្ឍនភាពនយោបាយ និងពង្រឹងទំនាក់ទំនងនៅតំបន់អាស៊ីអាគ្នេយ៍។

៤. នៅឆ្នាំ២០១២ ប្រទេសកម្ពុជា គឺជាប្រធានអាស៊ាន។

## ចម្លើយលំហាត់

១. រកបដិសព្ទនឹងពាក្យ "ស្ថិរភាព"

- ស្ថិរភាព ≠ អស្ថិរភាព

២. រកវេវចនសព្ទនឹងពាក្យ "នាយក" គឺ អ្នកដឹកនាំ អ្នកគ្រប់គ្រង។

៣. រកសទិសសព្ទនឹងពាក្យ "វឌ្ឍ"

-វឌ្ឍនី ឬវឌ្ឍនៈ (ន) សេចក្តីចម្រើន, ការលូតលាស់, ដំណើរដុះដាល, ដំណើរកើតកាលវាលគុម្ព។ *វឌ្ឍនកម្ម, វឌ្ឍនភាព*។

-វត្ត(ន) ប្រព្រឹត្តិ, ការប្រព្រឹត្ត, សេចក្តីប្រតិបត្តិ, មុខការ, កិច្ចដែលគួរធ្វើ, ការកាន់សីលធម៌, សេចក្តីគោរព, ទំនៀម, សណ្តាប់ធ្នាប់ : *សិស្សធ្វើវត្តគ្រូ*។

-វត្ត(ន) ទីដែលមានវត្តប្រតិបត្តិ, អាវាស ឬអារាមជាទីអាស្រ័យរបស់ពួកសមណ : *ឱ្យកូនចៅទៅនៅវត្ត*។

-វដ្ត(គុ) ដែលវិល, មូល, ដែលជាវង់មូល។ (ន.) ការវិលទៅវិលមក, ដំណើរវិលកើតវិលស្លាប់ : *វដ្តសង្សារ, វដ្តកង្កែប*។

-វាយ(កិ) ជួសឆ្កិះខ្លាំងដោយចុងស្នែង : *ក្របីដេញវាយ*។

-វាត់(កិ) រលាស់ចុះឡើង : *វាត់សន្ទូច, វាត់មួយជើង*។

-វាត់(គុ) : ដែលរលាស់ឡើងបាន : *សន្ទូចវាត់, អន្ទាក់វាត់*។

៤. ផ្គុំផ្គងពាក្យនាម គុណនាម និងកិរិយាសព្ទខាងក្រោម។




៥. គំនិតសំខាន់ៗរបស់អត្ថបទ "សមាគមអាស៊ាន" គឺៈ

- កំណើតនៃសមាគមអាស៊ាន
- សមាជិកនៃសមាគមអាស៊ាន
- គោលបំណងនៃការបង្កើតសមាគមអាស៊ាន

**សំណេរ**

ក. សរសេរតាមអាន

**ចម្លើយលំហាត់**

១. ពន្យល់ពាក្យ "ភារកិច្ច វប្បធម៌"

- ភារកិច្ច (ន) កិច្ចដែលជាបន្ទុក, កិច្ចការដែលត្រូវធ្វើ។
- វប្បធម៌ (ន) ការផ្សាំបណ្ដុះចំណេះវិជ្ជានិងប្រាជ្ញាស្មារតីឲ្យបានលូតលាស់ចម្រើន ដោយវិទ្យាសាស្ត្រ ឬដោយសិល្បៈផ្សេងៗជាដើម ។

២. បដិសព្ទនឹងពាក្យ "ជោគជ័យ"

ជោគជ័យ ≠ ....បរាជ័យ

៣. វេវចនសព្ទនឹងពាក្យ "ឧត្តុង្គឧត្តម" គឺ៖ ថ្កើងថ្កាន រុងរឿង ប្រសើរ ត្រចះត្រចង់ ថ្លៃថ្នា។

៤. សទិសសព្ទនឹងពាក្យ "ទង់"

-ទង់(ន) ផ្ទាំងសំពត់ ឬចម្រៀកសំពត់ដែលដេរឱ្យមានសណ្ឋាន និងពណ៌ឬរូបផ្សេងៗ សម្រាប់ប្រើជាកិត្តិយសក្នុងប្រទេសមួយ ឬជាគ្រឿងសម្គាល់តាមសាសនានីមួយៗ, ធ្វើដោយក្រដាសក៏ហៅថា *ទង់* ដែរ : *ទង់ជាតិ* ។

-ទង់(កិ) ទាញទាំងពីរខាងទៅវិញទៅមក, ទាញទៅទាញមក ច្រើននិយាយ *ទង់ទាញ* ឬ *ទាញទង់* ។

-ទុង(ន) ឈ្មោះបក្សីមួយប្រភេទ មានកវែងម្រាមជាប់ដូចទា, ហែលទឹក មុជទឹកបាន, ហើរបានខ្ពស់ : *សត្វទុង* ។

ខ. បំពេញល្បះ និងបញ្ចប់ល្បះដោយប្រើសញ្ញា "?" និងសញ្ញា "។"

- តើប្រទេសដែលជាសមាជិក *អាស៊ាន* មានប៉ុន្មាន *ប្រទេស?*

- សមាគមអាស៊ានត្រូវបាន *បង្កើត* ឡើងនៅថ្ងៃទី០៨ ខែ*សីហា* ឆ្នាំ១៩៦៧*។*

- តួនាទីនេះជា *មោទនភាព* ជាតិមួយដ៏ឧត្តុង្គឧត្តមរបស់ជាតិយើង*។*

គ. តែងល្បះនឹងពាក្យនីមួយៗខាងក្រោមមួយពាក្យមួយល្បះ។

- ប្រទេស : *ប្រទេសកម្ពុជាជាសមាជិកទី១០នៃសមាគមអាស៊ាន។*

- ធំធេង : *សមាគមអាស៊ានមានតួនាទីយ៉ាងធំធេងនៅក្នុងតំបន់។*

- បង្កើត : *សមាគមអាស៊ានបង្កើតឡើងនៅឆ្នាំ១៩៦៧។*

# ចប់

